សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

# ស្រុកទេសខ្មែរក្នុងទំនាយ មហាសង្ក្រាន្តឆ្នាំថ្មី ឆ្នាំមមី



នៅក្នុងមហាសង្ក្រាន្តឆ្នាំមមីឆ្នាំសេះ របស់គណៈកម្មាធិការស្រាវជ្រាវហោរាសាស្ត្រ និងប្រពៃណីទំនៀមទម្លាប់ខ្មែរនៃក្រសួងធម្មការ និងកិច្ចការសាសនាដែលរៀបរៀង និងគណនាដោយលោកអនុបណ្ឌិត អ៊ឹម បូរិន្ទ នាយកនៃគណៈកម្មការស្រាវជ្រាវវិជ្ជាហោរាសាស្ត្រ និងប្រពៃណីទំនៀមទម្លាប់ខ្មែរនោះ គឺមហាសង្ក្រាន្តឆ្នាំថ្មី២០១៤នឹងចូលមកដល់ចំថ្ងៃចន្ទ១៥កើត ខែចេត្រ ត្រូវនឹងទី១៤ ខែមេសា វេលាម៉ោង ៨ និង០៧នាទីព្រឹក។ ចំណែកទេវតាឆ្នាំថ្មីដែលនឹងមកទទួលតំណែងរក្សាសត្វលោក

**តទៅទំព័រទី ១០**

# KhmerPost USA

## 4th Annual Media & Community Gala Celebrate the

## Asian/Pacific American Heritage Month

## ប្រិយមិត្តខ្មែរផុសស.រ.អា ជាទីរាប់អាន



ក្នុងឱកាសពិធីបុណ្យទទួល"ខែឧសភានៃកេរ្តិ៍ដំណែលវប្បធមិអាស៊ីប៉ាស៊ីហ្វិក"នេះ សារព័ត៌មានខ្មែរផុសស.រ.អា មានសេចក្តីរីករាយនឹងរៀបចំរាត្រីសមោសរប្រចាំឆ្នាំមួយនៅថ្ងៃទី២ ខែឧសភា ឆ្នាំ២០១៤ វេលាម៉ោង៦ល្ងាចនៅភោជនីយដ្ឋាន"ហុងកុង"ស្ថិតនៅ៣១៨ផ្លូវ Westford Lowell, MA 01852 ដោយមានសហគមន៍អាស៊ីដែលរស់នៅជុំវិញយើង មន្ត្រីផ្លូវការនឹងឯកជនចូលរួម ជាពិសេសមានអញ្ជើញលោកឯកអគ្គរដ្ឋទូតអាមេរិកាំងប្រចាំអង្គការសហប្រជាជាតិដើមកំណើតខ្មែរ ស៊ីចាន់ ស៊ីវ ចូលរួមជាវាគ្មិនកិត្តិយសផង ។

រាត្រីសមោសរប្រចាំឆ្នាំទី៤នេះ ខ្មែរផុសស.រ.អា.មានបំណងឧទ្ទិសចំពោះការចូលរួមរបស់សហគមន៍អាស៊ីជាមួយប្រជាជាតិអាមេរិកាំងក្នុងឱកាសបុណ្យជាតិដ៏ធំមួយ ដែលនៅរៀងរាល់ខែឧសភាសហរដ្ឋអាមេរិក តែងតែប្រារព្ធការទទួលស្គាល់កេរ្តិ៍មរតកវប្បធមិអាស៊ីស្មើមុខ និងវប្បធមិអាមេរិកាំងដែរ ។ លោកឯកអគ្គរដ្ឋទូត ស៊ីចាន់ ស៊ីវ កើតនៅកម្ពុជា ធ្លាប់ជាឧបការីលោកប្រធានាធិបតី ជច ឧបិលយូ ប៊ូស្ហ ពីឆ្នាំ១៩៨៩-៩៣ ធ្លាប់បានទទួលការតែងតាំងជាឯកច្ឆន្ទដោយព្រឹត្តសភាអាមេរិកាំង ជាឯកអគ្គរដ្ឋទូតប្រចាំអង្គការសហប្រជាជាតិឆ្នាំ២០០១-២០០៦ ក៏បានទទួលការអញ្ជើញមកជាវាគ្មិនកិត្តិយស និងមកបង្ហាញពីស្នាដៃនិពន្ធរបស់លោក"ឆ្អឹងមាស"នារាត្រីនោះដែរ ។ មិនត្រឹមតែប៉ុណ្ណោះពិធីយើងនឹងសំរាំងបំរើភោជនាហារ៥មុខ មានកំដរដោយក្រុមតន្ត្រីសម័យ មានបាបំរើភេសជ្ជៈ មានការបង្ហាញសំលៀកបំពាក់ពហុវប្បធមិ មានដាក់ឱ្យដេញថ្លៃសម្ភាត់នូវវត្ថុសិល្បៈជ្រើសរើស... ដែលនឹងធ្វើឱ្យរាត្រីសមោសរចូលរួមដោយភ្ញៀវពិសេស១៣៥០នាក់ មានមន្ត្រីរដ្ឋាភិបាលក្នុងតំបន់នឹងក្នុង រដ្ឋតំណាងពាណិជ្ជករ អ្នកផ្តល់សេវាកម្មផ្សេងៗ តំណាងអង្គការនានាកុះករនោះ នឹងក្លាយទៅជាត្រចះត្រចង់ជាពុំខាន ។

ខ្មែរផុសស.រ.អា.បានពង្រីកការផ្សាយពី"ហ្វីឡាដែលហ្វៀ"តាំងតែពី៣ឆ្នាំមកហើយ មកដល់រដ្ឋម៉ាសាឈូសែតមាន"ឡូវែល""លីន នឹងរីវែ"ចូលដល់ផ្ទះប្រមាណ២ម៉ឺនគ្រួសារ ។ ហេតុនេះហើយ បានជាយើងអាចសន្និដ្ឋានបានថា ខ្មែរផុសស.រ.អា. គឺជាអ្នកនាំពាំបំពងសម្លេងទីមួយរបស់សហគមន៍ខ្មែរ នឹងភ្ជាប់ទៅហ្នឹងសហគមន៍នៅជុំវិញខ្លួន ទៅអ្នកជុំនួញ អ្នកផ្តល់សេវាកម្ម នឹងរដ្ឋាភិបាលក្នុង និងក្រៅតំបន់ ។

**លិខិតនេះជាសេចក្តីអញ្ជើញចូលរួមក្នុងរាត្រីសមោសរ!** សូមលោកអ្នកប្រិយមិត្តខ្មែរផុសអញ្ជើញមកចូលរួមកុំខាន ដើម្បីជាការជួយលើកដំកើងវប្បធមិខ្មែរផង អាស៊ីផង នឹងជាកិត្តិយសដល់សហគមន៍ខ្មែរយើងនៅឡូវែលនេះផង ។

ពិន សំខុន និពន្ធនាយក

សុបិន ពិន នាយកគ្រប់គ្រង






# ដំណើរទៅ "ឡុងប៊ីច" ក្រុងដែលមាន
## ខ្មែររស់នៅច្រើនជាងគេ នៅស.រ.អា.




(ភាគ ៤ បញ្ចប់)

**ពិន សំខុន សម្រាប់ ខ្មែរប៉ុសស.រ.អា.**

តែមួយប៉ប្រិចភ្នែកដំណើរទៅ "ឡុងប៊ីច" ក៏មកដល់ទីបញ្ចប់យើងប្រមូលរៀបចំឥវ៉ាន់ ដើម្បីត្រៀមត្រឡប់មកកាន់ឡូវែលវិញនាថ្ងៃពុធព្រឹក ដូច្នេះយើងនៅសល់ពេល១ថ្ងៃដែរ សម្រាប់ជួបជុំគ្រួសារគ្រាន់ជាកិច្ចលាគ្នាជាចុងក្រោយ ។ យើងបានលុបកម្មវិធីទៅលេង "ឡាសវេហ្គាស" ដែលជាក្រុងលេងល្បែងហៅថា "កាស៊ីណូ" ដ៏ធំបង្អស់នៃស.រ.អា. ចោលដោយគ្មានពេលគ្រប់គ្រាន់តែក៏ជាឱកាសល្អសម្រាប់រំលឹក





ឡើងវិញនូវអ្វីដែលយើងបានឃើញនឹងចងចាំនូវលំអនឹងទម្លាប់នៃបងប្អូនដែលនៅបែកពីប្រទេសកម្ពុជាមកតែរស់នៅចម្ងាយប្រមាណ ៤ពាន់មាយល៍ពីគ្នាមកសរសេរគ្រាន់ជាការនឹករលឹកដល់អតីតកាលធ្លាប់មានយុវភាពរួមសុខទុក្ខជាមួយគ្នាមកជម្រាបជូនអ្នកនៅឆ្នេរខាងកើតនៃស.រ.អា.។

រំលឹកពី "ឡុងប៊ិច" គឺរំលឹកពីសហគមន៍ដ៏ធំរបស់ខ្មែររំលឹកពីវប្បធម៌ដែលនាំពីកម្ពុជាមកជាមួយ ជាពិសេស "ក្រុងខ្មែរ" ដែលទើបបានទទួលស្គាល់ជាផ្លូវការ កាលពី៥ឆ្នាំមុន សម្បូរដោយពាណិជ្ជករខ្មែរ ភោជនីយដ្ឋានខ្មែរ គ្រូពេទ្យរថយន្តខ្មែរ អ្នកឯកទេសកែសម្ផស្សមុខ ធ្វើសក់ ធ្វើក្រចក...។ល។ បានក្លាយទៅជាចំណុចកណ្តាលរបស់សហគមន៍ខ្មែរដែលលាតសន្ធឹងធំជាងក្រុងខ្មែរច្រើនដងទៅទៀតនោះ ។ នាពេលនេះ "ក្រុងខ្មែរ" ជាមោទនភាពសម្រាប់ងាកទៅរកការទទួលស្គាល់ "ខ្មែរ" ជាជនជាតិភាគតិចថ្មី ទើបមកតាំងទីកាលពីជាង៣០ឆ្នាំមុន ពីជនបរទេសម្ចាស់ស្រុកច្រើនជាងមោទនភាពជាអភិវឌ្ឍន៍ផ្ទៃក្នុង បើប្រៀបធៀបទៅនឹង "ឆាយណាថោន" របស់សហគមន៍ចិន ។ ថ្វីបើមិនទាន់យកបេះដូងពីសហគមន៍ខ្លួនបានគ្រប់គ្នា "ក្រុងខ្មែរ" ក៏កំពុងបង្ហាញខ្លួនចេញពីសហគមន៍ "ជនភៀសខ្លួន" **តទៅទំព័រទី ១៦**

# ដល់ពេលដែលត្រូវរៀបចំផ្លូវសម្រាប់ការចុះពីអំណាចរបស់មេដឹកនាំ!

**ដោយ : ប៉ែន បូណា**

កាលពីពេលថ្មីៗនេះ លោក សម រង្ស៊ី បានប្រាប់កាសែតបរទេសថា លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានស្នើឱ្យមានច្បាប់ការពារអតីតមេដឹកនាំ។ ទោះបីជាមន្ត្រីគណបក្សប្រជាជនបានបដិសេធ ប៉ុន្តែបញ្ហានេះត្រូវបានមជ្ឈដ្ឋាននានាលើកមកជជែកគ្នាយ៉ាងខ្លាំង។ តាមពិតគេតែងឮការទាមទារឱ្យលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ចាកចេញពីតំណែង ប៉ុន្តែមិនសូវមានអ្នកណាគិតគូរដល់ការរៀបចំប្រព័ន្ធច្បាប់សម្រាប់ការចុះពីអំណាចរបស់មេដឹកនាំខ្មែរទេ។ ដូច្នេះគួរតែដល់ពេលដែលត្រូវជជែកអំពីបញ្ហានេះហើយ ។

នៅកម្ពុជាជាទូទៅ គេច្រើនតែនាំគ្នានិយាយអំពីការត្រៀមខ្លួនឡើងកាន់អំណាច ប៉ុន្តែគេមិនសូវបានឮការជជែកគ្នាអំពីផ្លូវដែលត្រូវចាកចេញពីអំណាចនោះទេ។ ហេតុដូច្នេះហើយបានជាមេដឹកនាំខ្មែរច្រើនតែកាន់អំណាចយូរតែម្នាក់ឯងមិនងាយចុះ។ រីឯការផ្លាស់ប្តូរមេដឹកនាំត្រូវឆ្លងកាត់បដិវត្តន៍ដណ្តើមអំណាចដោយកម្លាំងពីជំនាន់មួយទៅជំនាន់មួយ ។

ជាការពិតណាស់ផ្លូវឡើងទៅកាន់អំណាចគឺជារឿងដ៏លំបាកមួយទៅហើយ ប៉ុន្តែការចាកចេញពីអំណាចវិញវារឹតតែលំបាកថែមទៀត ។ លំបាកនៅត្រង់ថា "វប្បធម៌ក្រាញអំណាច" បានក្លាយជា "ជំងឺសង្គម" ដ៏ចំណាស់មួយដែលពិបាកនឹងរកវិធីព្យាបាល។ វប្បធម៌ក្រាញអំណាចមិនមែនជាបញ្ហាដោយឡែករបស់បុគ្គលណាម្នាក់ឡើយ តែវាជាបញ្ហារួមរបស់សង្គមខ្មែរទាំងមូលដែលត្រូវរួមគ្នាដោះស្រាយ ។ ជាទូទៅអ្នកដឹកនាំនយោបាយខ្មែរតែងចាត់ទុកខ្លួនឯងជាតួឯកសំខាន់ជាងគេដែលគ្មានអ្នកណាប្រៀបមានន័យថា បើអត់ពីខ្លួនទៅគ្មានអ្នកណាអាចដឹកនាំបាន។ ចំណែកឯគណបក្សនយោបាយនីមួយៗក៏តែងផ្តល់តម្លៃខ្លាំងហួសហេតុទៅលើតួឯកនយោបាយរបស់ខ្លួនថា ជាមនុស្សសំខាន់មិនអាចជំនួសបានដែរ។ សំខាន់រហូតដល់ពេលខ្លះបញ្ហាប្រទេសទាំងមូលត្រូវបានគេចងភ្ជាប់ជាមួយនឹងបុគ្គលតែម្នាក់ ឬពីរនាក់។ ផ្នត់គំនិតបែបនេះកើតមានមិនថាតែក្នុងរដ្ឋាភិបាល ក្នុងគណបក្សនយោបាយសង្គមស៊ីវិល ឬក្នុងមជ្ឈដ្ឋានផ្សេងទៀតនោះឡើយ ។ មានមូលហេតុច្រើនយ៉ាងដែលគេអាចពន្យល់បញ្ហានេះបាន:



លោក នាយករដ្ឋមន្ត្រី ហ៊ុន សែន និង លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិក្នុងកិច្ចប្រជុំកំពូលនៅរដ្ឋសភា ថ្ងៃទី១៦ កញ្ញា ឆ្នាំ២០១៣

**មូលហេតុទី១:** គឺបញ្ហាមុខមាត់។ ជាទូទៅសង្គមខ្មែរច្រើនតែឱ្យតម្លៃខ្លាំងពេកទៅលើតំណែង។ ក្នុងន័យនេះការបាត់បង់មុខតំណែងត្រូវគេចាត់ទុកថា ជាការបាក់មុខមាត់យ៉ាងខ្លាំង។ ហេតុដូច្នេះហើយបានជាអ្នកមានមុខតំណែងតែងក្រាញមិនចង់ចុះចេញដោយងាយៗឡើយ ។

**មូលហេតុទី២:** ការក្រាញអំណាច គឺជាផលវិបាកនៃនយោបាយសងសឹកគ្នាតាមយុទ្ធសាស្ត្រ "អ្នកឈ្នះជាវីរជន រីឯអ្នកចាញ់ជាជនក្បត់ជាតិ"។ ទស្សនៈនេះហើយដែលជំរុញឱ្យមេដឹកនាំមិនងាយបោះបង់អំណាច។ **តទៅទំព័រទី ១៥**




**តពីលេខមុន**

**ដកស្រង់ពីសៀវភៅផ្សេងៗ -សម្រាយដោយខ្មែរផុស ស.រ.អា.**

អ្នកខ្មែរមិនសូវជាអ្នករកស៊ីទេគាត់តែងតែគិតជាទូទៅថា "រកស៊ីត្រូវតែចេះលួច ចេះភរ..." ក៏ប៉ុន្តែនៅផ្សារអាស៊ីកាន់តែច្រើនទៅហើយ មិនធ្វើយ៉ាងនេះទៀតទេ នៅផ្សារអាមេរិកនេះក៏រឹតតែតឹងតែងខ្លាំងណាស់ទៅទៀត គឺគេតម្រូវឱ្យយើងបង្ហាញតម្លាភាព គេត្រួតពិនិត្យលើភាពសុច្ចរិតនៃពាណិជ្ជកម្មនឹងហិរញ្ញវត្ថុ ដោយសារមានក្រុមឯកទេសខាងត្រួតពិនិត្យទំនិញនឹងក្រុមជំនាញខាងពន្ធដារថែមទៀត... រីឯច្បាប់ទម្លាប់ទៀតសោតក៏រឹតតែតឹងចំពោះការប៉ុនប៉ងប្រើវិធីទុច្ចរិតណាមួយ ដើម្បីសម្រេចបំណងក្រខ្វក់សម្រាប់ក្លាយជា "អ្នកមាន"ឆាប់ដែរ ។ ដូច្នេះសុភាសិត "ភូតនូវហោរ ចោរនូវជាង" ឬ"កុំឈ្លោះនឹងស្រី កុំក្តីនឹងចិន"មិនច្បាស់ជាត្រូវដូចពេលមុនៗនោះទេ ការងារប្រកបដោយភាពសុច្ចរិតនឹងយុត្តិធម៌គឺជាកត្តាសំខាន់សំរាប់ឱ្យការ"សន្សំតក់ៗ"ប្រស់យើងអាចទៅដល់គោលដៅជា "អ្នកមាន"បាន។

**៥-រក្សាសីលធម៌ជាគោលការណ៍ប្រចាំជីវិត :**

+ការទៀងទាត់ការដាក់លុយសន្សំ ឬចំណាយជាវិនិយោគជាមួយអង្គការ ឬក្រុមហ៊ុនណាក្តី គឺជាការសន្យាមួយដែលត្រូវសំអាងដោយ"កិច្ចសន្យា" ជាលាយលក្ខអក្សរ ហើយទទួលស្គាល់ទាំងសងខាងវាមានលក្ខណៈប្រាកដបានយូរ យើងមិនគួរនិយាយតែមាត់ទទេទេ។ ដើម្បីកុំឱ្យភាគីម្ខាងៗទទួលបាននូវការចាញ់កល់គ្នាទៅថ្ងៃមុខបាន គេត្រូវរកមេធាវីមកធ្វើកិច្ចសន្យានោះ ស្វែងរកភាពត្រឹមត្រូវនឹងគួរឱ្យជឿបាននៃ "កិច្ចសន្យា" នៅពេលដែលសម្រេចថាត្រឹមត្រូវ ហើយភាគីទាំងសងខាងមានភារកិច្ចអនុវត្តន៍កិច្ចសន្យាឱ្យបានទៀងទាត់បំផុត ហើយត្រូវរក្សាលិខិតនោះ ឱ្យបានគង់វង់កុំឱ្យបាត់ ពីព្រោះលិខិតនោះជាសម្បត្តិដ៏រុងរឿងរបស់យើង នៅ១០-២០ឆ្នាំទៅមុខទៀត ។ ការយឺតយាវតែមិនខកខាននៅកែរបាននៅឡើយ តែកុំឱ្យច្រើនដងនឹងក្លាយជាទម្លាប់អាក្រក់ ។

+ការភូទភរគឺជាការធ្វើឱ្យគេជឿយើងតែមិនមានការពិតក្នុងនោះទេ ឧទាហរណ៍ "ការលក់របស់ចាស់ថាជារបស់ថ្មី" ឬក៏ "អ្នកផឹកស្រា ហើយថាខ្លួនមិនចេះស្រវឹង" ឬក៏ "មនុស្សខ្វះខាតអំពាវនាវរៃអង្គាសយកលុយទៅជួយជនក្រីក្រ"...គឺជាការសង្កេតទៅលើភាពភូទភរនៃមនុស្ស ហើយក៏គេអាចរកឃើញការពិតវិញ យ៉ាងងាយស្រួលដែរ។ ការនិយាយហើយមានគេជឿ គឺជាការក៏សាងក្នុងពេលយូរនៅសហរដ្ឋអាមេរិក គេមានពិន្ទុដាក់ឱ្យជំនឿនោះ គេហៅថា "ក្រេឌីតស្គ័រ" យោងទៅតាមចរិកចាយវាយប្រើប្រាស់លុយក្នុងធានាគារ បើពិន្ទុនោះច្រើន ធានាគារគេទុកចិត្តគេហៅឱ្យខ្ចីលុយទិញឡាន ទិញផ្ទះ ខ្ចីលុយរកស៊ីនឹងមានលទ្ធភាពប្រើប្រាស់លុយធានាគារសម្រាប់ប្រើក្នុងគម្រោងអភិវឌ្ឍន៍ផ្សេងៗបាន ។ បើពិន្ទុនោះតិចទៅវិញ មិនអាចប្រើប្រាស់លុយធានាគារបានទេ សូម្បីតែជួលផ្ទះគេក៏មិនបានផង។ ការភូតភរ ការនិយាយបំប្លើស ការនិយាយអួតអាងគឺជាចរិយាសម្បត្តិដែលនឹងនាំឱ្យខាតលក្ខមិនត្រឹមតែ"មិនធ្វើឱ្យលុយហូរចូល"តែប៉ុណ្ណោះទេ ថែមទាំងធ្វើឱ្យខាតបង់ទៀតផង។

+ការលួចបន្លំលួចបន្លំជាគុណវិបត្តិក៏រឹតឧក្រិដ្ឋមានមនុស្សតិចណាស់ដែលរត់រួចពីបន្តាញប៉ូលីសនឹងតុលាការកាលណាមានរឿង"មានលុយ"បានមកពីលួចបន្លំនេះកើតឡើង ឬមួយបើមានមានការដាក់លុយក្រខ្វក់ទៅក្នុងធានាគារ គេនឹងដឹង



គេនឹងសួររកប្រភពដែលរកលុយនោះបានមកពីណា ជាមិនខាន ។ បើទោះជាគេចរួចមួយរយៈក៏វិធី"មានបាន"ដោយអំពើឧក្រិដ្ឋនឹងធ្វើឱ្យខ្លួនឯងបារម្ភមិនឈប់ឈរខិតខំលាក់បាំង បាត់បង់សេចក្តីស្ងប់ដែលជាភាពសុខសាន្តអស់រលីងដែរ។ នៅមានការយកចំណេញលើការលំបាករបស់អ្នកដទៃ ការគម្រាមកំហែង ការជីរិត ដែលសុទ្ធតែវិធី"មានឆាប់ដោយខ្វះសីលធម៌" ក៏មិនអាចរក្សាសម្បត្តិដែលរកបាននៅទេ ។ ការសន្សំតក់ៗនៅតែត្រូវការការព្យាយាមនឹងសុច្ចរិតដើម្បីជោគជ័យដដែល ។

+ការលេងល្បែង តែងមានឈ្នះមានចាញ់ ការចាញ់មានច្រើនជាងតែមនុស្សទូទៅចងចាំតែពេលខ្លួនឈ្នះតែប៉ុណ្ណោះ ពីព្រោះជាពេលដែលខ្លួនរីករាយនឹងជ័យជំនះ ឯពេលចាញ់ជាអារម្មណ៍អាម៉ាស់មិនចង់ទុកក្នុងខ្លួនទេ ។ គេពុំអាចសន្សំដោយការលេងល្បែងបានទេ ដោយសារមនុស្សជក់នឹងល្បែងជាជម្ងឺកើតពីការ"ញៀន"ដូចគ្នានឹងការប្រើគ្រឿងញៀនឯទៀតៗដែរ ។ នៅស.រ.អា.នេះសម្បូរកន្លែងលេងល្បែងដែលទាក់ទាញ"អ្នកចង់បានលុយ"ដូចជា"កាស៊ីណូ" ខ្លះទៀតអផ្សុកមិនដឹងធ្វើអ្វីក៏ក្រាលកន្ទេលនាំគ្នាលេងបៀផឹកស្រាបឿកំដរបរិយាកាសជាវិធីធ្វើឱ្យខូចសុខភាពដោយអត់ងងុយដោយស្រវឹង ឬដោយខឹងសម្បារខូចការ "សន្សំតក់ៗ"យ៉ាងងាយស្រួល។ "ការកំសាន្តកាយ" ដែលផ្អែកលើការចង់ចំណេញ ឬខាតលើការចង់ឈ្នះ ឬចាញ់ល្បែងប្រាជ្ញាលើការលើក ឬដាក់ខ្លួនទាំងនេះមិនបានជាជំនួយដល់ការសន្សំតក់ៗនោះទេ គឺភាពពិតនឹងធម្មតាឯណោះទេ ដែលជាជំនួយដល់ការហ្នឹងហ្ន់ និងព្យាយាមឱ្យបានប្រសើរក្នុងការសន្សំតក់ៗ ។

ឧទាហរណ៍ទាំងអម្បាមាណនេះ សុទ្ធសឹងតែជាការប្រៀនប្រដៅរបស់អ្នកកាន់សាសនាព្រះពុទ្ធខ្មែរយើងច្រើនជាពុទ្ធសាសនិកស្រាប់មានការងាយស្រលយល់នឹងចងចាំណាស់ ។ សាសនាមិនបានប្រដៅ"មិនឱ្យចង់មានទេ" តែបាន"ហាមអំពើលោភលន់" ដែលជាផ្នែកមួយនៃ




អបាយមុខដែរ អាចមានទោសក្នុងអាណាចក្រផង មានបាបក្នុងពុទ្ធចក្រផង ៕

**លើក ក្រោយជាលេខ ចុងក្រោយនៃអត្ថបទសន្សំតក់ៗដែលយើងនឹងលើកយកកត្តាចំណងគ្រួសារ គឺជាបុព្វហេតុសំខាន់នាំឱ្យការ"សន្សំតក់ៗ"អាចប្រព្រឹត្តទៅប្រកបដោយជោគជ័យបាន ៕ (នៅមានត)**

# វាចានាឱកាសចូលឆ្នាំថ្មី


ពិន សំខុន

**ដោយ : ពិន សំខុន**

តាមជំនឿពីបូរាណមកថា "ទេវតាឆ្នាំថ្មីនឹងយាងមកដល់នៅថ្ងៃទី១៤មេសា ២០១៤"នេះពេលនោះ ទេវតាឆ្នាំចាស់ក៏ចេញទៅហើយដែរ ។ តាមទំនៀមទំលាប់ខ្មែរ ខ្ញុំនឹងក្រុមគ្រួសារតែងតែសែនម្ហូបចំណីប្រណិតនៅខាងមុខផ្ទះអុចធូបអុចទៀនដើម្បីទទួលទេវតាថ្មីឱ្យចំពេលវេលាដែលបុរោហិត"ទស្សន៍ទាយពលាជតា"ទុកជាមុនយើងបន់ស្រន់នឹងជូនពរសព្វសាធុការចំរើនសុខសេរីសួស្តីដល់អ្នកដទៃពីខ្លួនឯងមានក្រុមគ្រួសារញាតិសាច់សារលោហិតឆ្ងាយជិតរាប់តាំងពីមាតា បីតា យាយតា មាមីងបងប្អូនកូនចៅមានមិត្តភ័ក្តិក្លើម្រាក់រាប់ទាំងមិត្តស្រី ឬប្រុស និងអ្នកស្រុកភូមិមន្ត្រីរាជការដែលធ្លាប់មានសគុណជាទីស្រឡាញ់រាប់អានសូមឱ្យទេវតានៃឆ្នាំថ្មីដែល ទើបយាងមកដល់បំពេញបំណងប្រទានពរដល់អ្នកទាំងនោះឱ្យបានប្រកបតាមបំណងប្រាថ្នាដែលល្អប្រសើរចំពោះញាតិសណ្តាន និងមិត្តរួមសង្គមទាំងអស់គ្នានោះ។

ខ្ញុំដូចជាចងចាំថា បានជូនពរដល់មនុស្សច្រើនណាស់រាប់មិនអស់តែមិនដែលរំលឹកប្រាប់ម្ចាស់សាម៉ីខ្លួនយកជាគុណស្រាយអីទេ ហើយឆ្នាំនេះនឹងធ្វើដូចឆ្នាំមុនៗទៀត ចំពោះមនុស្សដែលសុទ្ធសឹងតែជាមនុស្សដែលខ្ញុំស្រឡាញ់ចូលចិត្តមិនមានមនុស្សដែលខ្ញុំមិនចូលចិត្តនោះទេ... រួចចុះមនុស្សដែលខ្ញុំមិនចូលចិត្តធ្វើអាក្រក់ចំពោះខ្ញុំអាក្រក់ចំពោះសង្គមនោះ បាត់ពីអារម្មណ៍ខ្ញុំទៅណាអស់ទៅ? ពិតទៅខ្ញុំមិនដែលមានទំនៀមទម្លាប់ដាក់បណ្តាសារ ឬដេប្រមាទដែលជា "ការជូនពរអាក្រក់"ដល់មនុស្សដែលខ្ញុំមិនចូលចិត្តនោះទេ... បន្ថែមពីនោះទៀត ខ្ញុំនៅចាំមួយទៀតថា នៅពេលអង្គុយធ្វើសមាធិតាមបែបវិបស្សនាព្រះពុទ្ធបានបង្រៀនឱ្យ"ផ្សាយមេត្តា"ធម៌ដល់អ្នកដែលកំពុងទទួលរងទុក្ខទោស (ដូចជាអ្នកជាប់ពន្ធនាគារ) អ្នកប្រព្រឹត្ត អំពើបាប (ដូចពួកផ្តាច់ការ ឬពុករលួយ) មនុស្សជាទីសំអប់( មនុស្សដែលតែងតែប៉ុនប៉ងអាក្រក់មកលើយើង) ឬសត្រូវរបស់យើងឱ្យបានរួចចាកពីទុក្ខភ័យថែមទៅទៀត... តើដើម្បីអ្វី? តើចង់ជួយមនុស្សធ្វើអំពើអាក្រក់ឱ្យរឹតតែរីកចំរើនថែមទៀតឬ?

**តទៅទំព័រទី១៨**

# បុគ្គលិកលក្ខណៈមនុស្សកើតឆ្នាំមមី (សេះ)



លោកអ្នកកើតឆ្នាំមមី ពង្សទេវតាស្រី នាមជាសត្វសេះ ធាតុភ្លើង ទន្សាក់ណើតនៅថ្ងៃសៅរ៍ សិរីធ្លាក់មកពីដៃស្តាំរបស់ព្រហ្មមូលព្រលឹងនៅនឹងដើមចេក។ កាលណាទៅរស់នៅកន្លែងណាទីណាឱ្យយករំសេវឬដីខ្សាច់ទៅដាក់ពូនគល់ចេករកដើមចេកមកដាំទុកខាងជើង និងខាងលិចផ្ទះ ដែលខ្លួនរស់នៅ ទើបនឹងមានសិរីមង្គលរស់នៅត្រជាក់ត្រជុំជាសុខ ។

មនុស្សកើតឆ្នាំនេះរមែងជាមនុស្សមាន ឬក្សពារក្រអឺតក្រទមតែសន្តានចិត្តល្អ ជាទីពឹងពាក់ពុំនាក់អាស្រ័យនៃញាតិមិត្តបាន ។ ពាក្យសម្តីនិយាយច្រើនគ្រោតគ្រាតមិនសូវទន់ភ្លន់ ។ សត្រូវច្រើនកើតបានដោយសារតែសម្តីរបស់ខ្លួន ។ ជាមនុស្សមានវាសនាខ្ពស់មិនអាចអ្នកណាប៉ុនប៉ងពាធាបានឡើយ ។

កាលពីនៅតូចច្រើនលំបាកវេទនាតែដល់ចូលវ័យចាស់នឹងក្លាយជាអ្នកមានស្តុកស្តម្ភ ពីព្រោះជាមនុស្សមានសតិបញ្ញាឈ្លាសវៃប៉ិនប្រសព្វក្នុងការរកស៊ីយល់នូវជម្រៅគ្រប់ល្បិចកលរបស់មនុស្ស ។ ចូលចិត្តភ្លេងភ្លាត់ និងល្បែងផ្សេងៗ បើផ្លាស់លំនៅទៅទីដ៏ទៃល្អប្រសើរជាងនៅក្នុងកន្លែងកំណើត ។

មុខរបរដែលស័ក្តិសមនឹងមនុស្សកើតឆ្នាំនេះគឺ : ពេទ្យ គ្រូហ្ម អ្នកវិទ្យាសាស្ត្រ មេធាវី និងជាអ្នកជំនួញប្រែ។ បើធ្វើការងារដែលយកកម្លាំងកាយទៅ ប្តូរ ដូចជាធ្វើស្រែចម្ការ ច្បារ ដំណាំ នឹងបានផលជាមធ្យម ។

ទំនាយសម្រាប់លោកអ្នកកើតនៅក្នុងឆ្នាំមមី តាំងពីអាយុ៦ឆ្នាំ រហូតដល់៨០ឆ្នាំ បុរសអាយុ ៩,១៤,២១,២៦,៣៣,៣៨,៤៥, ៥០,៥៧,៦២,៦៩,៧៤,៨១ឆ្នាំ

និងស្ត្រីអាយុ១៤,១៩,២៦,៣១,៣៨,៤៣,៥០,៥៥,៦២,៦៧,៧៤,៧៩ឆ្នាំ

**ទំនាយថា :** ជាឆ្នាំនាំមកនូវជោគលាភសក្ការៈគិតប្រកបការងារអ្វីៗ តែងតែបានសម្រេចដូចសេចក្តីប្រាថ្នាគ្រប់ប្រការដែលអាចចែកចេញបានដូចតទៅនេះ ។

**ជោគលាភៈ** នឹងបានទ្រព្យសម្បត្តិលុយកាក់មាសប្រាក់ និងវត្ថុមានតម្លៃគ្រឿងប្រដាប់លម្អ គេហដ្ឋានដីធ្លី ឬបានឡើងប្រាក់ខែ និងប្រាក់ចំណាច់រង្វាន់ផ្សេងៗទៀត ។

**កិត្តិយសៈ** ការសិក្សានឹងបានប្រឡងជាប់ដូច សេចក្តីប្រាថ្នា បើនៅទំនេរនឹងបានការងារ ធ្វើ បើមានការងារធ្វើស្រាប់ហើយនឹងបានឡើងកាន់មុខតំណែងខ្ពស់ថែមទៀត ។

**កេរ្តិ៍ឈ្មោះ :** នឹងបានទទួលសេចក្តីនិយមរាប់អានលើកតម្កើងមុខមាត់ពីមនុស្សក្នុងមជ្ឈដ្ឋានការងារ ឬនៅក្នុងផ្ទះជាទីពេញចិត្តដល់ខ្លួនឯង និងអ្នកដទៃ ។

**សេចក្តីសុខ :** នឹងបានជួបប្រទះនឹងសេចក្តីស្នេហាដ៏បរិសុទ្ធ ឯអ្នកដែលមានគូគ្រង ហើយនឹងមានបុត្រជាទីស្រឡាញ់ពេញចិត្តសេចក្តីសុខនឹងកើតទ្វេឡើងថែមទៀត ។

បុរសអាយុ៣៨,៤៥,៥០,៥៧,ឆ្នាំ និងស្ត្រីអាយុ ៣៨,៤៣,៥០ឆ្នាំ

**ទំនាយថា :** បើរៀបអាពាហ៍ពិពាហ៍ហើយនឹងមានកូន បើនៅលីវនឹងបានរូមរក្សអភិរម្យសមសេចក្តីបំណងប៉ងប្រាថ្នា ឬបានទទួលលាភសក្ការៈជាវត្ថុមានជីវិតផ្សេងៗទៀតចូលមកនៅក្នុងផ្ទះ ។

**បុរសអាយុ :** ១០,១៣,២២,២៥,៣៤,៣៧,៤៦,៤៩,៥៨,៦១,៧៣,៨២ឆ្នាំ និងស្ត្រីអាយុ : ០៩,១២,២១,៣៣,៣៦,៤៥,៤៨, ៥៧,៦០,៦៩,៧២ឆ្នាំ

**ទំនាយថា :** ជាឆ្នាំនាំមកនូវគ្រោះកាចឱ្យប្រញាប់ប្រុងប្រយ័ត្នខ្លួន ដែលអាចចែកចេញបានដូចតទៅនេះ :

**១**-នឹងជួបប្រទះនូវរឿងទុក្ខសោកខូចចិត្តដោយពពួកសត្រូវក្រុមពាលទាំងឡាយប៉ុនប៉ងព្យាបាទ ។ កុំធ្វើដំណើរទៅទីស្ងាត់ និងពេលរាត្រីព្រោះនឹងត្រូវចោរខ្មួញគំរាមកំហែង ។

**២**-រោគាព្យាធិ៍បៀតបៀនកាយសត្វអាសិរ្ពិសទិច ឬខាំធ្វើឱ្យអស់សេចក្តីសុខមិនមានសេចក្តីសប្បាយ ។

**៣**-លុយកាក់ត្រូវចំណាយច្រើនទាំងក្នុងផ្លូវដែលចាំបាច់ និងមិនចាំបាច់ដែលអាចហៅថាជាឆ្នាំដែលចុះដើមទុនក្នុងផ្លូវដែលចាំបាច់ និងជាឆ្នាំនៃការចំណាយទៅក្នុងផ្លូវដែលមិនចាំបាច់ ។ បើធ្វើជំនួញជួញព្រៃនឹងត្រូវខាតដើមទុន ។

**៤**-សង្ឃឹមផលប្រយោជន៍ទៅលើផ្លូវអ្វីច្រើនតែខុសភ្លាំងភ្លាត់ប្រាក់ចំណូលតិចជាងប្រាក់ចំណាយ ឬបានមកហើយចាយអស់ទៅវិញ ។

**៥**-បងប្អូនញាតិមិត្តដែលធ្លាប់ស្រឡាញ់រាប់អានគ្នានឹងប្រែក្លាយជាសត្រូវ ។

**៦**-ទីលំនៅ ឬកន្លែងធ្វើការត្រូវផ្លាស់ប្តូរ ឬធ្វើដំណើរទៅស្រុកឆ្ងាយ ឬបើលោកអ្នកមិនចាកចេញទៅទេ ក៏គង់មានមនុស្សនៅក្នុងផ្ទះចាកចេញទៅដែរ ។

**៧**-ទទួលរងសេចក្តីយ៉ាប់យ៉ឺនលំបាកលំបិន ឬនឿយហត់ជាខ្លាំងទាល់តែមានៈអត់ធន់ ។

**៨**-ធ្វើការងារជាមួយដ៏ទៃ នឹងត្រូវគេឆបោក បងប្អូញាតិមិត្តស្និទ្ធស្នាលប្រែក្លាយទៅជាសត្រូវកន្លែងធ្លាប់នៅនឹងត្រូវក្តៅក្រហាយ ឬត្រូវគេបណ្តេញចេញចិត្តថ្នើមអន្ទះអន្ទែង ។

**បុរសអាយុ :** ១១,១២,២៣,២៤,៣៥,៣៦,៤៨, ៥៩,៦០,៧១, ៧២,ឆ្នាំ

**ស្ត្រីអាយុ :** ១៦,១៧,២៨,២៩,៤០,៤១,៤៧,៥២, ៥៣,៦៤,៦៥,៧៦,៧៧,ឆ្នាំ

**ទំនាយថា :** ឆ្នាំនេះជាឆ្នាំនៃប្រក្រតីកាល គឺមិនល្អណាស់ ហើយក៏មិនអាក្រក់ណាស់ណាដែរ ។ ការសិក្សាបានត្រឹមប្រលងជាប់មិនធ្លាក់ប្រកបការងារបានផលល្មម បើធ្វើជំនួញជួញប្រែបានត្រឹមមិនខាតដើម ។

បងប្អូនញាតិមិត្តជិតឆ្ងាយ បើឧស្សាហ៍ទៅមករាប់រកគ្នា ទើបអាចផ្សារភ្ជាប់ចំណងសាមគ្គីបានល្អ ។

ការងារអ្វីៗអាស្រ័យដោយការព្យាយាមហើយប្រើការពិនិត្យពិចារណាល្អិតល្អន់ ទើបអាចរកផលកម្រៃបាន ។ សេចក្តីស្នេហាត្រូវប្រើសេចក្តីមាន : ព្យាយាមទើបសម្រេចផលនឹងអាចរឹតចំណងស្នេហារវាងគ្នានឹងគ្នាបានជាបង្គួរ គឺមិនល្អពេកហើយ ក៏មិនអាក្រក់ពេកដល់ទៅដាច់ដោចលែងលះផ្តាច់មគ្គសង្វះគ្នាដែរ ។

**បុរសអាយុ :** ០៦,១៧,១៨,២៩,៣០,៤១,៤២, ៥៣,៥៤,៦៥,៦៦,៧៧,៧៨ឆ្នាំ

**និងស្ត្រីអាយុ :** ១០,១១,២២,២៣,៣៤,៣៥,៤៦, ៤៨,៥៨,៥៩,៧០,៧១,ឆ្នាំ

**ទំនាយថា :** ឆ្នាំនេះជាឆ្នាំស្រមោលអន្ទោលតាមប្រាណ គឺនៅក្នុងឆ្នាំនេះ បើអ្នកធ្វើល្អនឹងបានទទួលផលល្អ បើធ្វើអាក្រក់បានអាក្រក់តបស្នងវិញ យ៉ាងប្រាកដ ។

ធ្វើការងារអ្វីៗ ប្រដូចទៅនឹងស្រមោលអន្ទោលតាមប្រាណខុសហើយ គឺត្រូវទទួលផលកម្មដោយគ្មានការអភ័យ ឬបន្ធូរបន្ថយគ្មានផ្លូវនឹងផ្លាស់ប្តូរកែកុនថា ធ្វើអាក្រក់ឱ្យក្លាយទៅជាល្អ ឬធ្វើល្អទៅជាអាក្រក់បានទេ បើទុកជាគេជួយក៏ជួយមិនរួចដែរ ។

**តទៅទំព័រទី ៣១**

# បន្ថយ ប្រើជាថ្មី និងផលិតឡើងវិញ នារដូវផ្ការីក Reduce - Reuse - Recycle this SPRING



អត្ថបទផ្តល់ដោយ លោក វែវលែនស្ទែន ហ្គាន់ធី

ប្រែសម្រួលជាខេមរភាសាដោយ សុខា

**ក្រុងឡូវែល :** នៅថ្ងៃច័ន្ទ ទី៣១ ខែមីនា ឆ្នាំ២០១៤ ក្រុងឡូវែលចាប់ផ្តើមយុទ្ធនាការប្រមូលសម្រាមកែច្នៃ (Yard Waste) ជាសម្រាមមានដែលប្រមូលចេញពីរបស់របរលែងប្រើប្រាស់ ដូចជា ទូរទស្សន៍ សំបកកង់ឡាន និងឧបករណ៍សាងសង់នានាដោយមិនរាប់បញ្ចូលសម្រាម ដូចជាសំបកថូផ្កាសម្ភារ:មិនចម្លងអគ្គិសនីផ្សេងទៀត។

សម្រាប់កែច្នៃ (Yard Waste)នេះ មានចំណែកស្មើនឹង៣៣.៤លានតោននៃសម្រាមសរុបនៃសម្រាមដែលចោលក្នុងសហរដ្ឋអាមេរិកក្នុងមួយឆ្នាំៗ។

សម្រាប់កែច្នៃ (Yard Waste) នេះ ត្រូវដាក់ក្នុងក្នុងធុងសម្រាមធម្មតា ហើយសូមបិទចំណាំពីលើ។ ក្រដាសបិទចំណាំនោះ (Yard Waste Sticker) លោកអ្នកអាចទៅយកបាននៅសាលាក្រុងបន្ទប់ ៣៤ ឬ នៅនាយកដ្ឋានកិច្ចការសាធារណ: (អាស័យដ្ឋាន ១៣៦៥ddlesex Street) ឬនៅមជ្ឈមណ្ឌលសម្រាប់មនុស្សចាស់ (Senior Center) ផ្លូវ Broadway លើផ្លូវ Fletcher ។

**ចំណាំ:** សូមមេត្តាកុំដាក់សម្រាប់កែច្នៃ (Yard Waste) លាយឡំក្នុងសម្រាមដទៃទៀត។ ក្នុងកញ្ចប់នៃសម្រាប់កែច្នៃ(Yard Waste) នីមួយត្រូវមានទម្ងន់មិនលើស៣៥ផោន។ ម្យ៉ាងវិញទៀត សូមកុំទុកសម្រាមកែច្នៃ (Yard Waste) នៅលើចិញ្ចើមថ្នល់យូរពេក បើមិនទាន់ដល់ថ្ងៃប្រមូល ព្រោះដើម្បីទុកផ្លូវដើរឱ្យអ្នកថ្មើរជើង។

ព័ត៌មានមួយទៀតគឺទាក់ទងទៅនឹងការរៀបចំទុកដាក់ និងចោលកាកសំណល់សរីរាង្គ។ អាហារកាកសំណល់ទាំងនោះ លោកអ្នកអាចយកធ្វើកំប៉ុសបាន ហើយកប់ក្នុងដីនៃផ្ទះរបស់អ្នក។ ធ្វើបែបនេះ លោកអ្នកអាចធ្វើដីមានជីជាតិល្អផង និងជួយបរិស្ថានបានមួយផ្នែក។ ធុងសម្រាមសម្រាប់ដាក់កាកសំណល់កំប៉ុសនឹងផ្តល់ទៅឱ្យសាលាក្រុងរៀងរាល់ឆ្នាំ តាមរយ:ជំនួយថវិកាលើគម្រោងកែច្នៃរបស់សាលាក្រុងដែលតម្លៃធុងសម្រាមមួយ ចន្លោះ៦០ដុល្លារ ទៅ១០០ដុល្លារ។

រាល់ព័ត៌មានបន្ថែម សូមទាក់ទងអ្នកមានសមត្ថកិច្ចផ្នែកនេះ នៅក្នុងសហគមន៍ដែលអ្នករស់នៅ៕

**Article Contributed by Wellenstein Gunther**

In Lowell, curbside collection of yard waste officially starts Monday, March 31st. Collection, by Waste Management, will occur on your neighborhood 'trash day'. Our contract provides this service every week through your 'last trash day of November'. Diverting organic material from the incinerator is the Law! In April of 2000, the Massachusetts Department of Environmental Protection (MA DEP) enacted a series of Waste Bans, prohibiting certain material from the trash. The bans include TVs, tires, appliances, construction & demolition debris, recyclables and... yes, biodegradable, organic yard waste. What are the facts about yard waste? Yard waste account for nearly a fifth (over 33.4 million tons) of all garbage generated in the U.S. each year, making yard waste the second largest component (by weight) of the municipal solid waste (MSW) stream. The amount of yard waste generated varies considerably from region to region, during different seasons, and from one year to the next. In fact, during peak months (primarily spring and fall), yard waste can represent as much as 25 to 50 percent of MSW. Diversion makes fiscal sense too. In 2013 Lowell Continued to Page 11






# រាជរដ្ឋាភិបាល ហ៊ុន សែន អនុគ្រោះក្រុមពុករលួយ


លឹម គិមយ៉ា

មូលនិធិសកល (Global Fund) បានចេញរបាយការណ៍ស៊ើបអង្កេតមួយកាលពីថ្ងៃទី១៤ ខែវិច្ឆិកា ឆ្នាំ២០១៣ ដោយបង្ហាញភស្តុតាងជាច្រើនទាក់ទងនឹងបណ្តាញប្រព្រឹត្តអំពើពុករលួយក្នុងក្រសួងសុខាភិបាល ។

របាយការណ៍ស៊ើបអង្កេតកម្រាស់៨៣ទំព័របូក និងឯកសារឧបសម្ព័ន្ធចំនួន១៣៤ទំព័ររបស់មូលនិធិសកលបានរកឃើញថា អតីតប្រធានមជ្ឈមណ្ឌលជាតិប្រយុទ្ធប្រឆាំងជម្ងឺគ្រុនចាញ់ ប៉ារ៉ាស៊ិតសាស្ត្រ និងបាណកសាស្ត្រលោក ដួង សុជាតិ និងសហការីម្នាក់បានទទួលប្រាក់សគុណចំនួនជិត៥សែនដុល្លារពីក្រុមហ៊ុនផ្គត់ផ្គង់មុងចំនួនពីរនៅបរទេសដែលមានឈ្មោះលោកស្រី ឈូនូ គិមចិន្ដា (CHHOUNOU KIMCHENDA) ជាបងប្អូនរបស់លោកបណ្ឌិត ជីហួនូ គិមចិន្ដា (CHIHOUNOU KIMCHENDA) ជាអ្នកឈរឈ្មោះទទួលលុយ ។ ក្រុមហ៊ុនទាំងពីរផ្តល់ប្រាក់សគុណជូនមន្ត្រីទាំងនេះជាថ្នូរនឹងកិច្ចសន្យាជាមួយក្រសួងសុខាភិបាល ។

ចំពោះមន្ត្រីជាន់ខ្ពស់នៃមជ្ឈមណ្ឌលជាតិប្រយុទ្ធប្រឆាំងជម្ងឺអេដស៍សើស្បែក និងកាមរោគដែលទទួលបន្ទុកគ្រប់គ្រងការដេញថ្លៃគម្រោងមួយក៏ត្រូវអង្គភាពសវនកម្មរបស់មូលនិធិសកលរកឃើញថា បានទទួលប្រាក់សគុណប្រមាណ៤ម៉ឺនដុល្លារពីភាគីក្រុមហ៊ុនមួយចំនួន គឺស្មើ១៥%នៃទឹកប្រាក់គម្រោងចំនួនជិត៣សែន២ម៉ឺនដុល្លារ ។

សំណុំរឿងបន្លំលួចលុយរបស់មូលនិធិសកលក្នុងក្រសួងសុខាភិបាលត្រូវបានអង្គភាពប្រឆាំងអំពើពុករលួយបិទបញ្ចប់ការស៊ើបអង្កេតរបស់ខ្លួនហើយ ។ ប៉ុន្តែមន្ត្រីមួយចំនួនដែលជាប់ពាក់ព័ន្ធមិនត្រូវបានដាក់ទោសនោះទេ តែត្រូវបង្ខំឱ្យសងលុយទៅម្ចាស់ជំនួយវិញឱ្យបានគ្រប់ចំនួនដើម្បីបើកផ្លូវឱ្យមូលនិធិសកលផ្តល់ជំនួយមកឱ្យកម្ពុជាជាថ្មីទៀត ។

ទាក់ទងនឹងបញ្ហានេះប្រធានបណ្តាញរួបរួមដើម្បីគណនេយ្យភាពសង្គមអាស៊ីបូព៌ា និងអាស៊ីប៉ាស៊ីហ្វិកលោក សន ជ័យ មានប្រសាសន៍ថា ការពិន័យរដ្ឋបាលហើយមិនចាត់ការបទល្មើសព្រហ្មទណ្ឌទៅលើមន្ត្រីក្រសួងសុខាភិបាលជាគំរូអាក្រក់មួយដែលបង្ហាញពីនិទណ្ឌភាព ឬភាពគ្មានទោសពៃរ៍នៅកម្ពុជា ។

**លោកសនជ័យ:** វាមិនអីទេ ការសម្របសម្រួលបែបនេះបើសិនជានៅកម្ពុជាមិនមានច្បាប់ព្រហ្មទណ្ឌមិនមានច្បាប់ប្រឆាំងអំពើពុករលួយ ។ ការអនុវត្តបែបនេះនឹងនាំមកនូវការវាយតម្លៃទាបលើអង្គភាពប្រឆាំងអំពើពុករលួយ ។

អង្គភាពប្រឆាំងអំពើពុករលួយធ្លាប់បានសម្របសម្រួលក្នុងករណីពុករលួយនៅក្រសួងសង្គមកិច្ច កាលពីឆ្នាំ២០១១ ដោយបង្ខំឱ្យក្រសួងសង្គមកិច្ចសងប្រាក់ដែលគិបកេងពីរដ្ឋជាង៥លានដុល្លារទៅឱ្យក្រសួងសេដ្ឋកិច្ចវិញ ។

ប្រធានអង្គភាពប្រឆាំងអំពើពុករលួយលោក ឱម យ៉ិនទៀង មានប្រសាសន៍ថា រដ្ឋាភិបាលមិនប្តឹងមន្ត្រីក្រសួងសុខាភិបាលដែលមូលនិធិពិភពលោករកឃើញថា ប្រព្រឹត្តពុករលួយទៅកាន់តុលាការឡើយដោយសារតែគុណសម្បត្តិរបស់ក្រសួងសុខាភិបាលជុំវិញ **តទៅទំព័រទី ១១**

---



## វត្តត្រៃរតនារាម
**TRAIRATANARAM TEMPLE, INC**

21-25 Quigley Avenue,
North Chelmsford, MA. 01863
Home Phone: 978-251-2899



**BOARD OF DIRECTORS**
**President:**
Mr. Sann Binn
Mr. Sambath Fennell (VP)
**Secretaries:**
Mr. Thel Sar
Mr. Rida Eng
**Treasurers:**
Mr. Dararith Ung
Mr. Cosal Neak
**Members:**
Mr. Ly Mao
Mr. Samoeurn Seng
Mrs. Channvon Mon

## បុណ្យចូលឆ្នាំខ្មែរ
## *KHMER NEW YEAR CELEBRATION*

**សួរស្តី ឆ្នាំថ្មី! ឆ្នាំមមីឆស័ក ព.ស. ២៥៥៨ គ.ស. ២០១៤**

**Happy New Year! The Year of the Horse of Chorsak, 2558 B.C, 2014 A.C**

**សង្ក្រាន្តឆ្នាំថ្មី ចូលនូវថ្ងៃចន្ទ ១៥កើត ខែចេត្រ ត្រូវនឹងថ្ងៃទី ១៤ ខែមេសា វេលាព្រឹក ម៉ោង ៨:០៧នាទី ។**

**The exact (celestial) day of the New Year will be on Monday 14th April, 2014 at 8:07am**

យើងខ្ញុំ ជាគណៈកម្មការវត្តត្រៃរតនារាម សូមគោរពអញ្ជើញ លោក លោកស្រី និង ពុទ្ធបរិស័ទគ្រប់មជ្ឈដ្ឋាន ចូលរួមពិធីបុណ្យចូលឆ្នាំថ្មីប្រពៃណីខ្មែរ ទទួលទេវតាឆ្នាំថ្មី សិរីសួរស្តី ជ័យមង្គល ចម្រើនរុងរឿង និងដើម្បីបំពេញទានសន្សំកុសល ឧទ្ទិសផលបុណ្យជូនដល់ មាតាបិតា បុព្វការីជនទាំងឡាយរបស់យើង។

We, the Board of Directors of Wat Trairatanaram have the honor to invite you as well as other Buddhist followers to participate our tradional Khmer New Year celebration. The usher in of the New Year's angel and pursue the very best wishes, bundle of happiness, success, prosperity; and also, to cultivate good deeds by demonstrating gratitude to our parents as well as to dedicate these merits of goodwill's to the spirit of our departed ancestors.

### កម្មវិធីបុណ្យ

- **ថ្ងៃសៅរ៍** ១៣កើត ខែចេត្រ ត្រូវនឹងថ្ងៃទី**១២** មេសា ឆ្នាំ២០១៤ ។

| | |
|---|---|
| ម៉ោង៩ព្រឹក | នមស្សការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃចម្រើនព្រះបរិត្ត។ |
| ម៉ោង១០ព្រឹក | ពិធីរាប់បាត្រ។ |
| ម៉ោង ១១ព្រឹក | វេរចង្ហាន់ប្រគេនព្រះសង្ឃ ដារបង្សុកុល ឧទ្ទិសកុសលជូនដល់បុព្វការីជន។ |
| ម៉ោង ១២ | អញ្ជើញពុទ្ធបរិស័ទពិសារភោជនាហា ។ |
| ម៉ោង១:០០ | មានវង់ឆាយយ៉ាំ ចោលឈូង បោះអង្គុញ ព្រមទាំងពូនភ្នំខ្សាច់។ |

**ថ្ងៃអាទិត្យ** ១៤កើត ខែចេត្រ ត្រូវនឹងថ្ងៃទី**១៣** មេសា ឆ្នាំ២០១៤ ។

| | |
|---|---|
| ម៉ោង៩ព្រឹក | នមស្សការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃចម្រើនព្រះបរិត្ត។ |
| ម៉ោង១០ព្រឹក | ពិធីរាប់បាត្រ ។ |
| ម៉ោង១១ព្រឹក | វេរចង្ហាន់ប្រគេនព្រះសង្ឃ ដារបង្សុកុលឧទ្ទិសកុសលជូនដល់បុព្វការីជន។ |
| ម៉ោង ១២ | អញ្ជើញពុទ្ធបរិស័ទពិសារភោជនាហា ។ |
| ម៉ោង១:០០ | មាន ក្រុមរបាំអង្គរ សម្តែងជូនទស្សនា ។ |
| ម៉ោង ២ ល្ងាច | មាន ល្ខោនបាសាក់និងសម្តែងជូនទស្សនាជាបន្តបន្ទាប។ |

**ថ្ងៃសៅរ៍** ៥រោច ខែចេត្រ ត្រូវនឹងថ្ងៃទី**១៩** មេសា ឆ្នាំ២០១៤។

| | |
|---|---|
| • ម៉ោង៩ព្រឹក | នមស្សការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃចម្រើនព្រះបរិត្ត។ ។ |
| • ម៉ោង១០ ព្រឹក | ពិធីរាប់បាត្រ។ |
| ម៉ោង១១ ព្រឹក | វេរចង្ហាន់ប្រគេនព្រះសង្ឃ ដារបង្សុកុលឧទ្ទិសកុសលជូនដល់បុព្វការីជន។ |
| ម៉ោង ១២ | អញ្ជើញពុទ្ធបរិស័ទពិសារភោជនាហា ។ |
| ម៉ោង ២ ល្ងាច | ពិធី ស្រង់ព្រះ ។ |

**បញ្ជាក់៖** ថ្ងៃចន្ទ ទី១៤ អង្គារ ទី១៥ និង ពុធ ទី១៦ ជួបជុំពុទ្ធបរិស័ទនមស្សការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃចម្រើនព្រះបរិត្ត សំដែងព្រះធម៌ទេសនា នៅ 86 Canton Street ។

សូមអរព្រះគុណ និងសូមអរគុណ!!!!!!

### SCHEDULE OF EVENT

- **Saturday April 12th 2014**

| | |
|---|---|
| 9:00 am | Chanting triple gems, receive the Buddhist precepts, Blessing and Chanting by Buddhist Monks. |
| 10:00 am | Rice Offering into monk's bowls. |
| 11:00 am | Offering of food and goods and invitation monks to pray for ancestor's spirit. |
| 12:01 noon | Lunch |
| 1:00 pm | Traditional Games, Chay Yarm, and Sand Mount Blessing. |

- **Sunday April 13th 2014**

| | |
|---|---|
| 9:00am | Chanting triple gems, receive the Buddhist precepts, blessing and chanting by Buddhist monks. |
| 10:00 am: | Rice Offering into monk's bowls, |
| 11:00 am | Offering of food and goods and invitation monks to pray for ancestor's spirit. |
| 12:01 | Lunch |
| 1:00pm | Angkor Dance Troupe show. |
| 2:00pm | Khmer Opera ( Lar Khorn Ba Sak ) show. |

- **Saturday April 19th 2014, Last Day of New Year.**

| | |
|---|---|
| 9:00 am: | Chanting triple gems, receive the Buddhist precepts, blessing and chanting by Buddhist monks |
| 10:00 am: | Rice Offering into monk's bowls. |
| 11:00 am | Offering of food and goods and invitation of monks to pray for ancestor's spirit. |
| 12:01 pm: | Lunch |
| 2:00 pm | Holy Water Blessing. |

- **Additional New Year Activities:**
- **Monday April 14th, Tuesday April 15th and Wednesday April 16th ; we'll have traditional New Year activities at 86 Canton Street where monks are temporarily residing now.**

Additional information, please contact: San Binn (978) 804-6961, Cosal Neak (978) 726-2396, Mrs. Sear (978)421-5954, Samoeurn Seng (978) 327-8686.

# Youth take on substance abuse at fifth Annual Town Hall Event

# យុវជនចៀសវាងអំពើអបាយមុខ








នៅឯសហសាលនៃសាលាក្រុងមានការរៀបចំកម្មវិធីផ្តល់ឱ្យយុវជនស្វែងយល់អំពីវិបាកនៃការសេពគ្រឿងស្រវឹង និងការប្រព្រឹត្តគ្រឿងញៀន។ កម្មវិធីនេះ រៀបចំជាលើកទី៥ ហើយមានការចូលរួមពីយុវជនក្នុងតំបន់ឡូវែល និងនាយប៉ូលីស វីល្លៀម ថាយឡឺ ប្រធានមន្ទីរពេទ្យ ដូកាស ហ្គ្រី សេអ៊ីតុ អ្នកស្រី លីន ដាស៊ូ លោក ភីថឺសាំង និងភ្ញៀវជាច្រើនទៀត។

ខ្លឹមសារនៃកម្មវិធី គឺដើម្បីពង្រឹងយុវជនឱ្យក្លាយជាធនធានសម្រាប់សហគមន៍ និងប្រទេស ហើយក្លាយជាអ្នកដឹកនាំដោយគោលដៅតម្រែតម្រង់ពួកគេចៀសវាងនូវភាពមានកូននៅវ័យក្មេងពេកការប្រព្រឹត្តផ្លូវភេទប្រឈមនឹងការឆ្លងជំងឺអេដស៍, អេស ធី អាយ ចៀសពីការសេពគ្រឿងញៀនគ្រឿងស្រវឹងដែលទាំងអស់នេះសុទ្ធតែមូលហេតុនៃអំពើហឹង្សាក្នុងសហគមន៍ឡូវែល។

**By James Ostis**

There was a true carnival-like atmosphere at the Lowell Senior Center with the fun and games setting the stage for discussing a most important topic facing Lowell's youth. On Wednesday, March 26, 2014 the Greater Lowell Health Alliance's Substance Use and Prevention Task Force hosted their 5th Annual Town Hall Meeting: "Our Community". Youth from Lowell Community Health Center's Teen Block helped organize and staff the event featuring carnival games and prizes designed to help educate teenagers about substance abuse.

"The efforts to keep our youth drug-free are critical to creating healthy communities here in Lowell", said Linda Sou, Director of the Lowell Community Health Center's Teen BLOCK who is the Drug Free Communities Program grant fiscal agent. "The federally-funded Drug Free Communities Program recognizes Substance Use and Prevention Task Force potential to help save our youth and keep them engaged in healthy behaviors. This new source of funding will allow the members of the taskforce to mobilize and **Continued to page 11**

តមកពីទំព័រទី ១

## ស្រុកទេសខ្មែរក្នុងទំនាយមហាសង្ក្រាន្ត...

នាឋានកណ្តាលយើងនេះគឺជារាជបុត្រីទី២របស់កបិលមហាព្រហ្ម ព្រះនាងជាមត្តនាយិកា ព្រះនាមគោរាគៈទេវី ។

ដើម្បីឱ្យមានជោគសិរីសួស្តីចូលមានដល់ជនគ្រប់រូបនាឆ្នាំថ្មីនេះ ក្រៅអំពីការរៀបចំបោសសំអាតផ្ទះ និងតុបតែងលំនៅឋានត្រូវត្រៀមលក្ខណៈទទួលព្រះនាង គោរាគៈ ទេវី ជាទេវតាឆ្នាំមមី ដែលនឹងហែរហមដោយបរិវាជោ ទេពធីតា និងទេពនិករប្រមាណមួយសែនកោដិ។ ព្រះនាងទេពធិតា ទ្រង់អម្ពរពណ៌ ឈើងមានសៀតព្រះកាណ៌ (ត្រចៀក) ដោយផ្កាអង្គារបុស្សទ្រង់ពាក់កែវមុក្តា និងសោយតេលំ (ប្រេងសណ្តែក, ប្រេងដូង និងប្រេងល្ង) ជាភក្សាហារព្រះហស្តឆ្វេងទ្រង់ឈើច្រត់ ឯព្រះហស្ត ស្តាំទ្រង់ ព្រះខ័ន្ធ ។ ទ្រង់គង់លើខ្នងខ្លាជាជំនិះ ។

ចំពោះរណ្តាប់ និងរបៀបរៀបចំទទួលទេវតា ឆ្នាំថ្មីគឺត្រូវរៀបចំធ្វើនៅចំមុខផ្ទះ ដោយក្រាលសំពត់ពណ៌សមានរៀបបាយសី៩ថ្នាក់១គូ បាយសី៧ថ្នាក់១គូ បាយសី៥ថ្នាក់១គូ បាយសី៣ថ្នាក់ ១គូបាឆាម១គូ ស្លាធម៌១គូ ទឹកអប់១គូ ទៀន៥ ធូប៥ លាជ៥ ផ្កា៥ ដាក់លើជើងពាន១គូ ចេក ទូន ចេកណាំវ៉ាដាក់២ជើងពាន ផ្លែឈើ១១មុខដាក់លើជើងពាន១១គូ ដូងខ្ចៅ១គូ និងទឹកស្អាត២កែវ ។ ឆ្នាំនេះគួររកប្រេងដាក់ទទួលទេវតាផង ព្រោះជាភក្សាហាររបស់ទេពធីតា ។ លុះនៅវេលាម៉ោងដែលទេវតាចុះមកត្រូវជួបប្រជុំក្រុមគ្រួសារដើម្បីថ្វាយបង្គំព្រះនមស្សការព្រះរតនៈត្រ័យសមាទានសីល ហើយតាំងចិត្តឱ្យបានស្អាតបរិសុទ្ធជ្រះស្រឡះនូវមន្ទិលទាំងពួងតម្កល់ចិត្តរំពឹងគិតទៅលើព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃជាទីពឹង រហូតចប់ពិធីទទួលទេវតា ។

នៅក្នុងមហាសង្ក្រាន្តមានគណនាតាំងពីទឹកភ្លៀង ពីផលដំណាំ ការធ្វើស្រែចំការ និងមានតម្រាប្រចាំថ្ងៃ និងព្យាករណ៍ពីជោគជតារាសីតាមថ្ងៃ-ខែ-ឆ្នាំកំណើតផងដែរ ។

ចំពោះការគណនាអំពីទឹកភ្លៀងសម្រាប់ឆ្នាំថ្មីនេះទំនាយថា នឹងមាននាគ៥មកបង្អុរភ្លៀង ៤០០មេ ចែកមកឱ្យចក្រវាល១៦០មេ ព្រហ៊មពាន្ត២០មេ មហាសមុទ្រ៨០មេ និងចែកមកជម្ពូទ្វីបឋានកណ្តាលមនុស្សលោកយើងចំនួន៤០មេ ។ ដើមឆ្នាំភ្លៀងល្អ កណ្តាលឆ្នាំភ្លៀងល្អ និងនៅចុងឆ្នាំភ្លៀងតិច ។ ដោយសារតែទឹកភ្លៀងក្នុងជម្ពូទ្វីបមាន៤០មេ ជំនន់ទន្លេ និងទឹកភ្លៀងមានច្រើនឆ្នាំនេះមានក្នុងកម្រិត១៦លើ ១៦ គឺមានសំណល់សូន្យធ្វើឱ្យទឹកទន្លេមានច្រើនជាងឆ្នាំកន្លងទៅ(ទឹកធំណាស់) ។ រីឯផលដំណាំវិញ ឆ្នាំនេះត្រូវចំកេណ្ឌ២ មានឈ្មោះថា វិបត្ត **ទំនាយថា** 8 ស្រូវសំណាបស្រែចំការនឹងកើត មានកិមិជាតិ (ដង្កូវ, ក្រា, ដង្កូវនាង, មេអំបៅ សត្វល្អិត) ស៊ីបំផ្លាញផល្លានុផល ផលដំណាំបាន តែពាក់កណ្តាលខូចខាតអស់ពាក់កណ្តាល ។ ស្រុកទេសនឹងកើតកល្លិយុគនិរាស្ត្រប្រាសចាកចោលគ្នាច្រើនលើកច្រើនសារ ។ ចំណែកឯកេណ្ឌព្រះអាទិត្យឆ្នាំនេះ ព្រះអាទិត្យធ្វើដំណើរជិះ រាជសីហ៍ **ទំនាយថា** 8 ជាឆ្នាំស្រូវល្អមានតម្លៃថោក ។ នៅក្នុងថ្ងៃមហាសង្ក្រាន្តនោះ និងមានមនុស្សសម្លាប់គ្នា កើតមានសឹកសង្គ្រាមនៅ ស្រុកនាមកណ្តុរ និងនាមដំរី ។



អំពីទំនាយថ្ងៃតាមសង្ក្រាន្តវិញ ចូលឆ្នាំថ្ងៃទី១ចំថ្ងៃចន្ទ ជាថ្ងៃដែលទំនាយថា ឆ្នាំនេះនឹងចាញ់ ឯសេនាបតីជំទាវ ខុនណាង ទាំងឡាយចាញ់ មានន័យថា អន់ខូចបុណ្យស័ក្តិអន់រាសី មានវិបត្តិ មានភ្លៀងច្រើនក្នុងដើមឆ្នាំ ស្រូវអង្ករល្អណាស់ តែមនុស្សជួបផលលំបាកឱ្យក្រែងប្រយ័ត្នក្សត្រ និងមន្ត្រីជំទាវធ្វើអាក្រក់ធ្វើបាប និងកើតការតស៊ូរើបម្រះមនុស្សទូទៅនឹងកើតជំងឺតម្កាត់ច្រើន ។

**ទំនាយថ្ងៃវិនបត :** ថ្ងៃកណ្តាលត្រូវនឹងថ្ងៃអង្គារ ទំនាយថា : ឆ្នាំនេះស្លាម្លូរត្រីសាច់មានតម្លៃខ្ពស់ អាមាត្យមន្ត្រីនិងខូចបុណ្យស័ក្តិ ឬត្រូវក្តៅក្រហាយចិត្តជាច្រើន ។

**ទំនាយថ្ងៃឡើងស័ក្តិ :** ថ្ងៃចុងក្រោយត្រូវនឹងថ្ងៃពុធ ទំនាយថា : ឆ្នាំនេះរាជបណ្ឌិតបុរាហិតអាចារ្យហោរាចារ្យ និងមានសេចក្តីសុខសាន្តសម្រាន្តជាអណោក ប៉ុន្តែនិងមានដង្កូវ ក្រា ស៊ីស្រូវបំផ្លាញដំណាំ ។

ឆ្នាំនេះទេពធីតាជ្រើសរើស តេលំ(ប្រេង) ជាភក្សាហារ ទោះបីជាប្រេងប្រភេទណាក៏ដោយ ។ ប្រេងទាំងឡាយសព្វថ្ងៃនេះមានតម្លៃថ្លៃ តែយ៉ាងណាក៏ជាភក្សាហាររបស់ទេពធិតា **សម្តែងថា** 8 ប្រេងគ្រប់ប្រភេទនឹងមានតម្លៃខ្ពស់ទ្វេឡើង ។ បើរដ្ឋព្រងើយកន្តើយ ធ្វេសប្រហែស មិនយកចិត្តទុកដាក់ ការប្រើប្រាស់ខ្វះខាយនោះប្រជាជនជាអ្នកប្រើប្រាស់ប្រេងនឹងកើតមានសេចក្តីក្តៅក្រហាយយ៉ាងខ្លាំង ព្រោះតាមធម្មតាប្រេងថ្លៃស្រាប់ទៅហើយ ហើយឆ្នាំនេះនឹងមានតម្លៃថ្លៃឡើងជារឿយៗ។ បើប្រេងជាភក្សាហាររបស់ទេពធិតាផងនោះ ប្រេងក៏នឹងថ្លៃឡើងខ្លាំង ព្រោះបែងចែកប្រើទាំងមនុស្សទាំងទេវតា ។

ឆ្នាំនេះនាងទេពធីតាមានអាវុធព្រះហស្តស្តាំ **ព្រះខ័ន្ធ** ឯនៅព្រហស្តខាងឆ្វេងជា **ឈើច្រត់** បើពិនិត្យមើលទៅលើអាវុធទាំងពីរជាប្រភេទអាវុធដែលប្រើប្រាស់ក្នុងរយៈជិតៗ ជារយៈប្រផិតជិតគ្នាយ៉ាងខ្លាំង មិនមែនជាអាវុធខ្លាំងក្លាអាក្រក់ធ្ងន់ធ្ងរ រហ័សរហួន ជាអាវុធដែលទុកសម្រាប់ការពារខ្លួន មិនមែនទុកដើម្បីរុករានឈ្លានពាននរណាឡើយ។ នេះសបញ្ជាក់ឱ្យឃើញថា ប្រទេសជាតិមិនអាចមានការប្រើប្រាស់អាវុធធុនធំ រថក្រោះ រថពាសដែក ឬអាចនឹងមានការចល័តអាវុធចុះឡើង ឬថាអាចនឹងមានសង្គ្រាមប្រហារជីវិតគ្នាក៏ទេដែរ ។ គឺក្នុងឆ្នាំនេះអាចនឹងមានសេចក្តីស្ងប់សុខសាន្ត ដូចជាឆ្នាំកន្លងទៅដូច្នោះដែរ ។

ឆ្នាំនេះទេពធីតាជ្រើសរើសយកខ្លាជាពាហនៈ ខ្លាជាសត្វព្រៃមួយប្រភេទដែលកាចសហាវខ្លាំង ខ្លាក៏ជាសត្វដែលមានអំណាចខ្លាំងនៅក្នុងព្រៃបន្ទាប់ពីតោ។ ការប្រើខ្លាជាពាហនៈ ក៏ដើម្បីគំរាមកំហែងសត្រូវ មនុស្សអាក្រក់ ជនពាល **អាចសម្តែងន័យថា :** នៅក្នុងឆ្នាំនេះគឺជារឿងល្អសម្រាប់ប្រទេសជាតិ ជាពិសេសផ្នែកកសិកម្ម(រុក្ខាប្រម៉ាញ់ និងនេសាទ) អាចនឹងមានការការពារបានយ៉ាងប្រពៃមានច្បាប់ទម្លាប់នឹងការអនុវត្តច្បាប់បានល្អប្រសើរ ។ ចំណុចទី២ទេពធីតាគង់ឈរបើកព្រះនេត្រនៅលើខ្នងខ្លា មានន័យថា គឺចង់បង្ហាញពីភាពសង្ហារស្រស់ឆើតឆាយគ្មានភ័យខ្លាចគ្មានព្រួយបារម្ភ គ្មានភាពក្តីកង្វល់អ្វីឡើយ ។ នៅក្នុងឆ្នាំនេះមិនគួរមានហេតុការណ៍អាក្រក់ឃោរឃៅដូចដែលមនុស្សជាច្រើនគិតនោះឡើយ ។ ប្រទេសជាតិ ព្រះមហាក្សត្រ មន្ត្រីរាជការ គ្រប់តំណែងប្រជាពលរដ្ឋគ្រប់រូបជួបតែសេចក្តីសុខក្សេមក្សាន្តជាយោភាព ៕

តមកពីទំព័រ ៨
## រដ្ឋាភិបាល ហ៊ុន សែន...

ការកម្ចាត់ជម្ងឺគ្រុនចាញ់ និងជម្ងឺអេដស៍នៅកម្ពុជា ។ លោកបន្តថា អង្គភាពនេះ បានបង្ខំឱ្យមន្ត្រីដែលជាប់ពាក់ព័ន្ធសងប្រាក់ទៅឱ្យមូលនិធិសកលលោកវិញ ហើយដំណើរការសងប្រាក់ក៏ជិតរួចរាល់ហើយដែរ ។

នេះបើតាមលោក ឱម យ៉ិនទៀង ពួកអស់នេះ ពុករលួយមែនតែដោយសារតែគុណសម្បត្តិរបស់ក្រសួងសុខាភិបាលបានជាលោកឱ្យមន្ត្រីអស់នេះសងតែប្រាក់ទៅវិញ ។

**លោក ឱម យ៉ិនទៀង ថា :** វាមិនមានភស្តុតាងទេ ជាការសន្និដ្ឋានការសន្មត់មែនតែយើងទទួលខុសត្រូវបង្ខំឱ្យសាមីខ្លួនធ្វើការសងមកដល់ពេលនេះ មន្ត្រីខាងអេដស៍សងគ្រប់ចំនួនហើយ ។ មន្ត្រីខាងគ្រុនចាញ់សងបានមួយចំនួនដែរ ហើយគេសងបីជំហានតែឥឡូវសងបានពីរជំហានហើយ ។

ការនិយាយ ឬការសន្មត់របស់លោក ឱម យ៉ិនទៀង នេះគួរឱ្យខ្មែរទាំងអស់គ្នាខ្មាស់ចំពោះមតិអន្តរជាតិដោយមនុស្សដូចលោក ឱម យ៉ិនទៀង ជាអ្នកតំណាងស្ថាប័នមួយដែលសហគមន៍អន្តរជាតិសង្ឃឹមថានឹងមានដំណើរត្រឹមត្រូវ ដើម្បីការអភិវឌ្ឍន៍ និងយុត្តិធម៌សង្គម ។ តែមិនយ៉ាងដូច្នេះ ទេលោក ឱម យ៉ិនទៀង យល់ថា ឯកសាររបស់មូលនិធិសកលចំនួនជាង២០០ទំព័រ គឺមិនមានភស្តុតាង និងជាការសន្និដ្ឋានការសន្មត់ទេ ។ ឯកសារអស់នេះមានទាំងឈ្មោះអ្នកដែលទាក់ទងទទួលលុយចំនួនលុយធានាគារដែលទទួលលុយលេខគណនីព្រមទាំងថ្ងៃខែ និងអ្នកបញ្ជូនលុយទៅទៀតផង ។ ឯកសារអស់នេះទំនាក់ទំនងតាម e-mail ដែលមានអាសន្នដ្ឋាន និងឈ្មោះ e-mail ។ បើប៉ុណ្ណឹងទៅហើយលោក ឱម យ៉ិនទៀង នៅតែថា ឯកសារអស់នេះមិនមានភស្តុតាង និងជាការសន្និដ្ឋានការសន្មត់ទៅវិញ ។ តែលោកបង្ខំឱ្យមន្ត្រីដែលជាប់ពាក់ព័ន្ធសងប្រាក់ទៅឱ្យមូលនិធិសកលលោកវិញ ។ នេះបានសេចក្តីយ៉ាងដូចម្តេច? បើគ្មានការពុករលួយទេ ហេតុអ្វីលោក ឱម យ៉ិនទៀង បង្ខំឱ្យមន្ត្រីដែលជាប់ពាក់ព័ន្ធនោះ ត្រូវសងប្រាក់ទៅគេវិញ ។ តើនៅក្នុងលក្ខណៈយ៉ាងដូចម្តេច? តើមន្ត្រីដែលជាប់ពាក់ព័ន្ធនោះបានលុយពីណារាប់ម៉ឺនដុល្លាសងគេបើប្រសិនណាមិនមែនពុករលួយនោះ? បើគិតពីប្រាក់ខែពួកមន្ត្រីអស់នេះ នឹងលុយសំណងតើប៉ុន្មានឆ្នាំទៅ ទើបអាចសងគេគ្រប់ចំនួននោះ? ឬមួយបានលុយពីប្រភពណាផ្សេងទៀត ។

កាលពីថ្ងៃទី៩ខែធ្នូលោកហ៊ុនសែនបានប្រកាសប្តេជ្ញាចិត្តលុបបំបាត់អំពើពុករលួយ និងជម្រុញឱ្យមន្ត្រីក្រោមឱវាទចូលរួមប្រយុទ្ធប្រឆាំងអំពើពុករលួយ ។ ជាងនេះទៅទៀតលោកបានជម្រុញឱ្យការប្រយុទ្ធប្រឆាំងអំពើពុករលួយមាននៅតាមសាលាទៀតផង ។ លោក ហ៊ុន សែន ដែលស្រែកជំទាលថានឹងបំបាត់អំពើពុករលួយនោះត្រូវតែចោទសួរ និងធ្វើការអង្កេតមើលតើការប្រកាសរបស់លោក ឱម យ៉ិនទៀង ជាការត្រឹមត្រូវ និងពិត ឬទេ?

កាលពីថ្ងៃទី១៨ ខែមិនា អង្គភាពប្រឆាំងអំពើពុករលួយបានចាប់ខ្លួនអធិការដ្ឋាននគរបាលស្រុកបន្ទាយមាសខេត្តកំពត និងគូកនម្នាក់ទៀតពីបទពុករលួយក្នុងរង្វង់ទឹកប្រាក់ជាង២០០លានរៀល (៥០០០០ដុល្លា) ។ អធិការម្នាក់នោះក៏ត្រូវរកឃើញថា បានទិញឈ្មោះទិញសក្តិផងដែរ ។

លោក ឱម យ៉ិនទៀង ចាត់ទុកថា ករណីទិញឋានន្តរសក្តិទិញឈ្មោះនេះ ជាអំពើពុករលួយ ។ ប៉ុន្តែគេមិនទាន់ដឹងថា តើអ្នកដែលលក់សក្តិឱ្យលោកអធិការនោះនឹងជាប់ទោសដែរ ឬយ៉ាងណានោះទេ? ៕

**លិម គិមយ៉ា**

*បេក្ខជនតំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិនៅខេត្តកំពង់ធំ*

Continued from Page 07
## Reduce - Reuse - Recycle

sent 4,200 tons of yard waste to composting operations, saving the City over $295,000 in disposal cost. The U.S. EPA estimates that 14.6 % of residential waste that ends up in landfills and incinerators is made up of biodegradable organic material. It is preferred that you use paper Lawn & Leaf bags (available at local stores such as Home Depot, Wal-Mart, Market Basket, True Value and ACE Hardware stores, etc.). However, grass, leaves and small brush can be placed in labeled barrels. Barrels must be clearly marked with the orange YARD WASTE stickers and may not exceed thirty-five pounds. YARD WASTE stickers are available at City Hall (Rm 34), the Department of Public Works (1365 Middlesex St), or at the Senior Center (Broadway at Fletcher. Never place yard waste in plastic bags (or in the regular trash) and do not include debris such as flowerpots, rocks, large limbs or mix with other types of trash. When preparing cut brush for collection, keep the following guidelines in mind: bundles should be no longer than three feet in length, tied with non-metallic twine, no single item within the bundle should be thicker than three inches in diameter and the entire bundle should not weigh more than thirty-five pounds. Contaminated containers risk being left at the curb. Kindly do not place paper bags or barrels out prior to your trash day; we would like to keep sidewalks open for pedestrians.

Another way to reduce the amount of waste hauled out of the City is to consider home composting. Home composting is the least expensive, most rewarding and environmentally sound method of managing the organic component of our residential waste stream. Composting is a simple process available to everyone, with or without a backyard. Yard wastes such as leaves and grass clippings make excellent compost. Fruit and vegetable scraps, plus food wastes such as coffee grounds, tea bags, and eggs shells and even shredded paper can all be composted. To keep animals and odors out of your compost pile, do not add meat, bones, fatty food wastes (such as cheese, grease and oils), pet droppings and cat litter, dairy products or diseased plants. Do not add invasive weeds or weeds that have gone to seed, to the pile. With these elements in mind, you can convert your organic wastes into resources by "turning your spoils to soil". To make it easier for residents to compost kitchen scraps and yard waste, the Mass DEP makes home composting bins available to cities and towns each year through its recycling equipment grant program. The bins, which retail for between $60 and $100, are available to the residents of communities that receive grants for a subsidized price of $65 each. To obtain a compost bin call the contact person listed for your community.

**YARD WASTE**
**COLLECTION**
**begins on "*your first neighborhood trash day*" of April**

NOTE:
- Leaves, grass clippings and brush, must be placed in brown paper 'Lawn & Leaf' bags or in a clearly labeled barrel.
- 'Yard Waste' stickers are available at the SW&R Office, DPW, Senior Center or City Hall (Rm 34).
- **No plastic bags** will be accepted.
- Bags/barrels may not exceed 35 lbs

Continued from Page 09
## Youth take on substance...

organize Lowell residents to prevent and reduce substance abuse, with a particular focus on vulnerable teens."

Topics included all different forms of substance abuse from discussions on underage drinking to the use of drugs. Peter Saing, health educator for the Lowell Public Health Department, focused






his outreach on the dangers of prescription drugs and opioid abuse. "A lot of people don't realize that opioid abuse is a major problem among young people today. There is a feeling that because it is prescribed by a doctor it is safe, when in reality, it has many of the same characteristics as illicit drugs." Saing also talked about the importance of properly disposing unwanted or expired medication at kiosks placed at local police stations throughout the region.

Among those in attendance at the event were the new police superintendent William Taylor and Lowell Community Health Center CEO, Dorcas Grigg-Saito. All told, over a hundred people attended the event, which was free and open to the public. The event also featured youth-produced PSAs, highlights of Task Force accomplishments, and a performance by ADAM Project Dance Crew.

Lowell Community Health Center Teen BLOCK's mission is to support the healthy development of young people and empower them to become leaders in the community by working to reduce risky behaviors that lead to teen pregnancy, HIV/STIs, substance use and violence in Lowell.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ច្បាប់ចេញផ្សាយថ្ងៃ អង្គារ៍ ទី០១ ខែមេសា ឆ្នាំ២០១៤

# បន្ទាប់ពីការហែក្បួនគ្មានការគ្រោងទុកបក្សប្រឆាំង រៀបចំសមាជនៅទីស្នាក់ការខ្លួន

By Mech Dara and Alex Willemyns | March 31, 2014

ការហែក្បួនដោយមិនបានប្រកាសជាមុនក្នុងរាជធានីភ្នំពេញកាលពីម្សិលមិញត្រូវបានធ្វើឡើងនេះ លោក កឹម សុខា បានប្រាប់អ្នកចូលរួមយ៉ាងច្រើនថា អ្នកដែលបានបាត់បង់ដោយការគប់គ្រាប់បែក និងនៅតែបន្តជាកម្លាំងចិត្តសម្រាប់គណបក្ស



ដើម្បីជំនួសការជួបជុំជាសាធារណៈមួយដែលគណបក្សប្រឆាំងបានគ្រោងធ្វើឡើង ប៉ុន្តែត្រូវរដ្ឋាភិបាលហាមឃាត់។ ការហែក្បួនដែលមានអ្នកគាំទ្រចូលរួមប្រហែល១.០០០នាក់នេះ ត្រូវបានដឹកនាំដោយលោក សម រង្ស៊ី និងលោក កឹម សុខា ពីកន្លែងធ្វើពិធីមួយនៅសួនមុខវត្តបទុមទៅកាន់ទីស្នាក់ការកណ្តាលរបស់ខ្លួននៅក្នុងខណ្ឌមានជ័យ។

លោក សម រង្ស៊ី និងលោក កឹម សុខា ដឹកនាំអ្នកគាំទ្រឆ្លងកាត់ស្ពានអាកាសក្បាលថ្នល់កាលពីម្សិលមិញអំឡុងការហែក្បួនពីសួនមុខវត្តបទុមទៅកាន់ទីស្នាក់ការកណ្តាលគណបក្សសង្គ្រោះជាតិនៅខណ្ឌមានជ័យ រាជធានីភ្នំពេញ។ ស៊ីវចាន់ណា ព្រឹត្តិការណ៍នេះ គឺជាព្រឹត្តិការណ៍ហែក្បួនដំបូងរបស់គណបក្សប្រឆាំងចាប់តាំងពីរដ្ឋាភិបាលបានប្រើហិង្សាដើម្បីបោសសម្អាតក្រុមអ្នកតវ៉ាពីទីលានប្រជាធិបតេយ្យកាលពីខែមករា ហើយបន្ទាប់មកបានចេញបម្រាមហាមមិនឱ្យមានការជួបជុំជាសាធារណៈនោះ។ ការហែក្បួននេះត្រូវបានធ្វើឡើង បន្ទាប់ពីពិធីរំឭកវិញ្ញាណក្ខន្ធរយៈពេល៩០នាទី ដល់មនុស្ស១៦នាក់ដែលបានបាត់បង់ជីវិតនៅក្នុងការវាយប្រហារដោយគ្រាប់បែកទៅលើការតវ៉ារបស់គណបក្សប្រឆាំងដែលដឹកនាំដោយលោក សម រង្ស៊ី កាលពីខែមីនា ឆ្នាំ១៩៩៧។

លោក សម រង្ស៊ី និងលោក កឹម សុខា បានទៅដល់សួនមុខវត្តបទុមជាកន្លែងដែលកើតមានការវាយប្រហារដោយគ្រាប់បែកនៅម៉ោងប្រហែល៩និង៤៥នាទីព្រឹក។ មេដឹកនាំទាំងពីរនេះបន្ទាប់មកបានចូលរួមក្នុងពិធីដែលមានរយៈពេលដ៏ខ្លីដោយមានការនិមន្តព្រះសង្ឃប្រហែល៤០អង្គបង្សុកូល។

បន្ទាប់ពីចូលរួមនៅក្នុងពិធីរំឭកវិញ្ញាណក្ខន្ធប្រឆាំង។

លោក កឹម សុខា បានមានប្រសាសន៍ថា "ពួកគាត់បានបន្សល់ទុកឱ្យយើងនូវកម្លាំងចិត្តដ៏រឹងមាំដើម្បីបន្តការតវ៉ាដោយសន្តិវិធីនៅក្នុងការប្រឆាំងជនផ្តាច់ការដែលបាញ់សម្លាប់ពលរដ្ឋរបស់យើង ។ យើងជឿជាក់ថា ថ្ងៃណាមួយឃាតករដែលសម្លាប់បាតុកររបស់យើងនឹងត្រូវបានចាប់ដាក់ពន្ធនាគារ"។

លោក សម រង្ស៊ី បានលើកឡើងថា ជនប្រព្រឹត្តបទល្មើសនៅក្នុងការគប់គ្រាប់បែកដែលនៅតែមានសេរីភាព គឺជាបញ្ហាមួយឆ្លុះបញ្ចាំងឱ្យឃើញពីភាពអយុត្តិធម៌ដែលកើតមានច្រើននៅក្នុងប្រព័ន្ធច្បាប់របស់ប្រទេសកម្ពុជា។ លោកក៏បានយកឱកាសនេះរិះគន់អំពីនិទណ្ឌភាពដែលត្រូវបានផ្តល់ទៅឱ្យជនដែលលោកបានលើកឡើងថាមានអំណាច ឬក៏បានចូលដៃជាមួយខ្មែរក្រហមផងដែរ។

លោក សម រង្ស៊ី បានចាត់ទុកលោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសជាឧក្រិដ្ឋជនម្នាក់ក្នុងចំណោមឧក្រិដ្ឋជនមួយចំនួនដែលលោកបានលើកឡើងថា ឥឡូវត្រូវបានការពារមិនឱ្យផ្តល់ភ័ស្តុតាងនៅចំពោះមុខតុលាការខ្មែរក្រហម។

លោកបានមានប្រសាសន៍ដោយសំដៅទៅលើលោក ហោ ណាំហុង ដែលបានបដិសេធយ៉ាងដាច់អហង្ការ ចំពោះការចោទប្រកាន់ដែលចោទថា លោកបានចូលដៃជាមួយឆ្មាំគុក ខណៈលោកត្រូវ ប៉ុល ពត ចាប់ដាក់គុកថា "នៅក្នុងប្រទេសផ្សេងៗនៅពេលតុលាការកោះហៅយើង ហើយយើងមិនទៅបង្ហាញខ្លួនយើងនឹងត្រូវចាប់ដាក់ពន្ធនាគារ។ ប៉ុន្តែនៅក្នុងប្រទេសរបស់យើងគាត់មិនបានទៅបង្ហាញខ្លួនដោយសារតែចៅហ្វាយរបស់គាត់ការពារគាត់"។ លោក សម រង្ស៊ី ក៏បានលើកឡើងពីលោកឧបនាយករដ្ឋមន្ត្រី គាត ឈន់ ដែលមិនបានបង្ហាញខ្លួននៅសាលាក្តីខ្មែរក្រហមពេលកោះហៅផងដែរ។

លោក ហោ ណាំហុង និងលោក គាត ឈន់ ដែលបានចុះចូលជាមួយរដ្ឋាភិបាលក្រុងភ្នំពេញពីចលនាតស៊ូខ្មែរក្រហមកាលពីឆ្នាំ១៩៨៤ គឺជាអ្នកដែលស្ថិតនៅក្នុងចំណោមសមាជិកជាន់ខ្ពស់ទាំង៦រូបមកពីគណបក្សប្រជាជនកម្ពុជាដែលមិនគោរពតាមដីកាកោះរបស់សាលាក្តីខ្មែរក្រហមដើម្បីឱ្យមកផ្តល់ភ័ស្តុតាងដល់ចៅក្រមស៊ើបអង្កេតកាលពីឆ្នាំ២០០៩។

លោក សម រង្ស៊ី និងលោក កឹម សុខា បន្ទាប់មកបានចាប់ផ្តើមដឹកនាំអ្នកចូលរួមទាំងអស់ហែក្បួនតាមមហាវិថីសុធារស។ លោក សម រង្ស៊ី បានប្រកាសមុនពេលនោះថា សមាជប្រជាពលរដ្ឋនៅពេលរសៀលដែលដំបូងឡើយ គ្រោងធ្វើនៅទីលានប្រជាធិបតេយ្យ ហើយក្រោយមកប្តូរមកធ្វើនៅសួនមុខវត្តបទុម បន្ទាប់ពីពិធីរំឭកវិញ្ញាណក្ខន្ធ នោះបានហែក្បួនទៅកាន់ទីស្នាក់ការកណ្តាលរបស់ខ្លួននៅក្នុងខណ្ឌមានជ័យ។

ដោយធ្វើការហែក្បួនតាមបណ្តោយមហាវិថីព្រះនរោត្តម រួចបន្តទៅកាន់ផ្លូវជាតិលេខ២ អ្នកគាំទ្រប្រមាណ១.០០០នាក់បានស្រែកម្តងទៀតនូវពាក្យថា "ហ៊ុន សែន អើយចុះចេញទៅ" ជាពាក្យដែលត្រូវបានស្រែកម្តងហើយម្តងទៀត នៅក្នុងការហែក្បួនរបស់គណបក្សសង្គ្រោះជាតិ មុនពេលការបង្ក្រាបដ៏ហិង្សាកាលពីខែមករា។

នៅពេលទៅដល់ទីស្នាក់ការកណ្តាលរបស់គណបក្សខ្លួននៅសង្កាត់ចាក់អង្រែលើក្រោយថ្ងៃត្រង់អ្នកតវ៉ារបស់គណបក្សសង្គ្រោះជាតិបានធ្វើឱ្យចំណែកផ្លូវផ្នែកខាងជើងត្រូវកកស្ទះ។ លោក សម រង្ស៊ី បានប្រកាសជំទាស់ទៅនឹងបម្រាមហាមមិនឱ្យមានកា រជួបជុំទាក់ទិននឹងរឿងនយោបាយនៅទីលានប្រជាធិបតេយ្យដែលបានបង្ខំឱ្យគណបក្សត្រូវប្តូរទិសដៅនៃការជួបជុំរបស់ខ្លួននៅទីស្នាក់ការឯកជនរបស់គណបក្សសង្គ្រោះជាតិវិញនោះ។

លោក សម រង្ស៊ី ដែលរិះគន់ច្បាប់អាជ្ញាសិកចេញដោយគណបក្សប្រជាជនកម្ពុជាកាលពីខែមករាថា "ឥឡូវនេះ ទីលានប្រជាធិបតេយ្យត្រូវបានគេហៅថា ជាទីលានដែលមានការហាមឃាត់"។

បន្ទាប់ពីការថ្លែងសុន្ទរកថាដ៏យូររបស់លោក សម រង្ស៊ី និងលោក កឹម សុខា ច្រកទ្វារទីស្នាក់ការត្រូវបានបើករយៈពេលកន្លះម៉ោងសម្រាប់អ្នកគាំទ្រដែលត្រូវបានអញ្ជើញឱ្យមកចូលរួមនៅក្នុង "ពិធីជួបជុំគ្នា" តាមការគ្រោងទុក។ អំឡុងពេលសមាជប្រជាពលរដ្ឋលោក គ្រីស្ទីន មីលណេ (Christine Milne) ជាសមាជិកព្រឹទ្ធសភា និងជាមេដឹកនាំគណបក្សបៃតង **តទៅទំព័រទី ២៥**

# រដ្ឋាភិបាលលើកឡើងថា ការរឹបអូសគ្រឿងញៀនមានការកើនឡើងនៅក្នុងឆ្នាំ២០១៣ ធៀបនឹងឆ្នាំ២០១២

By Khy Sovuthy | March 25, 2014

យោងតាមរបាយការណ៍ប្រចាំឆ្នាំរបស់អាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀនដែលចេញកាលពីម្សិលមិញបានឱ្យដឹងថា ការរឹបអូសគ្រឿងញៀនមានការកើនឡើងកាលពីឆ្នាំមុន ខណៈការចាប់ខ្លួនពាក់ព័ន្ធនឹងការជួញដូរគ្រឿងញៀនក៏មានការកើនឡើងដែរ។

កាលពីឆ្នាំ២០១២ ថ្នាំញៀនប្រភេទមេតំហ្វេតាមីន គឺជាថ្នាំញៀនមួយប្រភេទដែលគេរឹបអូសបានច្រើនជាងគេបំផុត។ យោងតាមរបាយការណ៍របស់អាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀនបានឱ្យដឹងថា នគរបាលរឹបអូសបានថ្នាំមេតំហ្វេតាមីនគ្រាប់ទម្ងន់១៧.៣ គីឡូក្រាមកាលពីឆ្នាំមុន ពោលគឺកើនឡើងពីទម្ងន់១០.៦គីឡូក្រាមដែលនគរបាលរឹបអូសបានកាលពីឆ្នាំ២០១២។ រីឯថ្នាំញៀនមេតំហ្វេតាមីនម្សៅវិញត្រូវនគរបាលរឹបអូសបានទម្ងន់ប្រមាណ៣២.៤គីឡូក្រាមកាលពីឆ្នាំមុន បើធៀបនឹងឆ្នាំ២០១២រឹបអូស២៨គីឡូក្រាមនោះ។

ការរឹបអូសថ្នាំញៀនប្រភេទហេរ៉ូអ៊ីន ក៏មានការកើនឡើងខ្ពស់ដែរ ពោលគឺនគរបាលរឹបអូសបានថ្នាំប្រភេទនេះទម្ងន់៣៨.៣ គីឡូក្រាម កាលពីឆ្នាំ២០១៣ ដោយវាកើនឡើងពីត្រឹមតែ៣១៩ក្រាម កាលពីឆ្នាំ២០១២។ ចំណែកឯការរឹបអូសកញ្ឆាវិញក៏មានការកើនឡើងយ៉ាងខ្លាំងដែរ ពោលគឺកើនឡើងពី២.៤គីឡូក្រាមក្នុងឆ្នាំ២០១២ដល់១៦៨.៥គីឡូក្រាម កាលពីឆ្នាំមុន។

ដោយឡែកការរឹបអូសថ្នាំញៀនប្រភេទកូកាអ៊ីនវិញមានការធ្លាក់ចុះដោយធ្លាក់ពី៤១គីឡូក្រាមកាលពីឆ្នាំ២០១២ មកនៅត្រឹមប្រមាណ១២.៨គីឡូក្រាម កាលពីឆ្នាំ២០១៣ ខណៈការរឹបអូសថ្នាំញៀនប្រភេទកេតាមីនមិនមានការប្រែប្រួលឡើយពោលគឺមានទម្ងន់១គីឡូក្រាមដូចគ្នាសម្រាប់ឆ្នាំទាំងពីរ។

របាយការណ៍នេះបានឱ្យដឹងបន្តថា នគរបាលនិងកងរាជអាវុធហត្ថចាប់ខ្លួនមនុស្សបានចំនួន១.៨៣០នាក់នៅក្នុងការបង្ក្រាបការជួញដូរគ្រឿងញៀនចំនួន៨៨៩ករណីកាលពីឆ្នាំមុន ដោយវាកើនឡើងច្រើនជាងឆ្នាំ២០១២បន្តិច ដែលនគរបាលចាប់ខ្លួនបានមនុស្សចំនួន១.៧៨៨នាក់នៅក្នុងការចុះបង្ក្រាបការជួញដូរគ្រឿងញៀនចំនួន៨១៨ករណី។ **តទៅទំព័រទី ១៩**



មណ្ឌលពុទ្ធសាសនាតំបន់ញូអ៊ីងឡិន
THE BUDDHIST CENTER OF NEW ENGLAND. Inc
252 Public Street, Providence, RI 02905
Telephone (401) 454-4633



# បុណ្យចូលឆ្នាំថ្មី

## សួស្តីឆ្នាំថ្មី ឆ្នាំមមី ឆស័ក ព.ស២៥៥៨ គ.ស២០១៤

ខ្ញុំព្រះករុណាអាត្មាភាព យើងខ្ញុំជាគណៈកម្មការអាចារ្យ និងពុទ្ធបរិស័ទចំណុះជើងវត្ត **មណ្ឌលពុទ្ធសាសនា** បានមូលមតិគ្នាជាឯកច្ឆ័ន្ទប្រារព្ធធ្វើបុណ្យចូលឆ្នាំថ្មី ដែលជាបុណ្យប្រពៃណីរបស់ជាតិខ្មែរយើង ដែលធ្លាប់មានតាំងពីបុរាណកាលមក ប្រជាពលរដ្ឋខ្មែរយើងកំណត់សំគាល់ថា ជាបុណ្យជាតិ និងបុណ្យព្រះពុទ្ធសាសនា បុណ្យនេះតែងតែប្រារព្ធឡើងនៅខែចេត្រទៅតាមមហាសង្ក្រាន្តខ្មែរ មានចំនួនបីថ្ងៃគឺ៖ ថ្ងៃទីមួយហៅថា ចូលឆ្នាំថ្មី ថ្ងៃទី២ហៅថា វារៈវ័នបត ថ្ងៃទី៣ហៅថា វារៈឡើងស័ក។ នៅក្នុងឆ្នាំថ្មីនេះ ទេវតាព្រះនាម **គោរាគៈទេវី** ជាបុត្រីទី២ នៃកបិលមហាព្រហ្ម នឹងយាងចុះមកថែរក្សាមនុស្សលោកក្នុងចក្រវាឡយើងនេះ។

អាស្រ័យហេតុនេះ ខ្ញុំព្រះករុណាអាត្មាភាព យើងខ្ញុំទាំងអស់គ្នា សូមចំរើនពរនិងគោរព អញ្ជើញ លោក អ្នកស្រីនិងពុទ្ធបរិស័ទគ្រប់ទិស មេត្តាអញ្ជើញចូលរួមកម្មវិធីបុណ្យចូលឆ្នាំថ្មីឲ្យបានកុះករ។

*Happy Cambodian New Year Celebration*
*The year of the horse, The Buddhist Era (B.E) 2558 A.B 2014*

**We are Board of Directors of Buddhist Center of New England, cordially invites you, your family and friends to come and join us in the celebration of our New Year. We wish everyone of great peace, happiness, prosperity throughout the year.**

**Date:** *Friday throughout Sunday, April 18 to 20, 2014.*
**Location: New Place** The Buddhist Center of New England, Inc
252 Public Street, Providence, RI 02905
Tel: 401 454 4633 E.mail: wattbuddhistcenter@hotmail.com

### កម្មវិធីបុណ្យ

**ថ្ងៃសុក្រ ៤កើត ខែចេត្រ ព.ស២៥៥៨ ត្រូវនឹងថ្ងៃទី១៨ ខែមេសា ២០១៤**

- ម៉ោង ៦:៣០នាទីល្ងាច នមស្ការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃ ចំរើនព្រះបរិត្ត ។

**ថ្ងៃសៅរ៍ ៥កើត ខែចេត្រ ព.ស២៥៥៨ ត្រូវនឹងថ្ងៃទី១៩ ខែមេសា ២០១៤**

- ម៉ោង ៩:៣០នាទីព្រឹក នមស្ការព្រះរតនត្រ័យ សមាទានសីល រាប់បាត្រ ជាសង្ឃកុសល។
- ម៉ោង ១១:១០ ដង្គត្តប្រគេនព្រះសង្ឃ ក្រុមឆៃយ៉ាំលេងប្រគុំកំដរកំសាន្ត។
- ម៉ោង ១១:១៥ និមន្តលោកគ្រូ **ធម្មាចារ្យ សាន សុជា** មកពី **ប្រទេសកម្ពុជា** សំដែងធម៌ទេសនា
- ម៉ោង ១២:០០ អញ្ជើញភ្ញៀវ និងពុទ្ធបរិស័ទទទួលភោជនាហារ។
- ម៉ោង ១២:១០ មានតន្ត្រីសម័យ ក្រុមភ្លេង ប៉ៃលិន Band ប្រគុំកំសាន្ត រហូតដល់ម៉ោង ៧:០០ល្ងាច។
- ម៉ោង ៦:៣០ ល្ងាច នមស្ការព្រះរតនត្រ័យ សមាទានសីល និមន្តព្រះសង្ឃ ចំរើនព្រះបរិត្ត
- ម៉ោង ៧:០០ ល្ងាច និមន្តគ្រូ **ធម្មាចារ្យ មួន សុផល** វត្តកំពូលភ្នំឈើកាច់ និង លោកគ្រូ **ពុទ្ធាចារ្យ ពៅ វុទ្ធី** វត្តព្រះពុទ្ធឃោសាចារ្យ ឃាំ ចិនដំដែក មកពី **ប្រទេសកម្ពុជា** សំដែងធម្មទេសនាត្រៃពីរ

**ថ្ងៃអាទិត្យ ៦កើត ខែចេត្រ ព.ស២៥៥៨ ត្រូវនឹងថ្ងៃទី២០ ខែមេសា ២០១៤**

- ម៉ោង ៩:០០នាទីព្រឹក ជួបជុំពុទ្ធបរិស័ទ មានភ្លេងបុរាណ និងក្រុមឆៃយ៉ាំលេងប្រគុំកំដរកំសាន្ត
- ម៉ោង ១០:៣០នាទីព្រឹក នមស្ការព្រះរតនត្រ័យ សមាទានសីល រាប់បាត្រ ជាសង្ឃកុសល។
- ម៉ោង ១១:១០ ដង្គត្តប្រគេនព្រះសង្ឃ ក្រុមឆៃយ៉ាំលេងប្រគុំកំដរកំសាន្ត។
- ម៉ោង ១១:១៥ និមន្តលោកគ្រូ **អគ្គធម្មាចារ្យ បូរ នៅ** វត្ត **មណ្ឌលពុទ្ធសាសនា** សំដែងធម៌ទេសនា
- ម៉ោង ១២:១០ មានតន្ត្រីសម័យ ក្រុមភ្លេង ប៉ៃលិន Band ប្រគុំកំសាន្ត រហូតដល់ម៉ោង ៧:៣០ល្ងាច។
- ម៉ោង ១:០០ ល្ងាច ស្រង់ទឹកព្រះ ស្រង់ទឹកព្រះសង្ឃ និងធ្វើកិច្ចបុព្វការីសោក។

__សូមបញ្ជាក់: [illegible]__

For more information, please contact Ven: Sochettra Yieng 401-454-4633 Mr. Thea Sao 401-263-9057

## HAPPY CAMBODIAN NEW YEAR CELEBRATION THE YEAR OF THE HORSE, BUDDHIST ERA (B.E.) 2558, A.D. 2014

We, the Buddhist Monks, Board of Directors, Wise Men, and Members of The Buddhist Center of New England, Inc., are going to celebrate this Cambodian New Year in April. The Cambodian New Year Observance has traditionally been held more than two thousand years now as a National and Buddhist Celebration. The Cambodian People observe the New Year for three consecutive days. The first day is Maha Songkran, the ending of the year and the beginning of the new one. The second day is Virak Wanabat, the day people contribute charity to the less fortunate ones. The third day is called Virak Loeung Sak, the day people cleanse the Buddha statues and their elders with perfumed water. This New Year the Angel named Kooreak, the second daughter of a Hindu religious leader Kabel Maha Prohm, will invoke her father's head to complete a holy procession around Mount Meru, supposedly to bless the universe. We, therefore, cordially invite you, your families, and friends to come and join us in the celebration of the New Year of the Horse, B.E.2558, A.D. 2014.

### Location

**The Buddhist Center of New England, Inc.,**
**252 Public Street, Providence, RI 02905 Tel:401-454-4633**
**E-mail:wattbuddhistcenter@hotmail.com**

### Program

**Friday, April 18, 2014**

**6:30 p.m.:** Gathering to pay Homage to The Triple Gems; Requesting The Precepts

**Saturday, April 19, 2014:**

**9:30 a.m.:** Pay Homage to The Triple Gems; Requesting The Precepts; Offering of food in Monk's Alms Bowls
**11:10 a.m.:** Offering of food to the Monks; folk dance robam Chhay Yam performance
**11:15 a.m.:** Invite Venerable San Sochea came from Cambodia to preach the Dharma
**12:00 p.m.:** Guests and celebrants' lunch
**12:10 p.m.:** Pailin Live Band performance until 7:00 p.m.; Traditional games played
**6:30 p.m.:** Gathering to Pay Homage to The Triple Gems, Requesting The Precepts, and Chanting The Dharma.
**7:00 p.m.:** Invite two Buddhist Monks, Venerable Moun Sophal and Venerable Pov Vuthy came from Cambodia to preach the Dharma.

**Sunday, April 20, 2014:**

**9:00 a.m.:** Khmer orchestra and folk dance robam Chhay Yam performance
**10:30 a.m.:** Gathering to pay Homage to The Triple Gems; Requesting The Precepts
**11:10 a.m.:** Offering of food to the Monks; folk dance robam Chhay Yam performance
**11:15 a.m.:** Invite Venerable Bora Neou to preach the Dharma
**12:10 p.m.:** Pailin Live Band performance until 7:30 p.m.
**1:00 p.m.:** Cleansing the Buddha statues, monks, and their elders with perfumed water; Traditional games played

**For More information, please contact Venerable Sochettra Yieng 401-454-4633 Cell: 401-588-4999. Or Thea Sao 401-263-9057.**

**សូមអរគុណ!** *Thank you!*

# តើនរណានឹងក្លាយទៅជាប្រធានក្រុងឡូវែល?

តើនរណានឹងក្លាយទៅជាប្រធានក្រុងឡូវែល ប្រធានក្រុងឡូវែល បើនី លីន បានលាលែងពីដំណែង ហើយបញ្ចប់ការងាររបស់គាត់ កាលពីខែមិនាថ្ងៃទី១០កន្លងទៅ។ ដំណែងដ៏សំខាន់នេះនៅទំនេរដោយមិនទាន់ជ្រើសរើសអ្នកមកជំនួសថ្មីមិនទាន់ៈបាន។ គេនៅចាំបានថា នៅពេលដែល បើនី លីន ចូលមកគ្រប់គ្រងរដ្ឋបាលក្រុងឡូវែលដំបូង កាលពី៧ឆ្នាំមុនថវិកាក្រុងមានការខ្វះខាតច្រើនលានដុល្លារតែដល់ពេលចេញទៅវិញបានបន្សល់ថវិការជាង២០លានទុកឱ្យអ្នកបន្តដំណែងថ្មី។

**សូមតាមដានការជ្រើសនេះ ជាមួយសេចក្តីរាយការណ៍ រីកឆីត ហាវ ដូចទៅ :**

**១-**ខេវិន ម័រហ្វី បានត្រូវជ្រើសតាំងជាប្រធានថ្មីនៃក្រុងឡូវែល

ដោយៈ រីកឆីត ហាវ

ថ្ងៃចន្ទទី៣១ ខែមិនាឆ្នាំ២០១៤ គណក្រុមប្រឹក្សាសាលាក្រុងឡូវែលបានជ្រើសយកដំណាងរដ្ឋ ខេវិន ម័រហ្វី ជាប្រធានក្រុងឡូវែលថ្មី ដោយការបោះឆ្នោត៨ទល់ និង ១- ខេវិន ម័រហ្វី នឹងចូលផ្តើមធ្វើការនៅពាក់កណ្តាលខែមេសានេះហើយ។ អ្នកបោះឆ្នោតឱ្យមានចៅហ្វាយក្រុង អេលិយ៉ុត ទីប្រឹក្សាក្រុង បែលីនជើ ខេនីឌី ម៉ារទីន មើស៊ីយើ មីឡីណាស៊ូ សាម៉ារាស រ៉ាវខី រីឯម្នាក់ដែលនៅសល់លោកលីហាយ បានបោះឆ្នោតឱ្យ ជច រ៉ាមីរេស ក្រោយមកផ្ទេរសម្លេងឆ្នោតឱ្យ ខេវីន ម័រហ្វី ដើម្បីឱ្យបានសម្លេងឯកច្ឆន្ទ ។

ម័រហ្វី ដំណាងឱ្យតំបន់ ហាយឡិន និង អេគើ កាលពីពេលបោះឆ្នោតជាតំណាងរដ្ឋចាប់ពីឆ្នាំ២០០៧ទៅហើយមុនពេលនោះលោកបានធ្វើជាឧបការីក្រុងអស់១៣ឆ្នាំ លោកក៏ធ្លាប់បានបើកការិយាល័យច្បាប់មួយដែរ ឥឡូវតម្រូវឱ្យបិទទ្វារ ពីព្រោះត្រូវមកទទួលដំណែងសាលាក្រុងពេញពេល ។

នៅពេលធ្វើសវនាការ ម័រហ្វី បាននិយាយ-ថា"អាទិភាពរបស់លោកជាប្រធានក្រុងគឺៈ សន្តិសុខសាធាធារណនឹងអភិវឌ្ឍន៍សេដ្ឋកិច្ច ។

**២-**ការជ្រើសរើសប្រធានក្រុង

# Kevin Murphy new Lowell City Manager

**by Richard P. Howe Jr.**

On Monday, March 31, 2014, the Lowell City Council selected State Representative Kevin Murphy as the city's new City Manager by a vote of eight to one. Murphy is expected to begin work by the middle of April. The eight who voted for Murphy were Mayor Elliott and Councilors Belanger, Kennedy, Martin, Mercier, Milinazzo, Samaras and Rourke. Councilor John Leahy voted for George Ramirez but later changed his vote to make Murphy's election unanimous.


Kevin Murphy

Murphy has represented the Highlands and Acre neighborhoods of Lowell in the state legislature since 1997. Prior to that he worked as an Assistant City Solicitor for the city of Lowell for thirteen years. He also has operated his own law practice although he will cease practicing law and serve as City Manager full time.

In his interview, Kevin Murphy said his priorities as City Manager would be public safety and economic development.

តមកពីទំព័រទី ៣ ## ដល់ពេលដែលត្រូវរៀបចំផ្លូវសម្រាប់...

**មូលហេតុទី៣ៈ** ប្រព័ន្ធច្បាប់ដែលមិនបានកំណត់អាណត្តិរបស់មេដឹកនាំ ក៏ជាឱកាសដែលបើកផ្លូវឱ្យអ្នកដឹកនាំតោងអំណាចតាមដែលអាចធ្វើទៅបាន។ ដូច្នេះ នេះគឺជាពេលវេលាសមស្របណាស់ដែលត្រូវព្យាបាល"ជំងឺក្រាញអំណាច" ចេញពីសង្គមខ្មែរ។ កិច្ចការសំខាន់ដែលត្រូវធ្វើចាំបាច់មុនគេ គឺការរៀបចំប្រព័ន្ធដឹកនាំមួយដែលកំណត់អាណត្តិមេដឹកនាំ និងត្រូវធានាថាពួកគេនឹងត្រូវចាកចេញពីអំណាចដោយសុវត្ថិភាពចៀសផុតពីការសងសឹក។ ពិតណាស់ថា ការតាក់តែងច្បាប់មួយសម្រាប់ការពារអតីតមេដឹកនាំកំពូលដែលចាកចេញពីអំណាច គឺជាអាវុធមុខពីរ ហើយវាក៏ហាក់មិនយុត្តិធម៌សម្រាប់មនុស្សទូទៅដែរ។ ម្យ៉ាងទៀត ច្បាប់បែបនេះក៏អាចធ្វើឱ្យមេដឹកនាំបច្ចុប្បន្នរអៀសខ្លួនក្នុងការទទួលយកដែរ ពីព្រោះពួកគេហាក់ទទួលអារម្មណ៍ថា ខ្លួនមានកំហុសទើបត្រូវការច្បាប់ការពារ។ ដូច្នេះ ប្រសិនបើគេឈរតែលើទិដ្ឋភាពច្បាប់ ឬអារម្មណ៍ផ្ទាល់ខ្លួន ច្បាប់នេះមិនអាចចេញរួចទេ។ ប៉ុន្តែបើគេពិនិត្យមើលបរិបទនយោបាយដ៏ស្មុគស្មាញរបស់ប្រទេសកម្ពុជាក្នុងអំឡុងពេលបីបួនទសវត្សរ៍ចុងក្រោយ និងបើយោងតាមស្ថានភាពជាក់ស្តែងគេប្រាកដជាអាចយល់បានថា កម្ពុជាគួរតែមានច្បាប់បែបនេះដែរ។ យ៉ាងហោចណាស់ការចងកំ ឱ្យគិតរឿងអតីតកាលក៏ប្រហែលជាចំណុចសំខាន់មួយដែរ ដើម្បីរៀបចំអាគតប្រទេសជាតិឡើងវិញ។ ទន្ទឹមនឹងនោះដែរ ការផ្លាស់ប្តូរផ្នត់គំនិតមនុស្សខ្មែរក៏ជាកិច្ចការសំខាន់មួយទៀត ។ ជាបឋមគេគួរយល់ថា មុខតំណែងដឹកនាំប្រទេសមិនមែនជាកម្មសិទ្ធិផ្តាច់មុខរបស់អ្នកណាម្នាក់ឡើយ តែវាកម្មសិទ្ធិរបស់ពលរដ្ឋទូទាំងនគរ។ ម្យ៉ាងទៀត ការស្ថិតនៅក្នុងមុខតំណែងយូរពេកកំហុសក៏អាចកើតមានកាន់តែច្រើនដែរទោះជាអ្នកដឹកនាំនោះពូកែប៉ុណ្ណាក៏ដោយ។ ចំណែកឯវប្បធម៌នយោបាយសងសឹកក៏ត្រូវតែបញ្ចប់ដែរ ។ នៅពេលដែលអ្នកដឹកនាំខិតខំបម្រើប្រទេសជាតិ និងប្រជាជនឱ្យបានល្អ និងនៅពេលដែលគំនុំសងសឹកត្រូវបានគាស់រំលើងអ្នកដឹកនាំនឹងចាកចេញពីអំណាចដោយកិត្តិយស ហើយពេលនោះកម្ពុជាក៏មិនចាំបាច់ត្រូវការច្បាប់ការពារអភ័យឯកសិទ្ធិអតីតមេដឹកនាំទៀតដែរ ។ ដូច្នេះការផ្តើមជជែកគ្នាដើម្បីរៀបចំផ្លូវសម្រាប់ឡើង និងសម្រាប់ចុះពីអំណាចរបស់អ្នកនយោបាយ គឺជាពេលវេលាសមស្រប និងជាកិច្ចការសំខាន់ដែលមិនគួរមើលរំលង។ ផ្ទុយទៅវិញការបន្តចង្អុលមុខគ្នាថា អ្នកនេះក្រាញអំណាច ឬអ្នកនោះចង់បានអំណាចបញ្ហានឹងមិនអាចដោះស្រាយបានឡើយ ៕

## តមកទំព័រទី ៣ ដំណើរទៅ"ឡុងប៊ិច"ក្រុងដែលមានខ្មែរ...

ទៅរកសហគមន៍"ខ្មែរអាមេរិកាំង" ដែលជាបងប្អូនបង្កើតនៃទី"ក្រុងភ្នំពេញ"ទៅហើយដែរ ដោយសារយុវជនយុវនារីជំនាន់ក្រោយនឹងក្លាយជាអ្នកកាន់កាប់វាសនាសហគមន៍ដោយខ្លួនឯង ហើយបានរុញច្រានរលកមុនតាមរបៀបថ្មី ដែលពាណិជ្ជកម្មក្នុងក្រុង ឬរោងចក្រក្រៅក្រុង នាំការងារមកឱ្យខ្មែរ"ទាំងចាស់ទាំងថ្មី" ឱ្យមានការងារធ្វើ មានប្រាក់ខែសមរម្យស្មើរគ្រប់គ្នា។ ប្រជាពលរដ្ឋមានជាផ្លូវការណ៍ប្រមាណជា៦ម៉ឺននាក់(តែព័ត៌មានថា មានប្រមាណ១០ម៉ឺននាក់) មានការគាំទ្រពីសមាគមខ្មែរ២ គឺសមាគមខ្មែរទីបអាមេរិក និង សមាគម UCCមានវត្តអារាមធំជាបង្គោលមួយ គឺ"វត្តត្រៃកូដ" នឹងវត្តតូចតាចប្រមាណ៩ទៀត សំរាប់ពលរដ្ឋធ្វើបុណ្យ ។ពីវប្បធម៌"ខ្មែរអាមេរិកាំង"នេះទៅគេពុំទាន់ឃើញមានខ្មែរចូលជាថ្នាក់ដឹកនាំនយោបាយសាលាក្រុង"ឡុងប៊ិច" ឬក៏ថ្នាក់ដឹកនាំជំនឿវត្តអារាមបែបថ្មីនៅឡើយទេ ដោយសារតែទឹកដីធំប្រជាជនក៏ច្រើន ម្លោះហើយខ្មែរចំនួនប្រមាណ១០ម៉ឺននាក់ តំណាងឱ្យពលរដ្ឋតែ"៣ភាគរយ"តែប៉ុណ្ណោះ ខុសគ្នានឹងនៅ"ឡូវែល" ទឹកដីតូចខ្មែរចំនួនតែ៥ម៉ឺននាក់ ជាតំណាងឱ្យសហគមន៍ខ្មែរដល់ទៅ"៣០ភាគរយ" អាចបោះឆ្នោតឱ្យខ្មែរជាប់ឆ្នោតជា"ក្រុមប្រឹក្សាចៅហ្វាយក្រុង"បានយ៉ាងងាយស្រួល ។

នៅរដ្ឋ"ម៉ាសាឈូសែត"យើងនេះ ធ្លាប់មានខ្មែរជាប់ឆ្នោតជា"ក្រុមប្រឹក្សាចៅហ្វាយក្រុង"ដែរ នៅ"ឡូវែល"ធ្លាប់មានលោក អ៊ុង រិទ្ធី បន្ទាប់មកមានលោក វ៉ាស្នា នួន តែនៅ"លីន" មានលោក ហ៊ុង ណេត មានតួនាទីខ្ពង់ខ្ពស់នេះ ជាប់រហូតដល់សព្វថ្ងៃដែលតួនាទីនេះតែមួយ គឺជាមោទនភាពដល់ខ្មែរទាំងមូលនាំសម្លេងដែលធ្លាប់តែស្ងៀមស្ងាត់មក "អាចការពារសុខទុក្ខខ្មែរ" បានច្រើន ។

"ឡុងប៊ិច"គ្រាន់តែជាកោះមួយនៃមហាសមុទ្រ "កាលីហ្វ័រញ៉ា"តែប៉ុណ្ណោះ ហ៊ុំព័ទ្ធដោយសហគមន៍ដទៃឯទៀតជាច្រើន មានជាអាជិសៀម ឥណ្ឌា ចិន យួន ដែលយើងស្គាល់ច្បាស់ជាងគេ មករួមរស់នឹងរីកចំរើនក្នុងសន្តិភាព សមភាព






ក្រោមច្បាប់អាមេរិកាំងតែមួយគ្រប់គ្រងដោយអភិបាលរដ្ឋជាតួឯកភាពយន្តដ៏ល្បីល្បាញម្នាក់ឈ្មោះ "អាកណុល ស្វាកសេណេហ្គ័រ"។ គេហៅ "រដ្ឋកាលីហ្វ័រញ៉ា"ដោយគ្មាននរណាប្រកាន់ឡើយថាជា"រដ្ឋរបស់ជនអន្តោប្រវេសន៍" មានអត្ថន័យណាស់សម្រាប់អ្នកដែលទៅពីក្រៅប្រទេសទៅរស់នៅសហរដ្ឋអាមេរិកនោះ។ ការរស់នៅក្នុងពហុវប្បធម៌នៃគ្រប់ជនជាតិបានធ្វើឱ្យ "កាលីហ្វ័រញ៉ា" រីកចំរើនយ៉ាងខ្លាំងភូមិយួនឈ្មោះហៅថា "លីធីលសាយហ្គង" ពុំមានចន្លោះសម្រាប់ "ក្រុងហាណូយ" ចូលចុះទេ ពពួកយួនដែលត្រូវបានដឹកជញ្ជូនពីខាងត្បូងដោយសារចាញ់សង្គ្រាមយួនខាងជើងកុម្មុយនីស្តបានមករស់ចាក់ឫសនៅ "លីធីលសាយហ្គន"នាទីក្រុង"សានតាអាណា" កាន់តែធំទៅៗ ។

ពួកសៀមក៏មាន"ក្រុងថៃ"របស់គេដែរ ស្ថិតនៅលើមហាវិថី"ហាលីវូដ"ដ៏ល្បីល្បាញជាប់គ្នាក្រុងនៃ"ស្ទូឌីយោ"ផលិតខ្សែភាពយន្តអាមេរិកាំងធំៗ ចេញពីទីនោះមក ។ នៅតាមផ្លូវនោះ មានសិល្បៈករល្បីៗក៏មាននឹងមិនសូវល្បីក៏មកចេញបង្ហាញខ្លួនជាញយមករកទិញឥវ៉ាន់ប្រើប្រាស់ ឬដើរកំសាន្តក្រោមក្រសែភ្នែកតាមគយគន់ពីទេសចរនឹង"កាមេរ៉ា"រស់អ្នកកាសែត "ប៉ាៗរ៉ាតស៊ី"ដែលធ្វើឱ្យមហាវិថី "ហាលីវូត" មានភាពអ៊ូអរមិនចេះដាច់ នាទីប្រជុំនៃហាងពាណិជ្ជកម្មប្រណិតនឹងសួនឧទ្យានដ៏គួរឱ្យគយគន់នៃភូមិករនឹងគេហដ្ឋានតួឯកកុន"ហាលីវូដ-បរិលីហីល" ធ្វើឱ្យអារម្មណ៍យើងភ្លើតភ្លើនមួយរយៈដែរ ។

នាព្រឹកព្រលឹមនៃថ្ងៃពុធយើងបានមកកាន់ព្រលានយន្តហោះនា"កាលីហ្វ័រញ៉ា" នៅចម្ងាយប្រមាណជាង១ម៉ោងពី"ឡុងប៊ិច"ដឹកកក់ក្ដៅនឹកមកដល់ក្រុង"ឡូវែល" ដែលខ្យល់ត្រជាក់ស្រឹបនឹងផ្លូវអមដោយគំនរទឹកកកតែយន្តហោះបាននាំយើងត្រឡប់មកវិញហើយដោយបង្ខំចិត្ត ។យើងប្ដើមចេញដំណើរនៅម៉ោង១០ព្រឹកមកដល់ព្រលានយន្តហោះ"បូស្តុន" នៅម៉ោង៨យប់ គឺជិះយន្តហោះ១០ម៉ោង...តែយើងនៅចាំថា កាលពី១០ថ្ងៃមុនយើងចេញដំណើរពី "បូស្តុន"នៅម៉ោង៧ព្រឹក ទៅដល់"កាលីហ្វ័ញ៉ា" នៅម៉ោង១០ព្រឹក គឺជិះយន្តហោះតែ៣ម៉ោងតែប៉ុណ្ណោះ...នៅលើផ្លូវដដែលសោះ ហេតុអ្វីយន្តហោះដដែលប្រើពេលខុសគ្នាយ៉ាងនេះ គួរឱ្យឆ្ងល់ដែរ? ៕

**ចប់ដោយបរិបូរណ៍**

### CAMBODIA TOWN BOARD AND COUNCIL

**BOARD MEMBERS**

Ambassador Sichan Siv
**Honorary Chair**

Pasin Chanou
**Chair**

Phillip Thong, CPA, MBA
**Honorary Co-Chair**

Mariko Kahn
**Secretary**

Richer San
**1st Vice-Chair**

Edward Tan
**2nd Vice-Chair**

Dan Durke
**Treasurer**

Rosana Chanou

Huoy Lor

Malou Mariano

Dr. Susan Needham

Monorom Neth

Tony Taing
**Assistant Treasurer**

Kim Suor Ngann

Dr. Karen Quintiliani

Sithea San

Tina Thuch

Gloria Topf

Gary Ung

**CAMBODIA TOWN COUNCIL**

| | | |
|---|---|---|
| Evan Braude, Esq. | Krithny Horn | Peter Long |
| Sandy Cajas | Sakphan Keam | Chad Sammeth |
| Sweety Chap | David Kem | Mary Sina |
| William Deth | David Kreng | Heng Ung |
| Alex Dy | Kimthai Kuoch | Sandy VandenBerge |

# ពិធីបុណ្យចូលឆ្នាំខ្មែរ

ឆ្នាំ មមីឆស័ក ព.ស.២៥៥៨ គ.ស. 2014 YEAR OF THE HORSE

## CAMBODIAN NEW YEAR CELEBRATION







## Features:

- Traditional dances
- Traditional games
- Speakers
- Vendors selling food
- Drinks
- Merchandise and info booths
- The 7 Color Days of Khmer Essence Fashion Show.

សូមគោរពអញ្ជើញ**ពលរដ្ឋខ្មែរ**ទាំងអស់មកចូលរួមក្នុងពិធីបុណ្យចូលឆ្នាំខ្មែរ និងរីករាយកំសាន្ត ជាមួយនឹងការប្រគុំតន្ត្រីសម័យ-បុរាណ រាំ ល្បែងប្រជាប្រិយខ្មែរយើង មានដូចជា បោះអង្គុញ បោលឈូង ទាញព្រ័ត វាយក្អម លាក់កន្សែង ..។ល។ នេះក៏ជាឱកាសដ៏ល្អមួយសំរាប់បង្ហាញ អោយ**កូនខ្មែរ**ជំនាន់ក្រោយ បានស្គាល់ពីទំនាមទំលាប់ សិល្បៈ**វប្បធម៌ខ្មែរ** និងរួមគ្នាថែរក្សាអត្តសញ្ញាណជាតិនេះអោយបានគង់វង្ស។

**This event is made possible through the partnership betweeen Clemente Park Committee and Cambodia Town Committee with support from the Royal Honorary Consul of Cambodia.**

**Live Performance by: Blue River Band**

# Saturday Apr-12th-2014

# 12pm - 7pm

**At Roberto Clemente Park (PAILIN PARK)**

**803 Middlesex St. , Lowell, MA**







Designer: B.Ren
rockitrain@gmail.com

Clemente Park Committee

# ចូលឆ្នាំនិយាយពីជំនឿ និងសត្វទាំង១២

និយាយអំពីហោរាទស្សន៍ទាយ គឺមានច្រើនណាស់ស្ទើរតែរាប់មិនអស់ទេ ប៉ុន្តែគ្រូហោរាដែលទស្សន៍ទាយតាមក្បួនគម្ពីរដែលគន់គូរគណនាតាមលក្ខណៈគណិតសាស្ត្រ និងយកជាសាច់ការនោះនៅស្រុកខ្មែរយើងហាក់ដូចជាមានមិនច្រើនទេ ពិសេសគឺទស្សន៍ទាយអំពីស្ថានការណ៍ធំៗទាក់ទងនិងស្រុកទេសព្រមទាំងទំនៀមទម្លាប់ប្រពៃណីចូលឆ្នាំថ្មី។ លោក ឡុង បូរ៉ា ដែលជាគ្រូផ្នែកហោរាប្រចាំក្រុមហ៊ុនទូរស័ព្ទចល័តម៉ូប៊ីតែល និងជាប្រធានសមាគមទំនៀម ប្រពៃណីខ្មែរ និងសេវាសង្គមកម្ពុជា ហើយជាគ្រូបង្រៀនផ្នែកហោរាសាស្ត្រ គឺមានតែលោក និងក្រុមមន្ត្រីពុទ្ធសាសនបណ្ឌិតប៉ុណ្ណោះ បានធ្វើការគណនាអំពីការទស្សន៍ទាយមើលជោគជតានៅមុនពេលចូលឆ្នាំថ្មីមកដល់ ។

លោក ឡុង បូរ៉ា ដើមឡើយគ្រាន់តែជាអតីតក្មេងអ្នកចាប់ម៉ូយឡានតាក់ស៊ីក្មេងដើរដេកតាមសំយ៉ាបផ្ទះគេតាមសួនច្បារ ដែលធ្លាប់ទាំងរស់នៅជាមួយក្រុមសូមយាចក និងជាជាងកាត់សក់ម្នាក់ប៉ុណ្ណោះ ។ ប៉ុន្តែដោយសារតែបារមីផ្លូវក្នុងបាននាំឱ្យគាត់ទៅធ្វើធុតុងភាវនា និងរៀនវិជ្ជាហោរាអំពីសច្ចំបង់បត់នៅឯភ្នំគូលែន រហូតក្លាយជាគ្រូទស្សន៍ទាយតាមបែបសណ្ឋិតចូលរូបមានបារមីកាន់ខ្នងរងមុខ ។ លោក ឡុង បូរ៉ា មានអាយុ៣៦ឆ្នាំ មានកូនចំនួន២នាក់ និងមានស្រុកកំណើត នៅភូមិជើងលង ឃុំសូង ស្រុកត្បូងឃ្មុំ ខេត្តកំពង់ចាម. បច្ចុប្បន្នលោកបានបើកសាលាហោរាសាស្ត្របង្រៀនដល់កូនសិស្សមួយចំនួនថែមទៀតផង ។ ទាក់ទងទៅដល់ការគណនាកំណត់ឆ្នាំ និងរឿងរ៉ាវផ្សេងៗនៃប្រពៃណីចូលឆ្នាំថ្មីឆ្នាំមមីនេះ ជាមួយលោក ឡុង បូរ៉ា មានខ្លឹមសារដូចខាងក្រោម :




**•ហេតុអ្វីបានជាគេយកយកសត្វទាំង១២តំណាងឱ្យឆ្នាំរបស់មនុស្ស ?**

•ចំពោះការជ្រើសរើសយកសត្វជាតំណាងរបស់ឆ្នាំនិមួយៗហ្នឹងវាមាននិទានកថា របស់ គេ ព្រោះសត្វទាំង១២មានទំនាក់ទំនងជាមួយគ្នា និងសាច់រឿងនិទានកថាហ្នឹង ។

**•ខ្មែរនិងចិន ជាប្រទេស២ផ្សេងគ្នា ហេតុដូចម្តេចបានជាប្រទេសទាំង២នេះយកសត្វដូចគ្នាតំណាងឆ្នាំដូចគ្នា ?**

•បើនិយាយឱ្យចំទៅគឺនិយាយអំពីទំនៀមទម្លាប់ក្នុងព្រះពុទ្ធសាសនា ។ ភាពពិតចិនក៏កាន់ព្រះពុទ្ធសាសនាដូចខ្មែរដែរ អ៊ីចឹងប្រទេសដែលកាន់ព្រះពុទ្ធសាសនាត្រូវតែយកសត្វមកជាតំណាងឆ្នាំទាំង១២ ។

**•តើការកំណត់ឆ្នាំនេះ ធាតុទឹក ភ្លើង ដែក ឈើ ដី និងមាសនោះជាអ្វីទៅ?**

•និយាយឱ្យចំទៅការកំណត់ធាតុរបស់ខ្មែរយើងគេនិយាយអំពីដំណើរនៃមេទ័ពទាំង៦ ។ កាលពីបុរាណមកធាតុទាំង៦ហ្នឹងមិនទាន់មានទេ ហើយមេទ័ពទាំង៦ហ្នឹងក៏បានចេញដំណើរចេញស្វែងរកតួរអក្ខរាទាំង៣៣តួរ ។ ដំបូងឡើយមេទ័ព៤ ដែលទីមួយមេទ័ពឈ្មោះ ក, ខ, គ, និង ឃ បានរកឃើញតួរអក្ខរា៤តួរ គឺ ក, ខ, គ និង ឃ ហើយកំណត់ថា ជាតួរនៃភាពដើម ។ មេទ័ពទី២ធ្វើដំណើរចេញទៅទៀតក៏រកឃើញតួរអក្សរ៨តួរ ហើយកំណត់ថា ជាធាតុភ្លើង ហើយមេទ័ពទី៣ធ្វើដំណើរទៅទៀតក៏រកឃើញតួរអក្ខរា៩តួរមកកំណត់ជាធាតុខ្យល់ ដោយឡែកខ្មែរយើងឥឡូវអត់មានធាតុខ្យល់នោះទេ គឺជំនួសដោយធាតុដែកវិញ ។ លុះមេទ័ពទី៤ចេញដំណើរទៅក៏រកឃើញតួរអក្សរ៤តួរមកបូកបញ្ចូលគ្នា ហើយព្រះបាទសកៈ ក៏បានរកឃើញតួរអក្សរ៤តួរដូចគ្នា និងចុងក្រោយព្រះបាទនរៈ ក៏បានរកឃើញតួរអក្ខរាចំនួន៨តួរអ៊ីចឹងបូកបញ្ចូលគ្នាក៏កើតបានជាធាតុទាំង៦មានដូចជា ដី ទឹក ភ្លើង ឈើ ដែក និងមាស ។ ធាតុពិតតួរអក្ខរារបស់ខ្មែរយើងមាន៣៣តួរអ៊ីចឹង ការបូកនៃដំណើរមេទ័ពទាំង៦ក៏កើតចេញជាក្រឡាចត្រង្គ ឬក៏បាស្ការ ដែលហៅថា ក្រឡាអុក ។ ឧទាហរណ៍ ទូកតំណាងឱ្យធាតុទឹកអាចដើរបាន៤ជ្រុង សេះដើរបាន៨តំណាងឱ្យធាតុភ្លើង គោលដើរបាន៩តំណាងឱ្យធាតុឈើ ឈ្មាងដើរបាន៤តំណាងឱ្យធាតុដី ស្តេចដើរបាន៨ជើង តំណាងឱ្យធាតុមាស ត្រីពេលចាប់ផ្តើមបកដើរបាន៤តំណាងឱ្យធាតុដែក ។




**•តើឆ្នាំនិមួយៗជាការឆ្លុះបញ្ចាំងពីចរិតលក្ខណៈរបស់សត្វនិមួយៗដែរឬទេ ?**

•ក្បួនគឺកើតឡើងអំពីការចំណាំរបស់បុព្វបុរសខ្មែរយើង ។ ឧទាហរណ៍កូនរបស់គាត់កើតនៅក្នុងផ្កាយជូត(ឆ្នាំជូត)ចរិកលក្ខណៈរបស់កូនហ្នឹងយ៉ាងម៉េច? កើតក្នុងឆ្នាំឆ្លូវចរិក លក្ខណៈយ៉ាងម៉េច? អ៊ីចឹងបានន័យថាសត្វទាំង១២ តំណាងចរិកលក្ខណៈរបស់មនុស្ស ។ ឧទាហរណ៍មួយទៀតឆ្នាំនេះជាឆ្នាំមមី ហើយកើតនៅពេលយប់គេចាត់ទុកថាសេះដេកមានន័យថា កូនហ្នឹងមិន

តទៅទំព័រទី ២១

តមកពីទំព័រទី ៤

## វាចារនាឱកាសបុណ្យចូលឆ្នាំថ្មី

តែខ្ញុំចាំថា នៅពេលកំពុង"ផ្សាយមេត្តា" ដូចជាថា "សូមឱ្យអ្នកបានទទួលពុទ្ធពរដ៏ប្រសើរពីខ្ញុំ ដើម្បីឱ្យបានក្លាយជាមនុស្សល្អសម្រាប់សេចក្តីសុខដល់កូននឹងភរិយារបស់អ្នក"នោះអារម្មណ៍ស្អប់គុំគួនចង់ឈ្នះ ដែលធ្ងន់ហើយតឹងបានហើរចេញពីក្បាលនៅសល់តែអារម្មណ៍ "មេត្តា"ដែលធូរ "ករុណា" ដែលស្រាលបង្កើនអារម្មណ៍"ស្ងប់ស្ងាត់" ស្ថិតនៅក្នុងខ្លួនបន្តដោយអារម្មណ៍"រីករាយសប្បាយចិត្ត"ក៏កើតឡើងយ៉ាងត្រជាក់ត្រជុំ។ ដូច្នេះយ៉ាងហោចណាស់ការរំងាប់អារម្មណ៍ឱ្យ"ស្ងប់ស្ងាត់" ជាផលប្រយោជន៍សម្រាប់តែខ្លួនឯងម្នាក់ក៏ដោយ ចុះអារម្មណ៍នេះនឹងជះចំហាយត្រជាក់ត្រជុំដល់មនុស្សដែលរស់នៅជុំវិញខ្លួនឱ្យបានសប្បាយរីករាយរំសាយភាពតឹងតែងជាមួយគ្នាទៅបាន... ពេលនោះបើយើងជុំគ្នារីករាយច្រើនគ្នាមានបំណងនឹងធ្វើការបង្កើនផលអ្វីចូលគ្នាមុខជាមានការទុកចិត្តសណ្តោសគ្នាគ្រប់គ្រាន់ប្រាកដជានឹងបានលទ្ធផលល្អជាមិនខាន ។ ខ្ញុំចាំដែរថាបើមានមនុស្សដែលខឹងសម្បារ រអ៊ូរទាំ រញ៉េ រញ៉ូវនៅក្បែរខ្លួនយើង យើងនឹងមានអារម្មណ៍ប្រុងប្រយ័ត្នជួយខឹង ឬជួយស្អប់ខ្ពល់តែស្តាប់អ្នកខឹងនោះធ្វើអ្វីទៀត ក៏មិនបានខំបិទត្រចៀកខំយល់ចិត្តនឹងខំចូលគ្នាក៏មិនបានដែរ... នេះជាផលវិបាកអវិជ្ជមាននៃកំហឹង។ ខ្ញុំនិយាយនេះ ហាក់ដូចជាការស្រមើស្រម័យមួយ តែខ្ញុំបានប្រកបការងារក្នុងសមាគមវិជ្ជាជីវខាងព្យាបាលជម្ងឺផ្លូវចិត្តមួយខ្ញុំបានធ្វើការនឹងណែនាំតាមទស្សនៈដល់សហគមន៍ដ៏ធំមួយនៅហ្វីឡាដែលហៀវជាមួយនឹងសហសេវិកឯកទេស៣០០នាក់ទៀត ក្នុងនោះក៏មានការរំដោះខ្លួនពីកង្វល់ផ្លូវចិត្តដូចគ្នានឹងអ្វីដែលបានអធិប្បាយខាងលើដែរ គេអាចព្យាបាលជម្ងឺជាង៨០ភាគរយដែលមានដើមកំណើតពីកង្វល់ ឬភាពតឹងតែងនៃផ្លូវចិត្ត រាប់តាំងពីឈឺក្បាលវិលមុខឈឺក្នុងខ្លួនប្រាណ រហូតដល់ជម្ងឺមហារីកជាដើមនៅមានកង្វល់នៃការខ្វះខាតក្នុងផ្ទះបណ្តាលឱ្យមានវិបត្តិក្នុងសង្គម...។ល។ ដែលថ្នាក់ដឹកនាំចិត្តសាស្ត្រសហគមន៍កំពុងតែយកចិត្តទុកដាក់យ៉ាងខ្លាំង... ដូច្នេះពុំមែនជាការស្រមើស្រម័យនោះទេ។

ដោយហេតុផលជាក់ស្តែងទាំងនេះហើយ ដែលនាំឱ្យខ្ញុំសម្រេចចិត្តគិតថា នៅឱកាសចូលឆ្នាំថ្មីថ្ងៃទី១៥កើតខែចែត្រព.ស.២៥៥៨វេលាម៉ោង៨និង៧នាទីព្រឹកខាងមុខនេះ ខ្ញុំនឹងបន្តទំនៀមទំលាប់បុព្វបុរសខ្មែរយើងដែលបង្ហាត់បង្ហាញឱ្យចេះជូនពរដល់ក្រុមគ្រួសារដល់អ្នកដែលខ្លួនស្រឡាញ់ពេញចិត្ត និងបន្ថែមដោយពុទ្ធោវាទស្តីពីការ"ផ្សាយមេត្តា"ថ្មីទៀត ដល់អ្នកដែលមិនមែនជាក្រុមគ្រួសារយើងអ្នកដែលកំពុងរងទុកទោសអ្នកដែលកំពុងប្រព្រឹត្តអំពើបាបកម្មអ្នកដែលមិនមានសេចក្តីសុខ...ឱ្យបានទទួលនូវពុទ្ធពរដ៏ស្មោះសរពីខ្ញុំផងដែរ ពីព្រោះបើនរណាបានធ្វើអាក្រក់ដាក់ខ្ញុំ ហើយបើខ្ញុំតបតដោយអំពើអាក្រក់ ឬបំណងអាក្រក់ទៅវិញណាមួយនោះ គឺខ្ញុំនឹងក្លាយទៅជាមនុស្សអាក្រក់ដូចតែគ្នាដែរ ៕

## តមកពីទំព័រទី ១២ រដ្ឋាភិបាលលើកឡើងថា ការរឹបអូសគ្រឿង...

មនុស្សដែលចាប់ខ្លួនបានទាំងនោះ រួមមានជនជាតិកម្ពុជា វៀតណាម ឡាវ ថៃ ហ្វីលីពីន ចិន នីហ្សេរីយ៉ា កូរ៉េខាងត្បូង អៀរឡង់ ប៉េរូ ឥណ្ឌា ឥណ្ឌូនេស៊ី រូម៉ានី អេស្ប៉ាញ បារាំង និងជនជាតិអូស្ត្រាលី ។

នៅក្នុងរបាយការណ៍មួយដែលចេញកាលពីខែវិច្ឆិកា ការិយាល័យអង្គការសហប្រជាជាតិទទួលបន្ទុកគ្រឿងញៀន និងបទល្មើសបានលើកឡើងថា តម្រូវការថ្នាំញៀនប្រភេទហេរ៉ូអ៊ីនមានការកើនឡើងនៅក្នុងប្រទេសកម្ពុជា គឺដោយសារតែបរិមាណផលិតនៅក្នុងប្រទេសភូមាមានការកើនឡើងដែរ ។

លោក មាស វីរិទ្ធ អគ្គលេខាធិការអាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀនបានលើកឡើងថា គេរកឃើញថា ការជួញដូរគ្រឿងញៀនមានការកើនឡើងនេះ ព្រោះនគរបាលកំពុងខិតខំធ្វើការយ៉ាងខ្លាំងដើម្បីតាមចាប់ខ្លួនមេខ្លោងជួញដូរគ្រឿងញៀន ។ លោកបានមានប្រសាសន៍ថា "នៅពេលនគរបាលកំពុងមមាញឹកនៅក្នុងការការពារសន្តិសុខសម្រាប់ការបោះឆ្នោតជាតិជនជួញដូរគ្រឿងញៀនឆ្លៀតឱកាសនេះប្រព្រឹត្តិបទល្មើសគ្រឿងញៀន ប៉ុន្តែពួកគេមិនអាចគេចផុតពីកណ្តាប់ដៃរបស់នគរបាលបានឡើយ" ។

លោក ឯក ស៊ីវណ្ណដន ស្នងការរងនគរបាលខេត្តស្ទឹងត្រែងទទួលបន្ទុកការពារព្រំដែនបានឱ្យដឹងថា គ្រឿងញៀនដែលមានប្រភពចេញពីប្រទេសភូមា ឡាវ និងប្រទេសចិន តែងតែត្រូវបានគេជួញដូរមកក្នុងខេត្តនេះ ព្រោះព្រំដែនងាយស្រួលឆ្លងកាត់ ។

របាយការណ៍របស់អាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀនបានឱ្យដឹងបន្ថែមទៀតថា "ជនជួញដូរគ្រឿងញៀនបាននាំយកថ្នាំញៀនប្រភេទកូកាអ៊ីនពីអាហ្វ្រិកខាងត្បូង ឬអាហ្វ្រិកកណ្តាល និងថ្នាំមេតំហ្វេតាមីនពីតំបន់អាហ្វ្រិកដោយឆ្លងកាត់អាកាសយានដ្ឋានអន្តរជាតិក្នុងគោលបំណងនាំចេញបន្តទៅកាន់ប្រទេសទី៣" ។ យោងតាមរបាយការណ៍នេះបានឱ្យដឹងទៀតថា ប្រភពនាំចូលថ្នាំញៀនប្រភេទហេរ៉ូអ៊ីនធំៗចំនួនពីរគឺចេញមកពីប្រទេសអូស្ត្រាលីស្របពេលដែលថ្នាំញៀនប្រភេទផ្សេងៗទៀត ចេះតែបន្តជួញដូរចន្លោះប្រទេសកម្ពុជា ថៃ និង ប្រទេសឡាវ ។ អាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀនបានលើកឡើងថា លើសពីនេះទៅទៀតនោះ អាជ្ញាធររឹបអូសបានរថយន្តចំនួន២៦គ្រឿងយានយន្តផ្សេងៗ២៧០គ្រឿងប្រាក់ចំនួន៥១លានរៀល ។ រីឯរូបិយប័ណ្ណបរទេសវិញនោះ រួមមានប្រាក់ដុល្លារចំនួន៣០.៤១៧ដុល្លារប្រាក់បាតចំនួន៣០.២៤០បាត និងប្រាក់ដុងជាង៣៨២លានដុង ៕

**ស៊ុយឈាង**

**KhmerPost USA, LLC**
**សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក**
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែល sobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# តើជ្រើសរើសប្រធានក្រុងឡូវែលរបៀបណា

វិកធីត ហាវ បានរាយការណ៍ពីរបៀបជ្រើសរើសប្រធានក្រុងឡូវែលថា"ចាប់ពីប្រធានចាស់ចាកចេញពីតំណែងកាលពីថ្ងៃទី១០ មិនាទៅមានការផ្សព្វផ្សាយរកតែងតាំងប្រធានថ្មី។ បេក្ខជន២៩



Bernie Lynch

នាក់បានដាក់ពាក្យប្រជែងដំណែងប្រធានក្រុងឡូវែល។ គណក្រុមប្រឹក្សាក្រុងបានជ្រើសយកបេក្ខជន៦នាក់ដែលប្រសើរជាងគេមកធ្វើសវនាការ ។ សវនាការនេះគឺការតាំងសំនួរទៅបេក្ខជនពីក្រុមប្រឹក្សាក្រុងនៅមុខកញ្ចក់ទូរទស្សន៍ក្រុង ហើយបេក្ខជនម្នាក់ៗមានពេល១០នាទីសម្រាប់ឆ្លើយ។ នៅចុងបញ្ចប់គណក្រុមប្រឹក្សាក្រុងត្រូវធ្វើការបោះឆ្នោត ដើម្បីសម្រេចយកបេក្ខជនតែម្នាក់ដែលទទួលការគាំទ្រច្រើនជាងគេមកតែងតាំង។

# Selecting a New City Manager

**by Richard P. Howe Jr.**

At noon on Monday, March 10, 2014, Bernie Lynch ended his seven years as City Manager of Lowell. City Clerk Michael Geary immediately took over as Acting City Manager, however, he will return to the City Clerk job as soon as the new City Manager is hired.

Twenty-nine people applied for the job. To decide which ones to interview, the nine City Councilors each picked the top five applicants and the five who got the most support from the council would be interviewed. Since there was a tie for fifth place, six applicants will be interviewed. They are:

- Greg Balukonis who has been the administrator of North Reading, Massachusetts since 2005. Mr. Balukonis is also a finalist for the position of Dracut Town Manager.
- Robert Bruner who is the former city manager of Birmingham, Michigan. He held that job for three years.
- Peter Graczykowski who is the former City Manager of East Providence, Rhode Island. He held that job for two years.
- Daniel Keyes who has been the administrator of Blackstone, Massachusetts since 2011.
- Kevin Murphy who has represented the Highlands and Acre neighborhoods of Lowell as a State Representative since 1997. He also worked for Lowell as an Assistant City Solicitor for 13 years.
- George Ramirez who is the Administrator of Devens, the former U.S. Army base in Ayer, Massachusetts, that has been developed as a residential and business zone. He is also an attorney who served on the Lowell City Council in 2006 and 2007

The Council will interview two candidates per night beginning on March 25 and continuing on March 26 and 27. The interviews begin at 6:00 p.m. and will be televised on Lowell Cable TV channel 99. Each candidate will have 10 minutes to make an opening statement, then each Councilor will have 10 minutes to question the candidate, and the interview will conclude with a 5 minute closing statement by the candidate. After the interviews are finished, the nine City Councilors will vote to elect the new City Manager.

# Celebrating Cambodian Spring

UMass Lowell, Western Avenue Studios, the Cambodia Town, and Lowell Public schools are celebrating the diversity of Lowell from April 13th to June 30th. The events are being sponsored by a creative economy grant from the UMass President's office received by Pat Fontaine, Associate Professor at the Graduate School of Education at UMass Lowell.

The main events are two exhibits at Western Avenue Studios. One exhibit titled, Lowell a city of refugees, a community of citizens, tells the story of the journey of Cambodians to Lowell after escaping from the killing fields of Pol Pot. The other exhibit tells the story of the newcomers to Lowell. The stories behind the first exhibit are told with drawings of young Cambodians who arrived in Lowell in the early 80s. These drawings were preserved by Dorothea Tsapatsaris. The newcomers exhibit is also told by drawings and murals created by recent arrivals to Lowell. These exhibits are open to the public from April 13th to June 22.

The other events celebrating the diversity of Lowell are listed below. All events take place on Sundays in the Onyx Theater at Western Avenue Studios (unless otherwise indicated) and run from 3-5PM.

On the opening day, April 13th, the Honorable Governor Michael Dukakis and his wife Kitty will be honored by the Cambodian community for their extraordinary work with refugees and refugee causes. They were instrumental in facilitating resettlement of many Cambodians to Lowell.

**April 13:** Opening of the exhibits: music provided by Seng Hong, appearance by the Honorable Governor Michael and Kitty Dukakis

**April 27:** Anghor Dance troupe and exhibits by Cambodian artists of Western Avenue.

**May 18th:** Screening of Lost Child: Sayon's Journey; author speak: Terry Farish, author of The Good Braider and the multimedia exhibit Children of War; exhibits open.

**May 23 (Friday):** Refugee Conference at Middlesex Community College (9-3PM)

**May 25:** Screening of Don´t Think I've Forgotten; exhibits open

**June 8:** Blessing of a healing garden in Clemente Park; Screening of A river changes course; a taste of Cambodia Town (food tasting); exhibits open.

**June 22:** Traditional Medicine and Healing: Metta and UMB- Chhan Touch; author speak: Seng Ty; exhibits open.

## Event Sponsors












តមកពីទំព័រទី ១៨

# ចូលឆ្នាំនិយាយពីជំនឿ និងសត្វ...

សូវមានការហត់នឿយប៉ុន្មានទេ ដូចជាដំណើរយាមនៃសត្វសេះអ៊ីចឹង ហើយក៏ជាតំណាងនៃយាមនិមួយៗរបស់សត្វទាំង១២ហ្នឹងដែរ! ។

**•ដូចម្តេចដែលហៅថាពង្ស?**

•បើនិយាយអំពីពង្សក៏ពាក់ព័ន្ធទៅហ្នឹងចរឹកលក្ខណៈនៃធាតុរបស់សត្វនិមួយៗដែរ ។ ឧទាហរណ៍ សត្វស្វាជាប្រភេទសត្វព្រៃអ៊ីចឹង បើប្រភេទសត្វព្រៃចាត់ទុកជាពង្សយក្ស ។ ខ្លាក៏ជាប្រភេទសត្វព្រៃជាពង្សយក្ស ឆ្កែក៏មានប្រភេទ ឆ្កែព្រៃដែរ ពង្សយក្សនិយាយឱ្យចំវាបញ្ជាក់ពីអត្តចរិករបស់សត្វនិមួយៗ ។

**•ពង្ស និងធាតុមានលក្ខណៈខុសគ្នាត្រង់ណា?**

•ពង្ស និងធាតុមានលក្ខណៈខុសគ្នា គឺធាតុសំដៅទៅលើចេតនារបស់មនុស្ស និងសត្វនិមួយៗ។ ឧទាហរណ៍មនុស្សហ្នឹងកើតធាតុទឹក គឺត្រជាក់ កើតធាតុដី គឺរឹងកើតធាតុភ្លើងគឺឆេ ឆាវ ។ ប៉ុន្តែបើនិយាយអំពីពង្សវិញ ពង្សបានន័យថា បញ្ជាក់អំពីអត្តចរិករួមរបស់បុគ្គល ។

**•ឆ្នាំមមីតំណាងឱ្យមនុស្ស ហេតុដូចម្តេចបានជាមនុស្សយកសេះមកប្រើទៅវិញ? តើបាបដែរឬទេ ?**



•បើនិយាយតាមព្រះពុទ្ធសាសនាការយកសត្វមកប្រើគឺត្រូវតែមានបាប ទោះបីជាសត្វអ្វីក៏ដោយ ។

**•ហេតុអ្វីបានជាការចូលឆ្នាំខ្មែរ គេប្រកាន់យកខែមេសាជារដូវក្តៅ ចុះម្តេចមិនយកខែផ្សេងដែលត្រជាក់?**

•តាមពិតទៅពីបុរាណមកចូលឆ្នាំខ្មែរយកតាមបែបចន្ទគតិយើងគឺកំណត់នៅក្នុងខែ មិគសិរចំរដូវច្រូតកាត់ ប៉ុន្តែចំណេរកាលក្រោយមកគេប្រើចូលឆ្នាំតាមបែបសុរិយាគតិដែលគេកំណត់យកថ្ងៃទី១៣, ១៤, ១៥ ខែ មេសា ។

**•តើការជ្រើសរើសខែក្តៅ មកធ្វើពិធីបុណ្យចូលឆ្នាំនេះ មានការទាក់ទងនឹងភូមិសាស្ត្រដែរឬទេ ?**

•យោងតាមការសិក្សាស្រាវជ្រាវដោយសារខែមិគសិរជារដូវច្រូតកាត់កសិកររវល់ប្រមូលទុកដាក់ផលស្រូវគ្មានពេលទំនេរ ប្រារព្ធពិធីចូលឆ្នាំក៏នាំគ្នាលើកមកដាក់នៅខែចេត្រវិញទៅ ។

**•រាល់ពេលចូលឆ្នាំម្តងៗ តែងតែមានការរៀបចំគ្រឿងសក្ការបូជាសម្រាប់ទទួលទេវតាឆ្នាំថ្មី តើរវាងអ្នកទទួល និងអ្នកមិនទទួលបានគុណប្រយោជន៍ដូចម្តេចដែរ?**

•ជាប្រពៃណី ហើយក៏មិនអាចកាត់ផ្តាច់បានដែរ អ៊ីចឹងអ្នកដែលបានធ្វើទៅតាមប្រពៃណីរបស់បុព្វបុរស និងអ្នកដែលមិនបានធ្វើនោះទទួលបាននូវហេតុ៣យ៉ាងដូចគ្នា ។ ចំពោះអ្នកដែលបានធ្វើនឹងទទួលបាននូវ ទី១គឺអស់ចិត្ត ព្រោះបានធ្វើកាតព្វកិច្ចជូនទៅដូនតា, ទីពីរទទួលបាននូវអំណរ និងទីបីមានអារម្មណ៍ជ្រះថ្លាសប្បាយចិត្ត ។ ចំណែកអ្នកដែលមិនបានធ្វើ គឺគាត់មិនអស់ចិត្ត កើតនូវក្តីតប់ប្រមល់ទល់ពុទ្ធោ ហើយពេលធ្វើអ្វីមួយច្រើនតែកើតនូវឧបសគ្គ ។

**•តើនរណាជាអ្នកបង្គាប់ឱ្យធ្វើពិធីបែបនេះ ?**

•តាមការសិក្សាស្រាវជ្រាវក្បួននេះមានតាំងតែពីបុរាណមកម្លេះដែលបង្កើតឡើងដោយបុព្វបុរសខ្មែរយើង ។

**•តាមទស្សនៈរបស់លោកជឿថា មានទេវតាឬទេ?**

•ក្នុងនាមជាអ្នកគោរពព្រះពុទ្ធសាសនា គឺខ្ញុំជឿថា មានទេវតា ព្រោះទេវតាជាតំណាងឱ្យនូវអំពីល្អ ។ តទៅទំព័រទី ២៤

# CLASSIFIED ADS

















រឿងរាមកេរ្តិ៍ ដោយសាគួ សាមុត តម្លៃ $10

របាំបុរាណខ្មែរ ដោយសាគួ សាមុត តម្លៃ $10

រឿងរាមកេរ្តិ៍ ដោយសាគួ សាមុត តម្លៃ $10

ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤ តម្លៃ $10

CAMBODGE តម្លៃ $5

អង្គការជានរណា? បភាគ តម្លៃ $5/1

| | |
|---|---|
| Name | Phone # |
| Shipping Address | Email |
| City, State, Zip | Book Title(s) |

**BOOK ORDER FORM**

Checks or Money Order Payable to KhmerPost USA, LLC
អាចទិញនៅអាសយដ្ឋាន៖ 45 Merrimack St., Suite 218A, Lowell, MA 01852





# Job Announcement

Cosmo Personnel Services is currently seeking Khmer speaking Clinicians, Counselors and Social Workers to provide clinical services to children and adolescents.

These services may include: diagnostic assessment, individual, group and family counseling. Experience with medical necessity documentation required.

QUALIFICATIONS: Master's Degree in Social Work with 2 years relevant experience. LCSW required; LICSW preferred; or Masters in Counseling Psychology with 2 years relevant experience (LMFT, LMHC).

Interested candidates must email resumes to
Niki Lewis @ cosmopersonnelinc@gmail.com

# ដំណឹងជ្រើសរើសបុគ្គលិក

## សម្រាប់ការងារការិយាល័យ

- ត្រូវការអ្នកមានបទពិសោធន៍ការងារ
- រួសរាយរាក់ទាក់ជាមួយអតិថិជន
- ចេះធ្វើការងារជាក្រុម
- ចេះភាសាខ្មែរ ,អង់គ្លេស ឬចេះភាសាអេស្ប៉ាញ ,អង់គ្លេស
- ចេះកុំព្យូទ័រ
- ចាំបាច់ត្រូវពិនិត្យប្រវត្តិការងារ

សូមផ្ញើប្រវត្តិរូប និងពាក្យសុំការងារមកអ៊ីម៉ែល laura@mvptesting.org

# ត្រូវការអ្នកធ្វើក្រចក

## ចេះគ្រប់ជំនាញធ្វើក្រចក

*មានសញ្ញាប័ត្រធ្វើក្រចកពីក្រុងហ្វីឡាដែលហ្វៀ (PA State License)*

*ប្រាក់ខែល្អ អាស្រ័យលើបទពិសោធន៍*

***អាស័យដ្ឋាន:*** *នៅក្រុងហ្វីឡាដែលហ្វៀ បើកឡាន*

*២០នាទី ពី King Of Prussia*

*បើកតាម Hwy 422 W Limerick, PA 19468*

*សូមទូរស័ព្ទមក Charlie **(856) 287-0376***

# Hair Salon & Day Spa

**has two Floors**

**For Sale in Roslindale square 012131**

**6 hair Stations,**

**Manicure & pedicure,**

**Massage, facial and Waxing rooms**

***Asking $45,00***

# NOTICE OF PUBLIC MEETING

The Northern Middlesex Metropolitan Planning Organization (NMMPO) will meet on Tuesday, April 15, 2014, 2:00 P.M. at the Northern Middlesex Council of Governments (NMCOG) office, 40 Church Street, Suite 200, Lowell, MA. Proposed amendments to the Highway section of the FFY 2014-2017 Transportation Improvement Program (TIP) will be discussed and considered for endorsement. In addition, the MPO will discuss a proposed FFY 2014-2017 Transit TIP amendment and vote on whether to release the amendment for a 30-day public comment period. The development of the Draft FFY 2015-2018 TIP and Draft FFY 2015 Unified Planning Work Program (UPWP) will also be discussed. Please note that the TIP contains the program of projects for the Lowell Regional Transit Authority (LRTA). The MPO's public participation process satisfies the LRTA's public participation requirements for the program of projects.

Notice: The NMCOG office is near public transit and accessible to people with disabilities. Secure bicycle parking is available on the second floor. The NMMPO provides reasonable accommodations and/or language assistance free of charge upon request (including but not limited to interpreters in American Sign Language and languages other than English, open or closed captioning for videos, assistive listening devices and alternate material formats), as available. For assistance, please contact Justin Howard at (978) 454-8021, ext 121 or at jhoward@nmcog.org . Requests should be made as soon as possible for services requiring advanced arrangements, including sign language, CART or language translation or interpretation.

# សេចក្តីជូនដំណឹង កិច្ចប្រជុំជា សាធារណៈ

អង្គការរៀបចំគម្រោងនៃក្រុងធំៗក្នុងខ័ណ្ឌមីដដលស៊ិក ខាងជើងហៅកាត់ថា អិន អឹម អឹម ភី អូ (NMMPO) នឹងបើកកិច្ចប្រជុំពិភាក្សាជាសាធារណៈដែលនឹងធ្វើឡើ ងនៅថ្ងៃទី ១៥ មេសា ឆ្នាំ២០១៤ វេលាម៉ោង២រសៀលដែលនឹងប្រព្រឹត្តទៅនៅការិយាល័យរបស់អង្គការការិយាល័យរដ្ឋាភិបាលក្នុងខណ្ឌមីដដលសិកខាងជើង ផ្លូវ៤០ ឆឺចស្ទ្រីតស៊្វីតលេខ២០០ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត (40 Church Street, Suite 200, Lowell, MA) ។ កិច្ចប្រជុំនឹងពិភាក្សាទៅលើការអនុម័តសេចក្តីព្រៀងវិសោធនកម្ម (កែប្រែ) លើការអភិវឌ្ឍវិស័យមធ្យោបាយធ្វើដំណើរសាធារណៈហៅកាត់ថា ធីប(TIP) សម្រាប់ឆ្នាំ២០១៤ដល់ឆ្នាំ២០១៧ ហើយនឹងធ្វើការបោះឆ្នោតសម្រេច ថាតើគួរប្រកាសសេចក្តីអនុម័តលើវិសោធនកម្មនោះក្នុងរយៈពេល៣០ថ្ងៃសំដៅស្វែងយល់មតិសាធារណៈលើវិសោធនកម្មនេះ ឬយ៉ាងណា។ ដូចគ្នាទៅនឹងគម្រោងអភិវឌ្ឍសម្រាប់ឆ្នាំ២០១៥ដល់ឆ្នាំ២០១៨ និងគម្រោងការងារក្នុងប្រព័ន្ធតែមួយហៅកាត់ថា យូ ភី ដាប់ប៉លយូ ភី (UPWP) សម្រាប់ឆ្នាំ ២០១៥ ក៏នឹងត្រូវបានលើកយកមកពិភាក្សា។ សូមចំណាំថាកម្មវិធីធីប (TIP) មានគម្រោងដែលទាក់ទៅនឹងសេវាមធ្យោបាយធ្វើដំណើរសាធារណៈនៃមន្ទីរទូរគមនាគមន៍ប្រចាំតំបន់ឡូវែលហៅកាត់ថា អិល អ័រ ធី អេ (LRTA) ។ ការចូលរួមជាសាធារណៈនៃកិច្ចប្រជុំខាងលើជាបច្ច័យជំរុញគម្រោងមធ្យោបាយធ្វើដំណើរសាធារណៈឱ្យបានដល់ការពេញចិត្តពីកម្មវិធីនេះ។

**ចំណាំ:** ទីកន្លែងនៃកិច្ចប្រជុំខាងលើផ្តល់ដល់អ្នកចូលរួមដែលមិនចេះភាសាអង់គ្លេស និងជនពិការ ហើយមានទីតាំងងាយទៅដល់ព្រោះនៅក្បែរមធ្យោបាយធ្វើដំណើរសាធារណៈ។ អិន អឹម ស៊ី អូ ជី ផ្តល់ជូននូវការចតទោចក្រយានយន្តនៅជាន់ទីពីរប្រកបដោយសុវត្ថិភាព។ លោកអ្នកអាចទទួលបានទីកន្លែងស្នាក់នៅ និងការបកប្រែភាសាដោយឥតគិតថ្លៃ (ទាំងភាសាកាយវិកា និងសម្លេងការថតរូប និងវីដេអូប្រដាប់ជំនួយសម្លេងស្តាប់ការប្រជុំនិងឧបករណ៍ជំនួយក្នុងទម្រង់ផ្សេងៗទៀត) តាមរយៈការស្នើរសុំពេលចូលរួមកិច្ចប្រជុំខាងលើ។

សម្រាប់ការស្នើរសុំទីកន្លែងស្នាក់នៅ និងសេវាបកប្រែភាសាពេលចូលរួមកិច្ចប្រជុំ សូមទាក់ទង ចឺសស្ទីន ហូវើដ តាមរយៈលេខទូរស័ព្ទ ៩៧៨-៤៥៤-៨០២១ បន្តចុចលេខ២១ ឬអាច អ៊ីម៉ែល jhoward@nmcog.org ។ ការស្នើរសុំជំនួយបកប្រែភាសាកាយវិកា និងភាសានិយាយគួរតែធ្វើឡើងឱ្យលឿនបំផុតតាមដែលអាចធ្វើបាន ដើម្បីឱ្យបុគ្គលិកដែលទទួលបន្ទុកអាចរៀបចំឱ្យបានទាន់ពេលវេលា៕

តមកពីទំព័រទី ២១

## ចូលឆ្នាំនិយាយពី...

**• ប្រការដែលដឹងថា ទេវតាឆ្នាំនេះសោយនេះ ឆ្នាំនោះសោយនោះ ហើយទ្រង់កាន់អាវុធ ឬកាំភ្លើងនោះ តើគ្រាន់តែជាការស្រមៃរបស់ហោរាសាស្ត្រ ឬយ៉ាងណា?**

• តាមក្បួនទេវតាមាន៧អង្គដូចជា ទេវតាក្នុងថ្ងៃអាទិត្យព្រះនាម ធុង្គសៈទេ វីអម្ពរ(សម្លៀកបំពាក់) ពណ៌ក្រហម, ទេវតាថ្ងៃច័ន្ទ ព្រះនាមកោរេគៈទេវី អម្ពរពណ៌លឿង, ទេវតាថ្ងៃអង្គារព្រះនាមរាសសៈទេវីអម្ពរពិណខ្មៅ, ទេវតាថ្ងៃពុធ



ព្រះនាមមន្ទាទេវី អម្ពរពណ៌អន (ពណ៌ផ្លែក), ទេវតាថ្ងៃព្រហស្ប៍ ព្រះនាមករណីទេវី អម្ពរពណ៌បៃតង, ទេវតាថ្ងៃសុក្រ ព្រះនាមកិមរៈទេវី អម្ពរពណ៌ស និងទេវតាថ្ងៃសៅរ៍ព្រះនាមមហោទ្ធរៈទេវី អម្ពរពណ៌ខៀវ ។

ពាក់ព័ន្ធ និងអាវុធយុទ្ធភ័ណ្ឌក៏ដូច្នោះដែរ បើទេវតាថ្ងៃអាទិត្យ ព្រះហស្ត ស្តាំទ្រង់កងចក្រ ព្រះហស្តឆ្វេងសង្ខ៍ បើចូលឆ្នាំចំថ្ងៃចន្ទ ព្រះហស្តស្តាំទ្រង់កាន់ព្រះខ័ន្ទព្រះហស្តឆ្វេងទ្រង់កាន់ឈើច្រត់ បើចំថ្ងៃអង្គារ៍ព្រះហស្តស្តាំទ្រង់ត្រៃសូរ ព្រះហស្តឆ្វេង ទ្រង់ធ្នូរ បើចូលឆ្នាំ ត្រូវថ្ងៃពុធ ទេវតាទ្រង់កាន់ម្ជុលនៅព្រះហស្តស្តាំ និងខាងឆ្វេងទ្រង់ឈើច្រត់បើប៉ះចំថ្ងៃព្រហស្បត្តិ៍ព្រះហស្តស្តាំទ្រង់កាន់ខែល ឬកង្វេរ ឯព្រះហស្តឆ្វេងទ្រង់កាន់កាំភ្លើងដល់ទេវតា ថ្ងៃសុក្រនៅព្រះហស្ត ស្តាំកាន់ព្រះខ័ន្ធ ឯខាងឆ្វេងកាន់ពិណ្យ និងទេវតាថ្ងៃសៅរ៍ទ្រង់កាន់កងចក្រ ឯខាងឆ្វេងទ្រង់កាន់ត្រៃសូរ ។ ចំណែក ឯការសោយ និងជំនិះ ក៏ដូច្នោះដែរ គឺមានកំណត់នៅក្នុងក្បួនតាមទេវតានៃថ្ងៃនិមួយៗ ហើយទាក់ទងនិងការកាន់កាំភ្លើងនោះ គ្រាន់តែជាហេតុមួយតំណាងឱ្យស្រុកទេសនឹងមានការដោះស្រាយគ្នាដោយសព្វាវុធអាចនឹងមានការទាស់ទែងខ្វែងគំនិតគ្នា ។

**• ក្នុងពិធីបុណ្យចូលឆ្នាំមានពិធីបុណ្យតូចៗផងដែរដូច ជាពូនភ្នំខ្សាច់ បង្សុកូល ឬស្រោចទឹកឱ្យចាស់ទុំ តើនេះគ្រាន់តែជាការផ្សារភ្ជាប់គ្នារវាងព្រះពុទ្ធសាសនា និងព្រហ្មញ្ញសាសនាមែនដែរ ឬទេ? ។**

• និយាយឱ្យចំគឺជាពិធីផ្សារភ្ជាប់រវាងព្រះពុទ្ធសាសនា និងព្រហ្មញ្ញសាសនាមែន ។ ពេលដែលយើងមានពិធីបុណ្យហ្នឹង ទី១គឺឧទ្ទិសដល់បុព្វការីជនរបស់យើងការពូនភ្នំខ្សាច់ទាក់ទងទៅហ្នឹងព្រះពុទ្ធសាសនាឧទ្ទិសចុឡាមុន្នីចេតិយ ចំណែកបង្សុកូលក៏បែបព្រះពុទ្ធសាសនាដែរ ៕ **វណ្ណៈ**

# តួអក្សរខ្មែរផ្ទៀបនឹង រូបតួអង្គរឿងរាមកេរ្តិ៍

គំនូរតួអង្គនៃរឿងរាមកេរ្តិ៍ គូរនៅឆ្នាំ១៩៣៨
គូរដោយជាងតឹក ជាងព្រះរាជបណ្ណាល័យ
ចំណងជើងដោយព្រះមហាពិទូរក្រសេម

Nil Ek

Eléphant d'Indra

Em Rindr

Empear

Or Sa

Ram (Rama)

01

2

108

109

3

Ram, Laks, Bhirut, Sutrut 4

7

8

5

6

110

9

111

អក្សរ ខ្មែរ ផ្ទៀបនឹងរូប រឿងរាមកេរ្តិ៍

| CYCLE DES 12 ANIMAUX | | | | | |
|---|---|---|---|---|---|
| 1 | ជូត | RAT | 7 | មមី | CHEVAL |
| 2 | ឆ្លូវ | BOEUF | 8 | មមែ | CHÈVRE |
| 3 | ខាល | TIGRE | 9 | វក | SINGE |
| 4 | ថោះ | LIÈVRE | 10 | រកា | COQ |
| 5 | រោង | DRAGON* | 11 | ច | CHIEN |
| 6 | ម្សាញ់ | SERPENT | 12 | កុរ | COCHON |

* រោង ( នាគ ) = Dragon ( Nâgâ )

តមកពីទំព័រទី ១២

## បន្ទាប់ពីការបែកបាក់ប្លួនគ្មានការគ្រោង...

(Greens Party) ដែលជាគណបក្សប្រឆាំងនៅក្នុងប្រទេសអូស្ត្រាលីបានហៅទូរស័ព្ទមកកន្លែងសមាជពលរដ្ឋលើកទី២នេះ ហើយបានអបអរសាទរចំពោះការរៀបចំពិធីជួបជុំដែលមានអ្នកចូលរួមយ៉ាងច្រើនលើកទី១របស់គណបក្សប្រឆាំងចាប់ តាំងពីខែមករាមក។

លោក កឹម សុខា បានសូមឱ្យអ្នកចូលរួមទាំងអស់លើកដៃ ប្រសិនបើពួកគាត់គាំទ្រជំហរផ្សេងៗទៀតរបស់គណបក្សសង្គ្រោះជាតិដែលរួមមានការទាមទារឱ្យមានការបោះឆ្នោតសាជាថ្មីម្តងទៀត មុនអាណត្តិរបស់រដ្ឋាភិបាលបច្ចុប្បន្នត្រូវបានបញ្ចប់។ លោកបានប្រកាសយ៉ាងរីករាយថា អ្នកចូលរួមទាំងអស់បានគាំទ្រគោលនយោបាយរបស់គណបក្សសង្គ្រោះជាតិ "មួយរយភាគរយ"។

ក្រោយមកទៀត លោក ហូរ វ៉ាន់ សមាជិកសភាជាប់ឆ្នោតមកពីគណបក្សសង្គ្រោះជាតិបានចេញមកធ្វើបទបង្ហាញពី "សមាជប្រជាពលរដ្ឋលើកទី២" ដែលមានបីទំព័រ។

ដោយលើកឡើងម្តងទៀតពីគោលនយោបាយសំខាន់របស់គណបក្សប្រឆាំងចាប់តាំងពីការបោះឆ្នោតឆ្នាំមុនមកគោលនយោបាយទាំងនេះនៅតែបង្ហាញពីគោលជំហររបស់គណបក្សសង្គ្រោះជាតិដែលមិនព្រមទទួលយកអាសនៈនៅក្នុងរដ្ឋសភាដរាបណាគ្មានការស៊ើបអង្កេតឯករាជ្យលើការបោះឆ្នោតកាលពីថ្ងៃទី២៨ខែកក្កដា ឆ្នាំមុន ឬក៏គ្មានការបោះឆ្នោតជាថ្មីឡើងវិញនោះ។

ជំហររបស់គណបក្សសង្គ្រោះជាតិក៏អំពាវនាវឱ្យមានការដោះលែង "អ្នកទោសមនសិការ" ទាំងអស់ដោយគ្មានលក្ខខណ្ឌ ទាមទារឱ្យមានការដំឡើងប្រាក់ខែគោល១៦០ដុល្លារដល់កម្មកររោងចក្រកាត់ដេរ ទាមទារឱ្យមានការអនុវត្តច្បាប់ស្តីពីជនអន្តោប្រវេសន៍ និងទាមទារឱ្យមានការបង្កើតគណៈកម្មការមួយដើម្បីត្រួតពិនិត្យការវាស់វែងព្រំដែនអន្តរជាតិរបស់ប្រទេសកម្ពុជាផងដែរ៕ **ស៊ុយ ឈាង**



# កុមារទល់លាមកឪពុកម្ដាយ គួរធ្វើដូចម្ដេច?

ជាការពិតកុមារអាចនឹងទល់លាមកកាលណាគេមិនបានទទួលទានទឹក ទឹកដោះ ឬអង្គធាតុរាវឯទៀត ឬមិនបានបរិភោគរបបអាហារដែលមានសរសៃឱ្យបានគ្រប់គ្រាន់ ហើយកាកសរសៃទាំងនោះមាននៅក្នុងចំណី ដូចជាគ្រាប់រុក្ខជាតិ ផ្លែឈើ និងបន្លែបង្កា ។ តែប្រសិនបើកូនរបស់លោកអ្នកបរិភោគរបបអាហារដែលសម្បូរទៅដោយខ្លាញ់ ជាតិស្ករចម្រាញ់(ស្ករគ្រាប់បង្អែម) នោះគេមិនបានបរិភោគសរសៃឱ្យបានគ្រប់គ្រាន់ទេ ប្រាកដជាអាចទល់លាមកមិនខាន ។ មួយវិញទៀត គេក៏អាចទល់លាមកបានដែរ នៅពេលដែលលោកអ្នកចាប់ផ្ដើមផ្លាស់ប្ដូរពីការបំបៅដោយទឹកដោះម្ដាយឱ្យទៅបៅទឹកដោះគោវិញ ឬប្ដូរពីការផ្ដល់ចំណីអាហារទន់ទៅជាចំណីអាហាររឹងវិញ និងជួនកាលគេអាចទល់លាមកបន្ទាប់ពីបានឈឺ ឬប្រើប្រាស់ឱសថផ្សេងៗ ។ ដូច្នេះអ្នកមិនត្រូវបារម្ភទេ បើសិនជាកូនទល់លាមកតែប៉ុន្មានថ្ងៃ ព្រោះការទល់លាមកតែងតែកើតមានចំពោះកុមារ និងអាចបាត់ទៅវិញឯងៗ ។

កុមារតូចៗដែលមានទល់លាមកធ្ងន់ធ្ងរមិនបានដឹងអំពីការធ្វើចលនារបស់ពោះវៀនទេ ។ កុមារអាចមិនចង់ឈប់លេង ឬខ្លាច ឬទើសទាល់មិនហ៊ានប្រាប់គ្រូ ឬមិនចេះប្រើប្រាស់បង្គន់សាធារណៈ ។ កាលណាកុមារមិនព្រមទៅបន្ទោរបង់លាមកទេនោះ លាមកវាទៅប្រមូលផ្ដុំនៅក្នុងពោះវៀនធំ ហើយចាប់កក ធំឡើងៗ និងរឹងទៅៗ ។ ការបន្ទោរបង់អាចមានការឈឺចាប់ ធ្វើឱ្យកុមារមិនចង់ទៅបន្ទោរបង់លាមកទៀតផង ។

### តើខ្ញុំអាចធ្វើអ្វីបានកាលណាកូនទល់លាមក ?

១.របបអាហារអ្នកអាចចាប់ផ្ដើមបង្កើនបរិមាណទឹកដែលកូនរបស់លោកអ្នកទទួលទានក្នុង១ថ្ងៃៗ ។ បើកូនធំហើយសូមជំរុញឱ្យគេផឹកទឹកឱ្យបានច្រើន ។ សូមបន្ថយបរិមាណស្ករគ្រាប់ និងចំណីមានជាតិស្ករនៅក្នុងរបបអាហារ ។

២. អ្នកត្រូវណែនាំកូនឱ្យយល់ដឹងអំពីការបន្ទោរបង់ ហើយកុំឱ្យបង្អែបង្អង់ក្នុងការបន្ទោរបង់ ។ ដើម្បីបង្កើតទម្លាប់នៅក្នុងការបន្ទោរបង់ សូមឱ្យកូនលោកអ្នកអង្គុយលើបង្គន់ឱ្យបានយ៉ាងតិច១០នាទីជារៀងរាល់ថ្ងៃ ជាពិសេសក្រោយការបរិភោគចំណីអាហារ ។

៣.មានឱសថបញ្ចុះលាមកជាច្រើន សម្រាប់ព្យាបាលការទល់លាមករបស់កុមារ ។ អ្នកអាចជ្រើសរើសយកឱសថណាមួយអាស្រ័យទៅតាមអាយុរបស់កូន និងទៅតាមសភាពនៃការទល់លាមក ។ សូមសាកសួរគ្រូពេទ្យអំពីឈ្មោះ និងរបៀបប្រើឱសថ ៕




# មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

**345 Chelmsford St. Lowell, MA 01851/ – www.lowelleldercare.com**

## អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ៏កក់ក្តៅមួយ ដែលផ្តល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង និងជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និងផ្នែកសង្គម ។ កម្មវិធីរបស់យើងជានាទូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និងមានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

## ទីតាំងនៃមណ្ឌល

ទីតាំងអាចរកឃើញដោយងាយក្នុងអគារថ្មី ជាមួយនូវការតុបតែងរចនាបែបសិល្បៈខ្មែរយ៉ាងល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និងមានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និងកន្លែងផ្សេងៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។



## មណ្ឌលផ្តល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និងថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម (ផ្តល់ការពិគ្រោះផ្ទាល់ខ្លួន និងក្រុមគ្រួសារ)
- ម្ហូបខ្មែរក្តៅៗ និងចំណីផ្សេងៗ
- ការហាត់ប្រាណសំរាប់សុខភាពរាងកាយ
- កម្មវិធីសិល្បៈ និងតន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និងការសំណេះសំណាលគ្នា)
- សកម្មភាព និងដំណើរកំសាន្តក្រៅមណ្ឌល

## Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips



**សូមហៅលេខទូរស័ព្ទ (978) 596-1111**




# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

## Homecare Agency

Group Adult Foster Care Program (GAFC)
MassHealth

***ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន
បុគ្គលិកមានសណ្តានចិត្តល្អ និងធ្វើការតាមទំនៀមទម្លាប់
អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ***



*Compassionate Care & Reliable
Professional & Cultural Sensitive
Management & Staffs speak Khmer*

*កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហាវិវែផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្តល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្តង ។*

*Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.*

### *ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :*

*To be eligibled for GAFC you must:*

-*រស់នៅផ្ទះរដ្ឋ* (live in subsidized or public housing)
-*អាយុ ២២ ឆ្នាំឡើងទៅ* (age 22 years and older)
-*មាស់ហែល្ធស្តង់ដា* (eligible for Masshealth Standard)
-*ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀកពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ* (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)
-*មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក* (have physician statement of your condition)
-*ត្រូវបានវាយតំលៃផ្នែកសុខភាព និងការអនុម័តយល់ព្រមពីកម្មវិធី* (be screened and approved for the program )

### *ផលប្រយោជន៍ទទួលបាន :*

*Benefits you will get:*

-*ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ* (personal care service in your home, up to one hour of service each day)
-*ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក* (Medication Managemant)
-*ផែនការថែទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសម៉ានីជើ* (an individual care plan developed by a registered nurse and case manager)
-*វាយតំលៃលើសេចក្តីត្រូវការជាប្រចាំជាបន្តបន្ទាប់* (ongoing monitoring of needs)
-*សមាជិកអាចទាក់ទងមក ២៤ម៉ោង* (24-hour access to services)

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

**ដើម្បីចុះឈ្មោះសូមទាក់ទងមក**
To register, please contact:



Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404, Lowell, MA 01852



Chhavan Pin: Lynn, Revere, Boston
Tel:(617)783-7177, Fax: (617) 783-7188
Office: 214 Lincoln St., Suite 200, Allston, MA 02134



# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំរោង



## ឆ្នាំជូត

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕



## ឆ្នាំឆ្លូវ

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕



## ឆ្នាំខាល

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕



## ឆ្នាំថោះ

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕



## ឆ្នាំរោង

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕



## ឆ្នាំម្សាញ់

រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕



## ឆ្នាំមមី

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕



## ឆ្នាំមមែ

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕



## ឆ្នាំវក

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕



## ឆ្នាំរកា

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរការកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕



## ឆ្នាំច

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕



## ឆ្នាំកុរ

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

# វិរបុរសដែលគួរចងចាំ
# នួន ឌួង (១៩១០-១៩៦៦)


១-លោក នួន ឌួង


២-លោកស្រី ម៉ិញ សំយ៉ឹន


៣-លោក នួន ឌួង

លោក នួន ឌួង មានដើមកំណើតនៅភូមិរកាកណ្តាលស្រុកក្រចេះ ខេត្តក្រចេះ ឪពុកឈ្មោះ មាស ហ៊ុល និងម្តាយឈ្មោះ ប៉ែន ទុន ។ លោកមានបងប្អូនម្នាក់ឈ្មោះលោក ហ៊ុល ដេន ។ លោកកើតនៅក្នុងឆ្នាំ១៩១០ហើយកាលពីកុមារបានរៀនអក្សរ និងបួសនៅវត្តរកាកណ្តាល ។ កាលណោះលោកនៅមាននាមត្រកូល ជា ហ៊ុល នៅឡើយ ។ ក្រោយមកលោកបានមកបន្តការសិក្សានៅទីក្រុងភ្នំពេញ ។ នៅពេលនោះលោកបានជួបនឹងលោកតានួន ដែលបានបួសរៀនជាមួយគ្នា ហើយបានរាប់អានគ្នាជាឪពុក និងកូនធម៌ទៅ ។ ឪពុកបង្កើត មាស ហ៊ុល និងបងប្រុស ហ៊ុល ដេន របស់លោកជាអ្នកប្រឆាំងយ៉ាងប្តូរផ្តាច់នឹងអាណានិគមបារាំង ។ ដោយអាណានិគមនេះរកចាប់គ្រួសារទាំងអស់ទៅធ្វើទោសលោកក៏បានដូរនាមត្រកូលមក នួន វិញ ហើយក៏មានឈ្មោះ នួន ដួង រហូតមក ។

បន្ទាប់មកលោកក៏បានទៅបន្តការសិក្សាភាសាបាលីភាសាបារាំង និងឡាតាំងនៅវត្តពោធិវាលក្រុងបាត់ដំបង ។ ដល់រៀនចប់ក្នុងជន្មាយុ ២៧ឆ្នាំលោកត្រឡប់មកវត្តឧណ្ណាឡោមវិញ លោកក៏បានលាចាកសិក្ខាបទពីព្រះសង្ឃ(រូបថតទី១) ។ ហើយលោកបង្រៀនភាសាបាលីនៅវត្តនោះទៅ ។ លោកបានរៀបការជាមួយលោកស្រី ម៉ិញ សំយ៉ឹន (រូបថតទី២)ដែលមានដើមកំណើតនៅខេត្តកំពង់ធំ ។ លោកស្រីជាបុត្រីរបស់លោកសាស្ត្រាចារ្យ ម៉ិញ សារី និងលោកស្រី ប៊ុត ប្រកបហើយដែលនៅក្នុងវង្សត្រកូលអ្នកស្នេហាជាតិរបស់លោកតេជោ ម៉ិញ ។ លោកស្រីមានជាប់ខ្សែស្រឡាយជាមួយនឹងអ្នកម្នាងប៉ូង់ដែលជាមេដោះរបស់សម្តេចសីហនុ ។ លោក នួន ដួង ជាកូនសិស្សជំនិតរបស់ព្រះអាចារ្យ ហែម ចៀវ ហើយក៏ធ្វើការតស៊ូទាមទារឯករាជ្យពីអាណានិគមបារាំងជាមួយគ្នានឹងព្រះអាចារ្យ ហែម ចៀវ ព្រមជាមួយនឹងព្រះអាចារ្យ ប៉ាង ខាត់, លោក ប៉ាច ឈឺន, លោក សឹង ង៉ុកថាន់, ព្រះអាចារ្យ សូហាយ, អ៊ុក ជា, ខៀវ ជុំ, លោក ប៊ុណ្ណ ច័ន្ទម៉ុល, លោក ជុំ មួង និងអ្នកផ្សេងដទៃទៀតមក ។ បន្ទាប់មកនៅថ្ងៃទី១៧ កក្កដា ១៩៤២ (សូមអញ្ជើញអានសៀវភៅគុកនយោបាយរបស់លោក ប៊ុណ្ណ ច័ន្ទម៉ុល), បារាំងបានបញ្ជាឱ្យគេចាប់ព្រះអាចារ្យ ហែម ចៀវ និងលោក នួន ឌួង ដោយចោទថា ជាអ្នកបំបះបំបោររាស្ត្រប្រឆាំង នឹងបារាំង ។ បន្ទាប់ពីនោះមក, នៅថ្ងៃទី២០ កក្កដា ខ្មែរ និងព្រះសង្ឃផ្សេងទៀតនាំគ្នាធ្វើបាតុកម្មជាសន្តិភាពដើម្បីទាមទារឱ្យបារាំងដោះលែងលោកទាំងពីរមកវិញ ។ នៅពេលនោះបារាំងបានចាប់លោក ប៉ាច ឈឺន ទៅបាត់ ហើយបាតុកម្មជាសន្តិភាពក៏បានក្លាយទៅជាមានការប្រយុទ្ធគ្នារវាងប៉ូលិស និងបាតុករធ្វើឱ្យបារាំងមានលេសដើររកចាប់អ្នកផ្សេងទៀត មានលោក ប៊ុណ្ណ ច័ន្ទម៉ុល , ព្រះអាចារ្យ ប៉ាង ខាត់ ជាដើម ។ បែរមកលោក នួន ឌួង វិញ គេធ្វើទារុណកម្មលោកជាខ្លាំងក្នុងគុកធំនៅភ្នំពេញជាមួយព្រះអាចារ្យ ហែម ចៀវ ដោយវាយបញ្ចូកទឹកត្រីតាមមាត់តាមច្រមុះចងជើងឡើងលើ,សន្លប់ច្រើនដងរហូតដល់គ្រាំគ្រាជាខ្លាំង ។ បន្ទាប់មកគេបានបញ្ជូនលោកព្រមទាំងលោកអាចារ្យ ហែម ចៀវ និងលោក ប៉ាច ឈឺន ប៉ុន្តែ ក្រោយមកម៉ារេហ្សាល់ ប៉េកាំងបានលើកទោសឱ្យមកនៅត្រឹមនៅជាប់គុកមួយជីវិតវិញ ។ ក្រោយពីកាត់ទោសរួចហើយ គេក៏បានបញ្ជូនអ្នកទាំងអស់ទៅគុក កោះត្រឡាច នៅខែមិថុនា ១៩៤៣ ។ លោករងទុក្ខវេទនានៅកោះត្រឡាចមានជំងឺស្ពឹកដៃស្ពឹកជើង ហើយព្រះអាចារ្យ ហែម ចៀវ មានប្រឈួនជំងឺមួលជាទម្ងន់រហូតដល់សុគតលើភ្លៅលោកនៅក្នុងមន្ទីរពេទ្យគួរឱ្យអណោចអធម្មក្រៃលែង ។ ក្រោយមកដោយជប៉ុនបានវាយឈ្នះបារាំងនៅចុងឆ្នាំ១៩៤៤ ដល់ខែកុម្ភៈ ១៩៤៥ ទាហានជប៉ុនបានយកសំបុត្រពីភ្នំពេញឱ្យនាំយកអ្នកទាំងបួននាក់ គឺព្រះអាចារ្យ ហែម ចៀវ លោក នួន ឌួង លោក ប៉ាច ឈឺន និងលោក ប៊ុណ្ណ ច័ន្ទម៉ុល ទៅស្រុកវិញ ។ ដោយព្រះអាចារ្យ ហែម ចៀវ សុគតទៅហើយ , គេក៏បានយកតែ លោកទាំងបីនាក់មកព្រៃនគររួចមកភ្នំពេញឱ្យមានសេរីភាពឡើងវិញ ។

តទៅលេខក្រោយ

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**

បានបញ្ចេះសង្គ្រាមនៅឥណ្ឌូចិនឱ្យកាន់តែសាហាវឡើងជាលំដាប់។ ថ្ងៃទី២៨ ខែវិច្ឆិកា ឆ្នាំ ១៩៤៦ បារាំងបានទម្លាក់គ្រាប់បែកលើកំពង់ផែហៃហ្វុងបានបំផ្លាញចោលនូវកិច្ចសន្យាសាំងដឺនី-ហូជីមិញ។ ថ្ងៃទី១៦ ធ្នូ១៩៤៦ ការបះបោរនៅហាណូយបានឱ្យសញ្ញាថា សង្គ្រាមនៅឥណ្ឌូចិនផ្ទុះហើយ ។ ពេលនោះ ប៊ុល ឡាអ៊ែរ បានមកជំនួសដាសង់ឌិយើរ ដើម្បីរកមធ្យោបាយបានបញ្ចប់សង្គ្រាម ។ ប៊ុល ឡាអ៊ែរ បានយកសន្លឹកបៀរអធិរាជ បាវ ដាយ ដែលបានភៀសខ្លួនទៅនៅហុងកុង ហើយផ្លាស់ឈ្មោះថា ម្ចាស់វិញ ធុយ នោះមកប្រើសាកល្បងមើល។ បាវ ដាយ ក៏យល់ព្រមដោយដាក់ល័ក្ខខ័ណ្ឌមួយដែលបារាំងត្រូវភ្ជាប់កូសាំងស៊ីន ជាមួយប្រទេសយួន ។ ថ្ងៃទី៥ មិថុនា ១៩៤៨ អគ្គស្នងការថ្មី ប៊ុល ឡាអ៊ែរ បានចុះកិច្ចព្រមព្រាងមួយជាមួយអធិរាជបាវ ដាយទទួលស្គាល់ឯករាជ្យប្រទេសវៀតណាម ហើយបន្ទាប់មកហូជីមិញ ក៏រត់ចូលព្រៃធ្វើការតស៊ូជាកងឆ្មក់ ។

ឯនៅកម្ពុជាវិញ ព្រះបាទនរោត្តម សីហនុ បានផ្ញើរាជសារមួយច្បាប់ចុះថ្ងៃទី២៥ តុលា ១៩៤៨ ទៅរដ្ឋាភិបាលបារាំងទាមទារសិទ្ធិផ្សេងៗ ដូចដែលបារាំងបានយល់ព្រមជាមួយបាវដាយ ។ ថ្ងៃទី៨ ខែវិច្ឆិកា ១៩៤៨ ព្រះករុណា សីហនុ បានពិភាក្សាជាមួយអ្នកស្នងការបារាំងម្នាក់ឈ្មោះ ឡេអុង ពីញ៉ុង ស្តីអំពីឯករាជ្យនៃប្រទេសកម្ពុជា (នេះជាលើកដំបូង ដែលស្តេចខ្មែរហ៊ានប្រើពាក្យឯករាជ្យជាមួយបារាំង។ ទ្រង់មានព្រះរាជឱង្ការថា ខ្ញុំនិយាយពីឯករាជ ព្រោះខ្ញុំមានជំនឿយ៉ាងមាំថា ពាក្យនេះជាកូនសោសម្រាប់ដោះស្រាយចំណោទទាំងអស់របស់យើង ។ ប៉ុន្តែអ្នកស្នងការបារាំងធ្វើហាក់ដូចជាមិនដឹងមិនឮ និងមិនយល់នូវពាក្យនេះទាល់តែសោះ ។ ការដែលបារាំងវាយឫកព្រងើយកន្តើយមិនយកចិត្តទុកដាក់នូវពាក្យទាមទាររបស់ស្តេចខ្មែរនេះហើយដែលជាហេតុនាំឱ្យគណបក្សប្រជាធិបតេយ្យកាន់តែមានប្រជាប្រិយភាពខ្លាំងឡើង ហើយក៏ដើរតាមខ្សែបន្ទាត់នយោបាយអ្នកជាតិនិយម សឺន ង៉ុកថាន់ ចាប់តាំងពីឆ្នាំ ១៩៤៨ មក។ តំណាងរាស្ត្រគណបក្សប្រជាធិបតេយ្យក៏ព្យួរទុកច្បាប់ទាំងអស់ដែលស្តេចសីហនុដាក់ឱ្យរដ្ឋសភាពិនិត្យ ។ ដូចនេះការប្រទូស្តរាយគ្នារវាងនីតិបញ្ញត្តិ និងនីតិប្រតិបត្តិលាយឡំ និងការប្រកាន់បក្សពួកក្នុងគណបក្សប្រជាធិបតេយ្យផងនោះ បាននាំឱ្យមានវិបត្តិគណៈរដ្ឋមន្ត្រីជាច្រើនលើក គឺរដ្ឋាភិបាល ឈាន វ៉ម រដ្ឋាភិបាល ប៉ែន នុត ។ល។




ដោយពុំអាចយកឈ្នះពួកប្រជាធិបតេយ្យក្នុងការបោះឆ្នោតបាននោះ ស្តេចសីហនុ បានប្រើកលល្បិចថោកទាបមួយបែបទៀត គឺការញុះញង់បំបែកបំបាក់សាមគ្គីផ្ទៃក្នុងនៃគណបក្សប្រជាធិបតេយ្យមុនគេ គឺលោក យ៉ែម សំបួរ ដែលបានដឹកនាំរដ្ឋាភិបាលនៅខែកុម្ភៈ ឆ្នាំ១៩៤៩ ។ រដ្ឋាភិបាលលោក យ៉ែម សំបួរ នេះចាប់ផ្តើមកិច្ចការក្នុងពេលដែលហេតុការណ៍ស្មុគស្មាញបំផុតកំពុងកើតឡើង គឺនៅថ្ងៃទី២១ ខែឧសភា ឆ្នាំ១៩៤៩ រដ្ឋសភាបារាំងបានបោះឆ្នោតសម្រេចចិត្តភ្ជាប់កូសាំងស៊ីនទៅប្រទេសវៀតណាម ដោយឥតបានពិគ្រោះជាមួយប្រទេសកម្ពុជាជាមុនទេ ហើយឥតមានធ្វើលក្ខន្តិកៈអ្វីជាពិសេសសម្រាប់ប្រជារាស្ត្រខ្មែរកម្ពុជាក្រោមសោះឡើយ ។ ថ្ងៃទី១០ មីនា ១៩៤៩ សភានៃសហភាពបារាំងបានពិនិត្យគម្រោងការបង្កើតក្រុមជំនុំមួយនៅកូសាំងស៊ីនដែលមានភារៈបោះឆ្នោត យល់ព្រមឬប្រឆាំងនឹងការភ្ជាប់ទឹកដីកូសាំងស៊ីនទៅនឹងប្រទេសវៀតណាម ។ គម្រោងការដំសែនអាក្រក់លាមកនេះហើយ គឺជាអំពើមើលងាយខ្មែរពន់ពេកណាស់ដែលខ្មែរគ្រប់រូបត្រូវចងចាំ ហើយត្រូវគិតគូរតទៅមុខ។ បណ្តាសមាជិក៦៤ រូបដែលបំរុងឱ្យមានក្នុងក្រុមជំនុំនោះ៤៨រូបជាជនជាតិយួន ១៦ រូបជាបារាំងចំកួត ឯសមាជិក ជាជនជាតិខ្មែរវិញ សូម្បីតែម្នាក់ក៏គ្មានផង ។ ក្នុងកិច្ចពិភាក្សាលើគម្រោងការដំសែនលីលាចង្រៃនេះ គណៈប្រតិភូខ្មែរ ដែលដឹកនាំដោយម្ចាស់ក្សត្រី ប៉េងពាង យុគន្ធរ ដែលមិនបានដឹងរឿងរ៉ាវ និងបានយល់នូវអ្វីទាំងអស់នោះ នៅពេលបោះឆ្នោតក៏បានបោះឆ្នោតអនុបវាទទៅ។ ក្រៅពីរឿងបារាំងភ្ជាប់កូសាំងស៊ីនទៅនឹងប្រទេសយួននោះ រដ្ឋាភិបាល យ៉ែម សំបួរ មានបញ្ហាអសន្តិសុខដែលត្រូវដោះស្រាយ គឺរឿងឥស្សរៈនៅភាគខាងជើងប្រទេស និងរឿងយួនយៀកមិញដែលបានចូលទន្ទ្រានចូលមកតាំងទីនៅលើទឹកដីខ្មែរ ។

ទោះបីមានវិបត្តិឬព្រឹត្តិការណ៍អាក្រក់ៗដូចរៀបរាប់ខាងលើនេះក្តី មានបញ្ហាធ្ងន់ធ្ងរដែលជារឿងហិនហោចអន្តរាយដល់ប្រជាជាតិយ៉ាងណាក្តីអ្នកដឹកនាំខ្មែរជំនាន់នោះ ក៏ដូចជាជំនាន់នេះ

**តទៅលេខក្រោយ**

តមកពីទំព័រទី ៥

## បុគ្គលិកលក្ខណៈមនុស្សកើតឆ្នាំមមី....

**ប្រុសអាយុ :** ០៨.១៥.២០.២៧.៣២.៣៩. ៤៤.៥១.៥៦.៦៣.៦៨.៧៥.៨០ឆ្នាំ និងស្ត្រីអាយុ : ០៨.១៣.២០.២៥.៣២.៣៧. ៤៤.៤៩.៥៦.៦១ .៦៨.៧៣.៨០ឆ្នាំ

**ទំនាយថា** : ឆ្នាំនេះជាឆ្នាំនៃការមានជោគលាភ ប៉ុន្តែនឹងល្អបានទៅតាមលំដាប់ គឺចាប់តាំងពីដើមឆ្នាំ ហើយនឹងចេះតែកើនឡើងៗពីតិចទៅច្រើនជាលំដាប់ រហូតដល់ចុងឆ្នាំការសិក្សានឹងចេះតែរីកចម្រើនទៅមុខបន្តិចម្តងៗ លុះដល់ចុងឆ្នាំ ទើបល្អពេញកម្រិត ។

ការងារអ្វីៗក៏ដូចគ្នាដែរ នៅដើមឆ្នាំមិនសូវមានការរីកចម្រើនខ្លាំងប៉ុន្មានទេ លុះដល់ទៅកណ្តាលឆ្នាំ ទើបឃើញផលល្អជាមធ្យម លុះចុងឆ្នាំ ទើបទទួលផលពេញបរិបូណ៌ ។

ភាពរីចម្រើននឹងឃើញបានចាប់ពីខែឧសភាឡើងទៅ ហើយចេះតែកើនចម្រើនតទៅជាលំដាប់ រហូតពេញលេញបរិបូណ៌ដល់ទៅចុងឆ្នាំ ។

**ប្រុសអាយុ :** ០៧.១៦.១៩.២៨.៣១.៤០. ៤៣. ៥២.៥៥.៦៤.៦៧.៧៦.៧៩ឆ្នាំ និងស្ត្រីអាយុ : ០៦.១៥.១៨.២៧.៣០.៣៩.៤២.៥១. ៥៤.៦៣. ៦៦.៧៥.៧៨.ឆ្នាំ

**ទំនាយថា** : ឆ្នាំនេះជាឆ្នាំមានគ្រោះថ្នាក់ធំចូរប្រុងប្រយ័ត្នឱ្យមែនទែន ព្រោះហេតុនឹងកើតឡើងបានជាច្រើនប្រការគឺ :

**១**-កើតហាយនៈលិចលង់ គឺត្រូវខូចខាតលុយកាក់អស់រលីងពីខ្លួន ។

**២**-កើតការផ្លាស់ប្តូរព្រាត់ប្រាស់និរាសចាកចោលគ្នា ដោយសត្រូវធ្វើទោស ឬជួបសេចក្តីទុក្ខលំបាក ឬត្រូវធ្វើដំណើរទៅកាន់ស្រុកឆ្ងាយដោយមានហេតុចាំបាច់ ។ ចំពោះអ្នកដែលមានបំណងនឹងផ្លាស់ប្តូរ ឬចង់ធ្វើដំណើររមែងបានសម្រេចដូចសេចក្តីបំណង ។

**៣**-បងប្អូនញាតិមិត្តជាទីស្រឡាញ់នឹងប្រែក្លាយទៅជាសត្រូវស្អប់ខ្ពើមគ្នា ។

**៤**-ត្រូវគេឆបោកកេងប្រវ័ញ្ចធ្វើបាបឱ្យខូចខាតនូវរបស់ជាទីស្រឡាញ់ហួងហែងជាទីគាប់ចិត្ត ។

**៥**-ត្រូវចោរលួច ឬភ្លើងឆេះឱ្យបានទទួលសេចក្តីក្តៅក្រហាយនឹងការខកចិត្ត ។

**៦**-អ្នកធ្វើការជាមួយគ្នាមានគំនិតផ្តន្ទាឈ្នានិស ឬរង់ចាំចាប់កំហុសជាហេតុ ធ្វើឱ្យទទួលទោសទណ្ឌធ្វើការងារច្រើនលើសលន់ ប៉ុន្តែសេចក្តីគួរគាប់គ្មាន គឺត្រូវគេបោកបញ្ឆោតទៅក្នុងផ្លូវអកុសល ។

### ថ្ងៃជាសិរីមង្គល

ថ្ងៃជាសិរីមង្គល ដើម្បីជ្រើសរើសសម្រាប់ប្រើក្នុងពិធីសំខាន់ៗរបស់ខ្លួនដូចជារៀបអាពាហ៍ពិពាហ៍លើករាសីបុណ្យទានធំៗ ពិធីជាមង្គលផ្សេងៗដែលទាក់ទងនឹងសុវត្ថិភាពសេចក្តីចម្រុងចម្រើនរុងរឿងក្នុងជីវិតត្រូវតែចាប់ផ្តើមឡើងជាដំបូងគឺថ្ងៃ :

**១-ថ្ងៃសៅរ៍ ២-ថ្ងៃអាទិត្យ ៣-ថ្ងៃអង្គារ ៤-ថ្ងៃពុធ**

ការជ្រើសរើសគូស្រករសម្រាប់មនុស្សកើតឆ្នាំមមី

**បើប្រុសគួរជ្រើសរើស**

គូស្រករដែលមានឆ្នាំកំណើត **ឆ្នាំវក ឆ្នាំច**

**បើប្រុសមិនគួរជ្រើសរើស**

គូស្រករដែលមានឆ្នាំកំណើត **ឆ្នាំជូត និងឆ្នាំថោះ**

**បើស្រីគួរជ្រើសរើស** គូស្រករដែលមានឆ្នាំកំណើត **ឆ្នាំថោះ និង ឆ្នាំវក** **បើស្រីមិនគួរជ្រើសរើស** គូស្រករដែលមានឆ្នាំកំណើត**ឆ្នាំឆ្លូវ ឆ្នាំខាល និងឆ្នាំកុរ** លោកអ្នកជាឪពុកម្តាយដែលមានឆ្នាំកំណើរជាឆ្នាំមមីកូនចៅប្រុសស្រីកើតក្នុងឆ្នាំដូចខាងក្រោម :

ជូត ហាក់ដូចជាពុំមានបរិយាកាសសប្បាយរីករាយទេ ជាពិសេសម្តាយដែលកើតក្នុងឆ្នាំមមីនេះ ពិបាកនឹងមានការស្រុះស្រួលគ្នាណាស់ ។

ឆ្លូវ ឪពុកម្តាយប្រៀនប្រដៅតឹងរឹងពេក ។ ឆ្នាំគោមិនអាចទទួលយកបានហេតុនេះ ហើយនឹងអាចមានស្នាមខ្លះៗ ដែលមិនអាចនឹងបំពេញបាន ។

ខាល ការប្រាស្រ័យទាក់ទងគ្នាបានល្អប្រសើរ។ ឆ្នាំសេះ នឹងអាចផ្តល់នូវសេរីភាពយ៉ាងធំទូលាយឱ្យដល់ឆ្នាំខ្លា ហើយទាំងអស់គ្នាមានភាពសមញ្ញនិងមិនចេះប្រកែប្រកាន់គ្នាឡើយ ។

ថោះ ឆ្នាំសេះជាប់មមាញឹកក្នុងការងារហើយក៏មិនសូវបានយកចិត្តទុកដាក់ចំពោះឆ្នាំទន្សាយ ។ ប៉ុន្តែចំពោះឆ្នាំទន្សាយវិញ គឺមិនរអ៊ូរទាំអ្វីទេ ព្រោះអាចស្វែងរកការសប្បាយដោយខ្លួនឯងបាន ។

រោង ការងាររាប់រយជំពូកមានការពិគ្រោះនិងពិភាក្សាគ្នា ដោយមានការតស៊ូមតិយ៉ាងខ្លាំងក្លា ។ នេះពិតជាស្នារតីដ៏ក្លៀវក្លារបស់ឆ្នាំនាគ និងឆ្នាំសេះ ។

ម្សាញ់ ឆ្នាំពស់រមែងតែងតែរអ៊ូរទាំដាក់ឆ្នាំសេះ ដែលធ្វើឱ្យសេះភ័យខ្លាច ពុំមានសេចក្តីសុខនៅក្នុងសន្តានឡើយ ។

មមី ការយោគយល់គ្នាទៅវិញទៅមក ដោយងាយនឹងឆ្លុះឆ្មៀលរកឃើញកំហុសរបស់គូភាគីម្ខាងទៀត ។

មមែ ការរួមរស់នៅជាមួយគ្នាប្រកបដោយសេចក្តីសុខសប្បាយរីករាយ ប៉ុន្តែកូនចៅប្រុសស្រីខ្វះខាតសមត្ថភាពឯករាជម្ចាស់ការ ហើយរឹតតែមិនបាច់ថ្លែងថា អាចបីបាច់រក្សាឪពុកម្តាយនោះឡើយ ។

វក មិនសូវអើពើ ប៉ុន្តែទោះជាយ៉ាងដូច្នេះក្តី ក៏ពុំមានរឿងទុកកង្វល់ដែរ ។

រកា ឆ្នាំមាន់ផ្តោតក្តីសង្ឃឹមឱ្យឆ្នាំសេះស្រឡាញ់ ប៉ុន្តែឆ្នាំសេះធ្វើព្រងើយកន្តើយហាក់ពុំរវីរវល់អ្វីសោះឡើយ ។

ច ឆ្នាំសេះហាក់ដូចជាបីបាច់ថែរក្សាឆ្នាំឆ្កែតិចតួចណាស់ ប៉ុន្តែឆ្នាំឆ្កែអាចម្ចាស់ការដោយខ្លួនឯង ។

កុរ ឆ្នាំជ្រូកយល់ឃើញថា ឆ្នាំសេះគិតតែពីរឿងខ្លួនឯងផ្ទាល់ ។ ហេតុនេះពិតជាមានការតូចចិត្តសម្បើមណាស់ ៕






The smaller
the customer.

Better Products, Better Service
A community bank

| | Washington SAVINGS BANK We give you more | Big Banks |
|---|---|---|
| ATMs | 60,000 Nationwide free ATMs | Much Less! |
| Free Checking | YES! | Are you kidding? |
| Online Banking | Everything the 'Big Banks' have: Online banking, Bill payment, mobile banking, mobile deposit | We'll give them this one, they have it too |
| Free Designer Debit Card | YES, OVER 80 DESIGNS! | They are not that creative |
| Unlimited Debit Card Cash Rewards | YES! Anytime, Anywhere | No |
| Customer Service | Friendly local people who really want to help solve problems | One word "Voicemail" |
| Lending | Local decisions, by local people who sincerely want to work with you. Your place or ours, day, evening or weekend | See above |
| Bank Headquarters | Lowell, MA - your money and loan payments stay in your community | Canada, Spain Scotland, North Carolina |






**PLUS RECEIVE A FREE**

# kindle fire®

- Monthly Direct Deposit of at least $1,000
- At least one monthly automatic payment
- An active debit card




washingtonsavings.com

**978-458-7999**

Member FDIC/ Member DIF / Equal Housing Lender

See reverse side for terms and conditions